# ខ្មែរប៉ុស្តិ៍
ឆ្នេរខាងកើត
THE KHMER POST
EAST COAST
The Cambodian-American Biweekly News


Email : Khmerpostusa@gmail.com
Call : (267) 253-3947


VOLUME 04 ISSUE 60 May 21th - June 10th 2010


# ទឹម សាខន : ពីបកស្បង់មកគ្រងចីពរវិញ

**ហ៊្វីឡាដែលហ្វៀ** : ព្រះសង្ឃបីអង្គ ដែលបានត្រូវបំបួសនៅវត្តសុរិយារង្សី កាលពីថ្ងៃទី៧ ឧសភា ឆ្នាំ ២០១០ កន្លងទៅនេះ បានផ្ដល់សញ្ញាជាសាធារណថា គឺជាជោគជ័យថ្មីមួយទៀត របស់សហព័ន្ធខ្មែរកម្ពុជាក្រោម ដែលខិតខំតស៊ូទាមទារសិទ្ធិជាពលរដ្ឋពេញលក្ខណៈលើទឹកដីដូនតារបស់ខ្លួន ។ ព្រះសង្ឃបីអង្គនោះ ព្រះនាម ទឹម សាខន ជាអតីតចៅអធិការវត្តភ្នំដិន (**តទៅទំព័រទី ០២**)




# យុទ្ធនាការរួម សម រង្ស៊ី - ស៊ាន ប៉េងសែ នៅអាមេរិក

ដោយ : ពិន សំខុន

•••នៅលើសេចក្តីប្រកាសព័តិមានដែលយើងទទួលបានញូពីប្រទេសបារាំង លោក ស៊ាន ប៉េង សែ នឹងចេញធ្វើយុទ្ធនាការរួមជាមួយ លោក សម រង្ស៊ី នៅសហរដ្ឋអាមមេរិក ចំនួន ២ សប្តាហ៍ជាលើកដំបូងបង្អស់







ដើម្បីបង្ហាញពីការគ្រោះថ្នាក់នៃព្រំប្រទល់ដែនកម្ពុជា នឹងនយោបាយកម្ពុជាបច្ចុប្បន្ន ។ លោក ស៊ាន ប៉េងសែ ដែលជាសកម្មជនឯករាជ្យដឹកនាំគណកម្មាធិការព្រំដែនកម្ពុជាប្រទេសបារាំងមានសមាជិក និងអ្នកឯកទេសប្រមាណ២០០នាក់ គាំទ្រសកម្មភាពការពារព្រំប្រទល់ដែនខ្មែរ របស់លោកពុំមានបំណងឱ្យសាធារណៈជនយល់ច្រឡំថា សកម្មភាពរបស់លោកគឺ ធ្វើនយោបាយដណ្ដើមអំណាចពីអ្នកណាម្នាក់នោះទេ ។រីឯលោក សម រង្ស៊ី ពេលនេះជាសមាជិកសភាតំណាងរាស្ត្រខ្មែរ តែរងគ្រោះនយោបាយកម្ពុជាពុំអាចឱ្យលោកត្រឡប់ទៅធ្វើកានៅក្នុងប្រទេសវិញបាន ពីព្រោះលោកបានដកបង្គោលឈើមួយដែលរដ្ឋាភិបាលខ្មែរបានចាត់ទុកថា ជាកំណត់ព្រំប្រទល់ដែនខ្មែរវៀតណាម ។ ថ្នាក់ដឹកនាំទាំងពីរមានបុព្វហេតុរួមនឹងបើកកកាយបង្ហាញការពិតនៃវិបត្តិកម្ពុជាទាក់ទងទៅនឹងដំណើរទៅរកការបាត់បង់នូវបូរណភាព និងទឹកដីកម្ពុជា ជូនពលរដ្ឋខ្មែរនៅសហរដ្ឋអាមេរិក ដែលកម្មវិធីនេះ នឹងប្រព្រឹត្តទៅចាប់ពីថ្ងៃទី ២២ ខែ ឧសភា ឆ្នាំ២០១០ នៅឡូវែល រហូតដល់ថ្ងៃទី ០៦ ខែ មិថុនា ឆ្នាំ ២០១០ ។ (**តទៅទំព័រទី ០៥**)

# យោគីម្នាក់រស់ដោយអត់បាយអត់ទឹក៦៥ឆ្នាំ

•••យោគីម្នាក់អាយុ ៨៣ឆ្នាំ ឈ្មោះប្រាឡាដ ចានី រស់ដោយធ្វើសម្មាធិចំនួន៦៥ឆ្នាំ នៅរូងភ្នំមួយនៃតំបន់ អំបាជី ខេត្តគូចារ៉ាក នៃប្រទេសឥណ្ឌា បានធ្វើឱ្យអ្នកវិទ្យាសាស្ត្រឥណ្ឌា មានការភ្ញាក់ផ្អើលយ៉ាងខ្លាំង បន្ទាប់ពីពេលគាត់បានអនុញ្ញាតិឱ្យអ្នកវិទ្យាសាស្ត្រច្រើនរូបធ្វើការពិសោធន៍លើរូបគាត់ចំនួន ១០ថ្ងៃមក ។



យោគី ឈ្មោះ ប្រាឡាដ ចានីនេះ បានបង្ហាញនូវការអត់ពិសារចំណីអាហារ និងផឹកទឹក ជាពិសេសមិនមានបញ្ចេញទឹកនោម ឬលាមកបន្តិចណាសោះ នៅក្នុងពេលដែលគេធ្វើការពិសោធន៍លើរូបគាត់ ហើយគាត់បានចេញពីមន្ទីរពិសោធន៍វិញហើយនាថ្ងៃព្រហស្បតិ៍ ទី១៣ ឧសភានេះ ប្រកបដោយសុខភាពធម្មតារបស់គាត់ ដោយគ្មានបាក់ស្រុតចុះ... នេះជាសេចក្ដីថ្លែងការណ៍របស់អ្នកវិទ្យាសាស្ត្រនៅអាមេដាបាត ។

ក្រុមអ្នកតាមដានរឿងនេះ មានអ្នកកាសែតម្នាក់ឈ្មោះ សុធា សា មានឯកទេសខាងខួរក្បាលម្នាក់ និងក្រុមវេជ្ជបណ្ឌិតចំនួន៣០នាក់ ដែលបានឧទ្ទានថា "ខ្ញុំនៅតែមិនយល់ថា តើមនុស្សម្នាក់អាចគេចពីសេចក្ដីស្លាប់រួចដែរឬ ដោយមិនមាននោម ឬជុះនោះ ? ឧប្បត្តិហេតុនេះស្ថិតនៅក្នុងអាថិកំបាំងណាស់" ។ (**តទៅទំព័រទី ០៤**)

# មូរ សុខហួរ បានរង្វាន់សិទ្ធិមនុស្សអន្តរជាតិ



•••ព្រឹត្តិបត្រ ឌីឃែមបូឌាដេលី បានឱ្យដឹងថាតំណាង គណបក្ស សម រង្ស៊ី លោកស្រី មូរ សុខហួរ បានទទួលនូវរង្វាន់ People´s Choice Award ប្រចាំឆ្នាំ ២០១០ របស់អង្គការ GLOBAL EXCHANGE ដែលជាអង្គការសិទ្ធិមនុស្សអន្តរជាតិចំពោះការងារសិទ្ធិមនុស្សរបស់លោកស្រីនៅក្នុងប្រទេសកម្ពុជា ។ អង្គការ GLOBAL EXCHANGE គឺជាអង្គការដែលមានមូលដ្ឋាននៅសហរដ្ឋអាមេរិក ផ្តល់រង្វាន់ដល់បុគ្គលិកសិទ្ធិមនុស្សឆ្នើមប្រចាំឆ្នាំ ។ ការឈ្នះរង្វាន់នេះ គឺតាមរយៈការបោះឆ្នោតតាមប្រព័ន្ធអ៊ីនធើណេត ដើម្បីជ្រើសរើសយកអ្នកឈ្នះ ។ បើតាមវែបសាយរបស់អង្គការនោះបានឱ្យដឹងថា លោកស្រី មូរ សុខហួរ បានជាប់ចំណាត់ថ្នាក់លើគេក្នុងការបោះឆ្នោតដោយមាន៨៧៨សំឡេងនាំមុខនាង ម៉ាឡាឡៃ ចូយ៉ា សមាជិកសភាវ័យក្មេងរបស់ប្រទេសអាហ្វហ្គានីស្ថាន ដែលជាប់ចំណាត់ថ្នាក់លេខ២ ដោយមាន ៦៦១ សំឡេង។ លោកស្រី មូរ សុខហួរ កាលពីម្សិលមិញ បានថ្លែងអំណរគុណចំពោះអ្នកដែលបានបោះឆ្នោតគាំទ្រលោកស្រីក្នុងការប្រកួតប្រជែងនេះ ។ លោកស្រី ថាពួកគេបោះឆ្នោតដើម្បីសិទ្ធិមនុស្សសម្រាប់គ្រប់គ្នា និងមានការប្តេជ្ញាចិត្តដូចគ្នា ដើម្បីធ្វើឱ្យស្ថានភាពសិទ្ធិមនុស្សក្នុងប្រទេសកម្ពុជាបានប្រសើរឡើង ។ លោកស្រី មូរ សុខហួរ និយាយថា កូនស្រីរបស់លោកស្រីនឹងទទួលរង្វាន់នោះជំនួសលោកស្រី រួមនឹងប្រាក់ ១.០០០ដុល្លារផងដែរ នៅក្នុងពិធីមួយក្នុងទីក្រុងសាន់ហ្វ្រាន់ ស៊ីស្កូ នៅថ្ងៃទី២៧ ខែឧសភា ៕

# សូមសរសើរដល់សិស្សកូនខ្មែរ ជសេហ្វ ខាំ

## រៀននៅវិទ្យាល័យកំរិតទី១១



*ហ្វីឡាដែលហ្វៀខាងជើង :* ឆ្នាំនេះម្តាយឪពុក ជស្វេហ ខាំ គឺលោក និងលោកស្រី កែវ ហឿន មានសេចក្តីត្រេកអរឥតឧបមា ដោយកូនប្រុសរៀនបានចំណាត់ថ្នាក់កិត្តិយសកំរិតទីពីរ 2nd. Honorable។ ឆ្នាំមុនៗ ជសេហ្វ រៀនចុះថយខ្លាំងណាស់ តែ ជសេហ្វ និយាយថា "ដោយខ្ញុំឃើញម្តាយឪពុកខ្ញុំខិតខំជួយដល់ការសិក្សាខ្ញុំយ៉ាងខ្លាំង ខ្ញុំមិនចង់ឱ្យគាត់ខកចិត្តទេ ហើយឆ្នាំនេះគ្រូបង្រៀនថ្មីរបស់ខ្ញុំ ក៏ជួយបង្រៀនខ្ញុំបានល្អថែមទៀត ធ្វើឱ្យការរៀនរបស់ខ្ញុំមានសន្ទុះឡើងយ៉ាងខ្លាំង" ។

"ថ្មីៗនេះខ្ញុំបានទទួលការជ្រើសរើសឱ្យទៅបំពេញ ការងារជួយសង់ផ្ទះឱ្យអ្នករងគ្រោះដោយទឹកជំនន់កាទ្រីណា នៅមីស៊ីស៊ីពី ខ្ញុំបានជាប់ឈ្មោះក្នុងចំណោមអ្នកស្ម័គ្រចិត្ត សិស្ស ២០នាក់ ឱ្យទៅបំពេញកម្មវិធីជាជំនួយដល់កិច្ចការសាលាចំនួន ១៥ថ្ងៃ ខ្ញុំសប្បាយចិត្តណាស់" ។

ជសេហ្វ ខាំ មានបំណងបន្តការសិក្សានៅមហាវិទ្យាល័យ ផ្នែកខាងតុលាការផ្នែកឧក្រិដ្ឋកម្ម" ខ្មែរប៉ុស្តិ៍ សុំសំដែងការកោតសរសើរដល់ ជសេហ្វ និងម្តាយឪពុក ដែលបានបំពេញភារកិច្ចបានល្អប្រសើរសំរាប់ល្អខ្លួនឯង និងទុកជាគំរូដល់ការសិក្សានៅហ្វីឡាដែលហ្វៀនេះផង ៕ **ខ្មែរប៉ុស្តិ៍**



ក្រុមគ្រួសារលោក កែវ ហឿន

តមកទំព័រទី ០១

# ទីម សាខន : ពីបកស្បង់មកគ្រង...



លោក ទីម សាខន លោក យាញ់ ទោ លោក គីម មឿន





ឆ្នាំ២០០៩ កន្លងទៅនេះ ។

នាឱកាសដែលសហព័ន្ធខ្មែរកម្ពុជាក្រោម រៀបចំសន្និបាតយ៉ាងមហាញ៉ឹកនៅ អ.ស.ប ឬនៅឱកាសសន្និបាតយុវជនខ្មែរក្រោមពិភពលោកនោះ លោក ទីម សាខន លោក យាញ់ ទោ និង គីម មល់ បានត្រូវអញ្ជើញឱ្យមកចូលរួមនៅសហរដ្ឋអាមេរិកនេះ ដើម្បីឱ្យអ្នកទាំងបី នាំសក្ខីកម្មពីទុក្ខវេទនារបស់ខ្លួនប្រាប់ដល់ពិភពលោក ដែលស្រឡាញ់សេរីភាពឱ្យ

និងអតីតសមណនិស្សិតព្រះនាម យាញ់ ទោ និង គីម មល់ បានត្រូវអាជ្ញាធរ និងគណសង្ឃខ្មែរចាប់ផ្សឹកកាលពីឆ្នាំ២០០៨ ហើយបញ្ជូនឱ្យទៅជាប់ពន្ធនាគារនៅវៀតណាម ពីបទធ្វើសកម្មភាពផ្ទុយនឹងវិន័យសង្ឃប្រឆាំងនឹងវៀតណាម តែបានត្រូវសហព័ន្ធខ្មែរកម្ពុជាក្រោម ធ្វើការតវ៉ាយ៉ាងស្វិតស្វាញរហូតដល់បានទទួលសិទ្ធិជ្រកកោននៅន័រវេ កាលពី

បានជ្រាបពីការរំលោភលើព្រះសង្ឃ និងគ្រហស្ថដែលមានដើមកំណើតជាខ្មែរ ហើយកំពុងរស់នៅលើដែនដីកម្ពុជា ឬកម្ពុជាក្រោម ។

ថ្ងៃទី៧ ឧសភាកន្លងទៅនេះ នៅវត្តសុរិយារង្សី ឬវត្តខាងជើងហ្វីឡាដែលហ្វៀ ពុទ្ធបរិស័ទជើងវត្ត និងសមាជិកសហព័ន្ធ បានចូលរួមរីករាយក្នុងពិធីបំបួសអតីតសង្ឃទាំងបីរូបឡើងវិញ ក្រោមការដឹកនាំរបស់ព្រះគ្រូ ចិន្តា ជាឧបជ្ឈា និងព្រះសង្ឃចៅអធិការជាច្រើនវត្តទៀត ដែលបាននិមន្តមកជាអធិបតីផងដែរ ។

នៅថ្ងៃបំបួសរួចហើយ ព្រះសង្ឃទាំងបីបានទៅជួបក្រសួងការបរទេស ដែល VOA បានរាយការណ៍ដូចតទៅ :

## Khmer Krom Activists Meet US Officials

By kkneditor
Created 9 May 2010 - 4:53am
[1]Report by VOA [2]

Advocates for ethnic Khmers from Vietnam met with US State Department officials this week in an effort to improve human rights and religious freedoms there. The delegation included three Khmer monks who had spent about one year in jail each in Vietnam, in what they say is religious persecution.

Khmers from southern Vietnam, land often referred to in Cambodia as Kampuchea Krom, or "Lower Cambodia," say Vietnamese authorities continue to suppress their rights, including land seizures and a lack of access to education. Kampuchea Krom, in the Mekong Delta region,

was ceded to Vietnam by the French in 1949.

"We want to see the Vietnamese government recognize that Khmer Krom land belongs to Cambodia," said Thach Ngoc Thach, president of the Khmer Kampucha Krom Federation, who met with State Department officials on Tuesday. "Vietnam has to apologize to the Cambodian people for the persecution of Khmer Krom people."

The State Department meeting included officials that work with Vietnam, Cambodia and refugees, he said, and particularly focused on helping Khmer Krom find asylum once they flee Vietnam. The Cambodian government has said it will grant citizenship to any Khmer Krom, but that has not always happened, leading some to flee to Thailand in search of asylum.

Also attending the meeting were Tim Sakhorn, a former Khmer Krom monk who was defrocked by Cambodian Buddhists in 2007 and expelled to Vietnam, and monks Dinh Tol and Kim Moul. All three spent time in Vietnamese prisons that year but have since been granted asylum status. They were each re-ordained in the US last week.

"I came to the US this time to submit documents and be present as a live witness to US officials," Tim Sakhorn told VOA Khmer after the meeting.

Vietnamese and State Department officials declined to comment on Tuesday's meeting.

# វិភាគនយោបាយ : ដំណើររណ្តោះទៅរកការរលត់នៃគណបក្សហ្វ៊ុនស៊ិនប៉ិច?

**ខ្មែរប៉ុស្តិ៍ : ទិត្យ សុវណ្ណារិទ្ធ**

•••កាលពីថ្ងៃទី7 ខែឧសភា ឆ្នាំ2010កន្លងទៅថ្មីៗនេះ លោក ហ៊ុន សែន បានប្រកាសក្នុងកិច្ចប្រជុំបិទទ្វារមួយអំពីការដកលោក ហ៊ុន ភឿង ចេញពីមុខតំណែងរដ្ឋលេខាធិការនៃក្រសួងការពារជាតិ ។

លោក ហ៊ុន ភឿង មានឋានន្តរស័ក្តិក្នុងកងយោធពលខេមរភូមិន្ទជានាយឧត្តមសេនីយ៍ឯក (ផ្កាយ3) និងជារដ្ឋលេខាធិការក្រសួងការពារជាតិ ដែលជាកូតានៃគណបក្សហ្វ៊ុនស៊ិនប៉ិច ។

លោក ហ៊ុន សែន បានលើកបង្ហាញអំពីមូលហេតុនៃការដកលោក ហ៊ុន ភឿង ចេញពីមុខដំណែងនោះថា "ខ្លួនមួយជិះទូកពីរ" មានន័យថា លោក ហ៊ុន ភឿង ជាសមាជិករដ្ឋាភិបាលចម្រុះប្រជាជន-ហ្វ៊ុនស៊ិនប៉ិចផង ហើយលួចទៅធ្វើការជាមួយគណបក្សប្រឆាំងថែមទៀត ។ ទោះជាយ៉ាងនេះក្តីលោក ហ៊ុន សែន មិនបានបញ្ជាក់អំពីឈ្មោះនៃគណបក្សប្រឆាំងដែលជាឫសគល់នៃបុព្វហេតុចម្បងឈានដល់ការដកតំណែងរបស់លោក ហ៊ុន ភឿង ឡើយ ។

លោក ហ៊ុន ភឿង ត្រូវបានចោទប្រកាន់ថា ជាមនុស្សរបស់ក្រុមលោក លឺ ឡាយស្រេង អនុប្រធានទី1នៃគណបក្សហ្វ៊ុនស៊ិនប៉ិច ដែលជាក្រុមមួយប្រឆាំងនឹងការដឹកនាំរបស់លោក ញ៉ឹក ប៊ុនឆៃ ក្នុងគណបក្សហ្វ៊ុនស៊ិនប៉ិច ដែលកន្លងមកត្រូវបានលោក ហ៊ុន សែន ចោទថា បានលួចមានទំនាក់ទំនង និងធ្វើការដោយសម្ងាត់ជាមួយគណបក្សប្រឆាំង ដែលគេជឿថា ជាគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស ។



លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន



សម្តេចក្រុមព្រះ នរោត្តម រណឫទ្ធិ



លោក ហ៊ុន ភឿង



លោក ញ៉ឹក ប៊ុនឆៃ

លោក ហ៊ុន ភឿង បានស្រាយបំភ្លឺចំពោះការចោទប្រកាន់នោះថា លោកពុំដែលបានជួបប្រជុំជាមួយគណបក្សប្រឆាំង ឬសូម្បីតែជួបមន្ត្រីសាមញ្ញនៃគណបក្សប្រឆាំងណាម្នាក់ក៏គ្មានដែរ ចាប់តាំងពីការបង្កើតរដ្ឋាភិបាលចម្រុះអាណត្តិទី4មក ។

គេសង្កេតឃើញថា ក្រោយការបោះឆ្នោតឆ្នាំ 2008 និងក្រោយការបង្កើតរដ្ឋាភិបាលចម្រុះអាណត្តិទី4 ក្រុមរបស់លោក លឺ ឡាយស្រេង មានខ្លួនគាត់ផ្ទាល់លោក កែវ ពុទ្ធ រស្មី និងទ្រង់ ស៊ីសុវត្ថិ សេរីរ័ត្ន ដែលជាបុត្ររបស់ទ្រង់ ស៊ីរីមតៈ មិនត្រូវបានលោក ហ៊ុន សែន ប្រគល់តំណែងអ្វីទាំងអស់ក្នុងរដ្ឋាភិបាល ។

លោក លឺ ឡាយស្រេង, កែវ ពុទ្ធរស្មី និង ទ្រង់ ស៊ីសុវត្ថិ សេរីរ័ត្ន ត្រូវបានលោក ហ៊ុន សែន ប្រើប្រាស់ដោយរួមដៃជាមួយលោក ញ៉ឹក ប៊ុនឆៃ ដើម្បីធ្វើបក្សប្រហារទម្លាក់សម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ចេញពីប្រធានគណបក្សហ្វ៊ុន ស៊ិនប៉ិចនាថ្ងៃទី18 ខែតុលា ឆ្នាំ2006 ។

បុព្វហេតុចម្បងដែលក្រុមលោក លឺ ឡាយ ស្រេង មិនបានទទួលតំណែងក្នុងរដ្ឋាភិបាល អាណត្តិទី4នេះ ព្រោះលោក លឺ ឡាយស្រេង បានធ្វើការវាយប្រហារវត្តមានរបស់យួននៅកម្ពុជាក្នុងអំឡុងពេលយុទ្ធនាការឃោសនាបោះឆ្នោតនាខែកក្កដា ឆ្នាំ2008 ។ ម្យ៉ាងវិញ ទៀតក្រុមលោក លឺ ឡាយស្រេង បានប្រឆាំងនឹងក្រុមលោក ញ៉ឹក ប៊ុនឆៃ ដែលមានទំនោរដឹកនាំគណបក្សហ្វ៊ុនស៊ិនប៉ិចតាមរបៀបអាយ៉ងរបស់គណបក្សប្រជាជនកម្ពុជា ។ លោក ហ៊ុន សែន បានចងគំនុំជាមួយលោក លឺ ឡាយស្រេង ព្រោះគាត់បានប្រឆាំងនឹងមហាមិត្តនិងជាគ្រូបាអាចារ្យរបស់គាត់ គឺ "យួនកុម្មុយនិស្ត" ជាពិសេសប្រឆាំងនឹងការគ្រប់គ្រងរបស់គាត់មកលើគណបក្សហ្វ៊ុនស៊ិនប៉ិច ។

ផ្ទុយទៅវិញលោក ញ៉ឹក ប៊ុនឆៃ ដែលជាអគ្គលេខាធិការគណបក្សហ្វ៊ុនស៊ិនប៉ិចបានទទួលតំណែងជាឧបនាយករដ្ឋមន្ត្រី និងបរិវាររបស់គាត់ក៏បានទទួលតំណែងនៅក្នុងរដ្ឋាភិបាលផងដែរ ។

មជ្ឈដ្ឋានអ្នកវិភាគបានវាយតម្លៃថា លោក ញ៉ឹក ប៊ុនឆៃ បានទទួលតំណែងឧបនាយករដ្ឋមន្ត្រី នេះព្រោះគាត់ជាកូនជើងដាច់ថ្លៃរបស់លោក ហ៊ុន សែន ហើយលោក ហ៊ុន សែន អាចប្រើប្រាស់គាត់ឱ្យធ្វើអ្វីក៏បានដែរ ។ ម្យ៉ាងវិញទៀតលោក ញ៉ឹក ប៊ុនឆៃ បាននិងកំពុងជាប់អន្ទាក់រួចទៅហើយ ដែលពាក់ព័ន្ធនឹងករណីរោងចក្រផលិតគ្រឿងញៀនដ៏ធំ ដែលត្រូវបានរកឃើញ និងបង្ក្រាបដោយសមត្ថកិច្ចកាលពីខែមេសា ឆ្នាំ2007កន្លងទៅនេះ ។ នេះជាសំណុំរឿងឧក្រិដ្ឋដ៏ធ្ងន់ធ្ងរមួយដែលធ្វើឱ្យលោក ញ៉ឹក ប៊ុនឆៃ មិនបានគេចផុតពីប្រញ៉ាំដៃរបស់លោក ហ៊ុន សែន បានឡើយ ។

ចំណែកលោក ហ៊ុន ភឿង ត្រូវបានគេដឹងថាជាមនុស្សរបស់លោក ញ៉ឹក ប៊ុនឆៃ ដែលបានរៀបចំយុទ្ធសាស្ត្រ និងផែនការទម្លាក់ធ្វើបក្សប្រហារទម្លាក់សម្តេចក្រុមព្រះ នរោត្តម រណឫទ្ធិ ចេញពីប្រធានគណបក្សហ្វ៊ុនស៊ិនប៉ិច ។ លោក ហ៊ុន ភឿង បានទទួលតំណែងរដ្ឋលេខាធិការនៃក្រសួងការពារជាតិ ក៏ដោយសារភក្តីភាពរបស់ គាត់ចំពោះលោក ញ៉ឹក ប៊ុនឆៃ ក្នុងការព្យាបាទសម្តេចក្រុមព្រះផងដែរ ។

ការចោទប្រកាន់ថា លោក ហ៊ុន ភឿង ថាបានលួចធ្វើការជាមួយគណបក្សប្រឆាំងពីសំណាក់លោក ហ៊ុន សែន មើលទៅហាក់គ្មានមូលដ្ឋានទាល់តែសោះ ព្រោះលោក ហ៊ុន ភឿង គ្រាន់តែធ្វើអ្វីៗទៅតាមតែបញ្ជា និងការណែនាំរបស់លោក ញ៉ឹក ប៊ុនឆៃ ប៉ុណ្ណោះ ។ កន្លងមក លោក ញ៉ឹក ប៊ុនឆៃ ធ្លាប់ត្រូវបានគេរាយការណ៍មកថា បានលួចជួបដោយសម្ងាត់ជាមួយលោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស និងមន្ត្រីជាន់ខ្ពស់គណបក្សសមរង្ស៊ី ក្នុងគោលបំណងបញ្ជូនសារទៅលោក ហ៊ុន សែន ថាបើហ៊ានបោះបង់គាត់ចោល គាត់នៅមាន កឹម សុខា និង សម រង្ស៊ី ដើម្បីធ្វើជាខ្នងបង្អែកបន្តធ្វើនយោបាយប្រឆាំងនឹងគណបក្សប្រជាជនកម្ពុជាតទៅទៀត ។ សូម្បីលោក ហ៊ុន សែន បានថ្លែងជាសាធារណៈនៅក្នុងពិធីចែកសញ្ញាប័ត្រដល់និស្សិតបញ្ចប់ការសិក្សានៅវិទ្យាស្ថានជាតិអប់រំថា របាយការណ៍ចារកម្មបានឱ្យដឹងថា លោក ញ៉ឹក ប៊ុនឆៃ បានស្កាត់ជួបជាមួយមន្ត្រីគណបក្សប្រឆាំងនៅតាមរថយន្តពីទីក្រុងភ្នំពេញ ឆ្ពោះទៅទីប្រជុំជនសួង ក្នុងស្រុកជើងព្រៃ ខេត្តកំពង់ចាម ។ ដើម្បីយករួចខ្លួនពីការដកតំណែងអំពីការលួចចរចាជាមួយគណបក្សប្រឆាំងលោក ញ៉ឹក ប៊ុនឆៃ បានធ្វើជាយកព័ត៌មានស្តីពីលោក កឹម សុខា សុំខ្ចីលុយពីគាត់ទៅប្រាប់លោក ហ៊ុន សែន ។

ករណីដកតំណែងលោក ហ៊ុន ភឿង ត្រូវបានគេសង្ស័យថា "ជាល្បិចស្វាស៊ីបាយលាបមាត់ពពែ" ។ លោក ញ៉ឹក ប៊ុន ឆៃ ត្រូវបានជឿថា បានលួចទៅចរចាជាមួយគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ហើយក្រោយព័ត៌មានស្តីពីការជួបចរចានេះត្រូវបានបែកធ្លាយ ដូច្នេះមានតែទម្លាក់កំហុសទាំងមូលឱ្យលោក ហ៊ុន ភឿង ទទួលខុសត្រូវតែម្នាក់ឯង ។

លោក លឺ ឡាយស្រេង បានប្រតិកម្មខ្លាំងៗចំពោះការចោទប្រកាន់របស់លោក ហ៊ុន សែន ដោយលោកបានពោលថា បើគេចង់សម្លាប់ឆ្កែមួយណាគេគ្រាន់តែចោទថា ឆ្កែ នោះវាឆ្កួតតែប៉ុណ្ណោះ ។

(តទៅទំព័រទី ១៦)

តមកទំព័រទី ០១

# យោគីម្នាក់រស់ដោយអត់បាយ...



ឥឡូវនេះ លោក ប្រាឡាដ ចានី បានត្រឡប់ទៅភូមិកំណើតនៅ អំបាជី វិញហើយ ហើយបានបន្តសកម្មភាពសម្មាធិរបស់គាត់ដូចពេលមុន ។ គាត់បានប្រាប់ថា "មានព្រះនាងអទិទេពមួយអង្គបានឱ្យពរគាត់កាលពីគាត់មានអាយុ៨ឆ្នាំ ទើបអាចឱ្យគាត់អាចរស់បានដោយគ្មានចំណីអាហារ" ។ លោក ចានី បានចាកចេញពីផ្ទះគាត់តាំងពីអាយុ៧ឆ្នាំ ដើម្បីស្វែងរកសភាវៈពិត ដែលមិនចេះរលត់ ហើយគាត់បានជួបព្រះនាងអទិទេពនោះនៅអាយុ១១ឆ្នាំ ហើយតាំងពីពេលនោះមកគាត់លែងត្រូវការចំណី ឬទឹក ហើយក៏ពុំមានជុះ ឬនោមអ្វីទៀត ។ លោក ចានី នាពេលនេះបានធ្វើសម្មាធិដល់កំរិតខ្ពស់បំផុតនៃភាពស្ងប់ ភាពឃើញពន្លឺ និងភាពមាំមួន គាត់និយាយថា "ពុំដែលមានឈឺថ្កាត់អ្វីទាល់តែសោះ" គាត់ថ្លែមថា "គាត់ពុំបាននិយាយចេញមកក្នុងរយៈពេល៤ឆ្នាំ" ។

ក្នុងរយៈពេលពិសោធន៍នោះ លោក ចារី បានត្រូវគេត្រួតពិនិត្យសុខភាពដំបូងអស់រយៈ២៤ម៉ោង បន្ទាប់មកក្នុងរយៈពេល៩ថ្ងៃ៩យប់ គេយកគាត់ទៅសម្រាកនៅបន្ទប់មួយមានកញ្ចក់ជុំវិញ ពុំមានបន្ទប់ទឹកទេ តែមានកាមេរ៉ា ថតជុំជិត ពីដើមដល់ចប់-បន្ថែមពីនោះទៀតមានអ្នកវិទ្យាសាស្ត្រដាក់បន្តវេនគ្នាមិនឱ្យដាច់ ឃ្លាំមើលក្រែងមានការប្រើម្ហូបអាហារ ឬជុះ ឬនោះ ក្នុងពេលពិសោធន៍នោះ ។ លោក ចារី បានប្រើទឹកលួមខ្ពុលមាត់គាត់ ហើយខាកមកវិញនៅចំនួនទឹកដែលពុំមានលេបចូលទៅក្នុងខ្លួនទេ ។ អ្នកវិទ្យាសាស្ត្របានពិនិត្យតម្រងនោមលោក ចារី ពីរដង ហើយឃើញថា មានទឹកនោមហូរធ្លាក់មកដែរ តែទឹកនោះបានជ្រៀបត្រឡប់ទៅក្នុងខ្លួនវិញបាត់អស់ ដោយមិនចាំបាច់ត្រូវបញ្ចេញមកក្រៅទេ។



អ្នកវិទ្យាសាស្ត្របានកត់ត្រានៅពេលចុងបញ្ចប់នៃការពិសោធន៍នោះថា "ប្រាឡាដ ចារី ឥតមានបរិភោគអាហារ ឬផឹកទឹកចំនួន១០ថ្ងៃ"(មនុស្សធម្មតា នឹងត្រូវស្លាប់ នៅពេលអត់ម្ហូមទឹកចំនួន៤ថ្ងៃ) ។ លោក អគ្គនាយករងនៃមន្ទីរពេទ្យវេជ្ជបណ្ឌិតដាណេស ឌីស្វាយ បាននិយាយនៅពេលដែលការពិសោធន៍ចប់សព្វគ្រប់ថា "យើងបានធ្វើតេស្ត(Test)ជាច្រើននៅលើរូបរាងកាយលោក ចារី បានបង្ហាញថា ចលនានៃសរីរាង្គរបស់គាត់មានដំណើរដូចមនុស្សធម្មតាទាំងអស់" ។

គេនៅចងចាំថា កាលពីឆ្នាំ២០០០ មានការពិសោធន៍ដូចគ្នានេះ ធ្វើនៅលើមនុស្សម្នាក់ទៀតឈ្មោះ ហីរ៉ា រ៉ាដ្ឋាន ម៉ាណិក ដែលបានឱ្យគេដឹងថាគាត់អត់មានពិសារម្ហូបចំណីតាំងពី១៩៩៥ មក។ ការពិសោធន៍នោះ បានធ្វើក្នុងរយៈពេល៤១១ថ្ងៃជាប់ៗគ្នាដោយមានការឃ្លាំមើលដូចគ្នាជាប្រចាំ ។ លោក ម៉ាណិក បានឆ្លងរួចពីសេចក្ដីស្លាប់បានតែលោកបានផឹកទឹកឆ្អិន (ដាំពុស) ។

វេជ្ជបណ្ឌិត សាឡៀ ស្លា និយាយថា "បើលោក ចារី មិនបានទាញយកថាមពលពីទឹក និងម្ហូបមកចិញ្ចឹមខ្លួនទេ វាត្រូវតែមានថាមពលអ្វីផ្សេងទៀតដែលនៅជុំវិញខ្លួនគាត់ដូចជាពន្លឺព្រះអាទិត្យជាដើម-វេជ្ជបណ្ឌិតមិនត្រូវបោះបង់លក្ខខ័ណ្ឌនៃការប្រើព្រះអាទិត្យមកបង្កើតការឡូរីក្នុងបានទេ" ។

ក្រុមវេជ្ជបណ្ឌិតទាំងអស់នៅតែមិនអស់ចិត្តចំពោះអាថិកំបាំងចំពោះ វិទ្យាសាស្ត្រមួយនេះ ហើយធ្វើសេចក្ដីរាយការណ៍ជាសាធារណៈ ដើម្បីជាប្រយោជន៍ទៅថ្ងៃមុខសម្រាប់មនុស្សជាតិ ៕

**ដកស្រង់ដោយ : ពិន សំខុន**

# វិភាគព័ត៌មានសេដ្ឋកិច្ច

**ដោយ : សត្ថុះ បុត្រ**

•••នៅប្រទេសកម្ពុជា គេទទួលស្គាល់ថា នៅមានប្រជាពលរដ្ឋប្រមាណ៣៦% ដែលកំពុងរស់នៅក្រោមបន្ទាត់នៃភាពក្រីក្រនៅឡើយ គឺការទទួលកម្រៃបានតិចជាង$១ក្នុងមួយថ្ងៃ ហើយរដ្ឋាភិបាលកំពុងតែខ្វល់ពីបញ្ហានេះ ដោយខិតខំរកមធ្យោបាយ ដើម្បីដោះស្រាយភាពក្រីក្រនេះ ។ រដ្ឋាភិបាលសម្រេចផ្ដល់ដីរាប់ពាន់រាប់ម៉ឺនហិកតាទៅឱ្យក្រុមហ៊ុនអភិវឌ្ឍន៍ដើម្បីកាត់បន្ថយភាពក្រីក្រនេះ ប៉ុន្តែគេសង្កេតឃើញថាបន្ទាប់ពីផ្ដល់ដីរាប់ម៉ឺនហិកតាទៅឱ្យក្រុមហ៊ុនអភិ-វឌ្ឍន៍មក រដ្ឋាភិបាលតែងតែទទួលដោះស្រាយវិវាទដីធ្លីស្ទើរគ្រប់កន្លែងទៅវិញ។ លោក ធន សារ៉ាយ មន្ត្រីសិទ្ធិមនុស្សនៃសមាគមអាដហុក បានលើកឡើងថាការផ្ដល់ដីទៅឱ្យក្រុមហ៊ុនអភិវឌ្ឍន៍ ពុំមានន័យថាអាចកាត់បន្ថយភាពក្រីក្របាននោះឡើយ ផ្ទុយទៅវិញ លោកបញ្ជាក់ថា ការផ្ដល់ដីទៅឱ្យក្រុមហ៊ុនអភិវឌ្ឍន៍គឺធ្វើឱ្យប្រជាពលរដ្ឋត្រូវបាត់បង់ដីកម្មសិទ្ធិសម្រាប់សងលំនៅឋាន និងបាត់បង់ដីកម្មសិទ្ធិផលិតដំណាំកសិកម្មគ្រួសារដោយលោកបានលើកឡើងថាធនាគារពិភពលោកនៅឆ្នាំ២០០៧ បានរកទៅឃើញថា បើសិនជាផ្ដល់ដីទៅឱ្យសហគមន៍កសិករ ដើម្បីអភិវឌ្ឍន៍ដំណាំសេដ្ឋកិច្ចគ្រួសារដោយខ្លួនឯងវាមានភាពឿនលឿនក្នុងការកាត់បន្ថយភាពក្រីក្របានដល់ទៅបួនដង ច្រើនជាងការផ្ដល់ដីទៅឱ្យក្រុមហ៊ុនអភិវឌ្ឍន៍ តែលោកឯកភាពក្នុងការឱ្យក្រុមហ៊ុនចូលមកអភិវឌ្ឍន៍ផ្នែកបច្ចេកទេសដាំដុះ និងទិញផលិតផលពីប្រជាពលរដ្ឋដែលផលិតបានវិញ ។ ដែលបញ្ហានេះ ប្រជាពលរដ្ឋនៅខេត្តក្រចេះ ដែលជាខេត្តសំបូរណ៍ជនជាតិភាគតិចរស់នៅបានឱ្យដឹងថា ដំណាំអ្វីក៏ដោយឱ្យតែក្រុមហ៊ុនធានាជាមួយរដ្ឋថានឹងទិញផលិតផលក្នុងតម្លៃឯកភាពគ្នា ពួកគេនិងផលិតដោយគ្រាន់តែផ្ដល់នូវពូជ និងបច្ចេកទេសតាមស្តង់ដារ ដែលខ្លួនចង់បានមកបានហើយវាប្រសើរជាងយកពួកគេទៅឱ្យស៊ីឈ្នួលធ្វើកម្មករក្រុមហ៊ុន ដោយពេលឈឺ ឬពិការមិនត្រូវតែផ្ដល់ប្រាក់នោះឱ្យសោះ ។ តាមការស្រាវជ្រាវរបស់ធនាគារពិភពលោកដដែលបានឱ្យដឹងថា នៅប្រទេសកម្ពុជាមានផ្ទៃដីសល់ទំនេរប្រមាណ១លានហិកតាទៀតប៉ុណ្ណោះ ហើយកំណើនប្រជាពលរដ្ឋដែលភាគច្រើនជាកសិករជាង៨០% មានកើតជារៀងរាល់ថ្ងៃ តើរដ្ឋា-ភិបាលគួរផ្ដល់ដីសម្បទានសេដ្ឋកិច្ចដល់ក្រុមហ៊ុនបន្តអភិវឌ្ឍន៍តទៅទៀត ឬទុកបំរុងជូនសហគមន៍កសិករផលិតដោយខ្លួនឯងក្នុងការកាត់បន្ថយភាពក្រីក្រ? ៕



# ប្រវត្តិព្រះអាចារ្យ "ហែម ចៀវ"



**ដោយ : អ៊ុម សៀច**

•••"ហែម ចៀវ" ជាឈ្មោះរបស់ឥស្សរជនខ្មែរក្នុងឆាកនយោបាយ ដែលមានឈ្មោះបោះសម្លេងល្បីសុះសាយ ហើយឈ្មោះនេះ ក៏ត្រូវបានមនុស្សមួយចំនួនធំនិយាយតៗគ្នា រហូតមកដល់បច្ចុប្បន្ននេះដែរ។ ក៏ប៉ុន្តែមនុស្សមួយចំនួនធំ ក៏ពុំសូវបានស្គាល់ពីប្រវត្តិពិត និងដំណើរជីវិតរបស់អាចារ្យដ៏មានកិត្យានុភាពនេះប៉ុន្មានទាក់ឡើយ ។ ខាងក្រោមនេះជាប្រវត្តិរបស់អាចារ្យដ៏ឆ្នើម ដែលហ៊ានធ្វើអ្វីគ្រប់យ៉ាងសំរាប់ជាតិមាតុភូមិ ។

លោកគ្រូអាចារ្យ ហែម ចៀវ ប្រសូត្រនៅថ្ងៃអង្គារ ឆ្នាំច ពុទ្ធសករាជ ២៤៤០ ត្រូវនឹងគ្រិស្តរាជ ១៨៩៨ នៅភូមិអូរកូនទេញ (កោណ្ឌ័ញ្ញ) សង្កាត់ដំបូកមានលក្ខណ៍ន ស្រុកឧត្តុង្គ ខេត្តកំពង់ស្ពឺ (នៅខាងជើងជិតស្ពានស្ថានីយរថភ្លើងបាត់ដឹង)។ ឪពុកឈ្មោះ ហែម ធ្វើជាមេស្រុកដំបូកមានលក្ខណ៍ ។ ម្តាយឈ្មោះ ទីវ ។ គ្រួសារនេះ មានបងប្អូន៥នាក់ គឺ

១- ហែម លី

២- ហែម ចៀវ

៣- ហែម ហួត

៤- ហែម សាយ

៥- ហែម........

ក្នុងចំណោមបងប្អូនទាំង៥នាក់នោះ មានបងប្រុសម្នាក់ឈ្មោះ ហែម លី ធ្វើជាស្មាក្តី (មេធាវី) លុះក្រោយមកធ្វើជាមេស្រុកតពីឪពុកលោក ។

កាលពីកុមារភាពលោកបានស្គាល់នូវក្តីលំបាកគ្រប់បែបយ៉ាង ដូចជាកូនកសិករក្រីក្រទូទៅដែរ គឺលោកបានឃ្វាលគោ រកអុស ដេញចាបតាមបែបកូនកសិករជាមួយឪពុកម្តាយព្រឹកល្ងាច រហូតដល់អាយុ១២ឆ្នាំ ទើបមេស្រុក ហែម ជាឪពុកនាំយកទៅប្រគេនព្រះសង្ឃសត្ថា ជូនណាត នាវត្តឧណ្ណាលោម ក្រុងភ្នំពេញ ដោយហេតុមេស្រុក ហែម និងព្រះគ្រូសត្ថា ជាមិត្តភក្តិនឹងគ្នាយ៉ាងជិតស្និត ។

កុមារ ហែម ចៀវ ជាក្មេងមានសីលធម៌ល្អប្លែកជាងក្មេងដទៃៗទៀត មានមាត់ពាក្យរហ័សច្បាស់លាស់ មានសណ្តាប់ធ្នាប់សមរម្យគួរឱ្យអ្នកផងពេញចិត្ត ។ កុមារនេះមានការព្យាយាមខ្ជាប់ខ្ជួនល្អណាស់ បានរៀនអក្សរសាស្ត្រក្នុងសំណាក់ព្រះគ្រូសង្ឃសត្ថា តាំងពីដើមដំបូងរហូតទាល់តែមើលបាន សរសេរអក្សរកើតដោយបរិបូរណ៍ ។

កុមារ ហែម ចៀវ បានស្តាប់ធម៌ទេសនារបស់ព្រះគ្រូសង្ឃ សត្ថា អស់ជាច្រើនឆ្នាំ ទើបជាហេតុនាំឱ្យកុមារ ចៀវ មានសេចក្តីឆ្លៀវឆ្លាត យល់ហេតុផលក្នុងផ្លូវលោក ផ្លូវធម៌ច្រើនយ៉ាងណាស់ ។ ជាកុមារមានសំដីវោហារព្រោកប្រាជ្ញពូកែជាងក្មេងឯទៀតៗទាំងអស់ ។ កុដិដែលកុមារស្នាក់សិក្សាស្ថិតនៅខាងក្រោយមហាកុដិសព្វថ្ងៃនេះ ។

កុមារ ហែម ចៀវ បានព្យាយាមរៀនសូត្រឥតធ្វេសប្រហែស ឬខ្ជិលច្រអូសទេ ។ កុមារខំរៀនមិនថាយប់ មិនថាថ្ងៃឡើយ ព្រោះលោកបានចាំបណ្តាំបិតាក្នុងកាលដែលឪពុកនាំយកទៅទុកក្នុងសំណាក់នៃព្រះគ្រូសង្ឃសត្ថាថា : "ចៀវ កូនសម្លាញ់ឪពុកៗគ្មានអ្វីចែកឱ្យកូនទេ គឺមានតែវិជ្ជានេះហើយ ដែលឯងអាចយឹតយោងគ្រួសារយើងឱ្យខ្ពង់ខ្ពស់បាន ។ មនុស្សល្ងង់គេមើលងាយណាស់កូន បើកូនចេះឪពុកក៏ចេះដែរ ! កូននៅភ្នំពេញ ខំរៀនឡើង ! កុំឈ្លោះប្រកែកគ្នាណា ! ខុសត្រូវម្តេចម្តា ត្រូវចេះអត់ធ្មត់ទើបប្រសើរ ព្រោះយើងជាកូនកំសត់ ដើរស្វែងរកវិជ្ជាដូចគ្នា ។ ដូច្នេះត្រូវចេះស្រឡាញ់គ្នាទើបអ្នកផងសរសើរ ចូរកូនចាំសុភាសិតបុរាណមួយឃ្លាថាម "នៅផ្ទះម្តាយទីនៃ នៅព្រៃម្តាយតែមួយ" លោកគ្រូសត្ថាអង្គនេះ ជាអ្នកប្រាជ្ញជ្រៅជ្រះ បានជាពុកនាំកូនឯងមកឱ្យនៅនឹងលោក ត្រូវកូនឯងខំរៀនសូត្រយកចិត្តទុកដាក់ឱ្យមែនទែន" ។ គ្រានោះកុមារ ចៀវ ឆ្លើយតបទៅឪពុកវិញថា "បាទលោកឪពុក កូននឹងគោរពតាមសំដីឪពុកលុះថ្ងៃស្លាប់ ! សូមពុកកុំព្រួយបារម្ភឱ្យសោះ ។ ល្អហើយកូនប្រុសឪពុក ! ឯងជាតំណាក់ឈាមរបស់ពុកហើយ ពុកសង្ឃឹមលើឯងគ្រប់ដប់ !។ ហើយពាក្យនេះ បានធ្វើឱ្យកុមារ ចៀវ ចងចាំទុកក្នុងបេះដូងឥតមានថ្ងៃភ្លេចឡើយ ។ កុមារ ចៀវ ស្រឡាញ់គោរពឱវាទមាតាបិតាណាស់ មិនដែលធ្វើឱ្យអ្នកមានគុណព្រួយចិត្តម្តងណាឡើយ ។

វ័យ ១៦ឆ្នាំក៏ចូលមកដល់ លោកមេស្រុក ហែម និភរិយា បានជំនុំគ្នាអំពីការបំបួសកូនជា សាមណេរ ហើយមូលមតិគ្នា ថាត្រូវបំបួសនៅវត្តឧណ្ណាលោម ហើយឱ្យគង់សំណាក់សិក្សាបដិបត្តិធម៌នៅវត្តឧណ្ណាលោមដដែល ។ លុះបួសរួចហើយ សាមណេរ ចៀវ ទន្ទេញមេសូត្រ (ប្រមូលវេយ្យាករណ៍បាលី) ចាំយ៉ាងស្ទាត់ជំនាញ ។



ថ្ងៃខែចេះតែកន្លងផុតជាលំដាប់... សាមណេរ ហែម ចៀវ អាយុ ២០ឆ្នាំ ក៏បំពេញឧបសម្បទាជាភិក្ខុភាវក្នុងពុទ្ធសីមានៅវត្តលង្កា ដែលមានព្រះមហាវិមលធម្ម ថោង (ចាងហ្វាងសាលាបាលីជាន់ខ្ពស់មុនដំបូង) ជាឧបជ្ឈាយ មានព្រះគ្រូបវរវិជ្ជា ល្វីឯម និងព្រះសង្ឃសត្ថា ជួន-ណាត ជាគ្រូសូត្រ ។ នៅពេលបំពេញជាភិក្ខុហើយ លោកក៏បានប្រឡងចូលរៀនសាលាបាលីជាន់ខ្ពស់ជាប់ដូចចិត្តប្រាថ្នា ។ ការសិក្សា៧ឆ្នាំនៅសាលាបាលីជាន់ខ្ពស់ ធ្វើឱ្យលោកចេះដឹងផ្លូវលោក ផ្លូវធម៌ល្មមប្រើ ការបានដោយពេញបរិបូរណ៍ក្នុងផ្លូវព្រះពុទ្ធសាសនា ។ លោកជាសិស្សសំណប់មួយរូបនៃព្រះគ្រូសង្ឃសត្ថា ជួន-ណាត ដែលលោកស្រឡាញ់ជាងគេ ដោយភិក្ខុ ហែម ចៀវ ជាបុព្វជិតឈ្លាសវៃរហ័សរហួន ចេះគួរសមទៅតាមឋានៈជាមនុស្សដូចគ្នា ។ លុះគម្រប់ឆ្នាំទី៧ លោកបានប្រឡងយកសញ្ញាប័ត្រឱឬមសាលាបាលីជាន់ខ្ពស់ជាប់លេខ៦ ខាងសាលាបាលី ។ នៅពេលប្រឡងចេញពីសាលាបាលីហើយ ក្នុងឆ្នាំ១៩២៧ កាលនោះលោក រ៉េ ស្យូម ជាតិបារាំង ធ្វើជារ៉េស៊ីដង់ខេត្តកំពត បានពឹងលើលោកជាមេគុណវត្តអង្គសុភី ហៅកន្ទោ ស្រុកកំពង់ត្រាច ឱ្យជួយរកលោកសង្ឃមួយអង្គ ដែលមានសញ្ញាប័ត្រសាលាបាលីជាន់ខ្ពស់ កាលនោះលោកគ្រូមេគុណវត្តកន្ទោ និមន្តមកឯវត្តឧណ្ណាលោម ក្រុងភ្នំពេញ មកពឹងព្រះគ្រូសង្ឃសត្ថា ជួន-ណាត ដើម្បីនិមន្តលោកមួយអង្គ ដែលមានសញ្ញាប័ត្រឱឬមសាលាបាលីជាន់ខ្ពស់ ទៅបង្រៀនអក្សរសាស្ត្រខ្មែរនៅខេត្តកំពត ដោយហេតុលោករ៉េស៊ីដង រ៉េស្យូម នៃខេត្តកំពតចង់បង្កើតអង្គការសិក្សាអក្សរសាស្ត្រខ្មែរឱ្យមានរបៀបត្រឹមត្រូវឡើងវិញ ។

កាលនោះលោកគ្រូសត្ថា ជួន-ណាត បានចាត់ឱ្យលោកអាចារ្យ ហែម ចៀវ ឱ្យទៅបង្រៀនអក្សរសាស្ត្រជាតិ នៅឯខេត្តកំពត ដោយយកវត្តក្រាំងដូងស្រុកបន្ទាយមាស និងវត្តកន្ទោ ស្រុកកំពង់ត្រាច ជាមជ្ឈមណ្ឌល ។ គ្រូអាចារ្យ ហែម ចៀវ បានទៅបង្រៀនអក្សរសាស្ត្រជាតិក្នុងខេត្តកំពត អស់៦ឆ្នាំ គឺតាំងពីឆ្នាំ១៩២៧-១៩៣២ ទើបត្រឡប់មកនៅភ្នំពេញវិញ រួចបានប្រឡងជាប់ជាសាស្ត្រាចារ្យនៅសាលាបាលីជាន់ខ្ពស់ក្នុងឆ្នាំនោះឯង ។ ក្រៅពីម៉ោងបង្រៀនសិស្ស លោកអាចារ្យតែងនិមន្តទៅទេសនាជាញឹកញាប់ ។ ទេសន៍កន្លែងណា ក៏ដូចកន្លែងណាដែរ លោកតែយកពុទ្ធភាសិតថា "វីរយេន ទុក្ខរច្ចេតិ ហើយនឹង "អត្តាហិ អត្តនោនាថោ" មកអធិប្បាយប្រាយសេចក្តីពន្យល់លើកឧទាហរណ៍ ដើម្បីឱ្យពុទ្ធបរិស័ទងាយស្តាប់យលបាន ។ លក្ខណៈខ្លះដែលគួរដឹង គឺលោកគ្រូអាចារ្យ ហែម-ចៀវ មានសម្លេងធំក្រអួន មានទឹកដមគួរឱ្យចង់ស្តាប់ហើយស្តាប់ទៀត មានពាក្យវោហារក្បោះក្បាយរអិលទៅមុខជាដរាប ដោយពុំមានជាន់ពាក្យដដែលៗឡើយ ។ ប៉ុន្តែលោកពុំសូវពូកែខាងសរសេរសៀវភៅទេ ។ ចំពោះភ្ញៀវពន្លឺលោកទទួលដោយរាក់ទាក់ ឥតរើសមុខអ្នកមានអ្នកក្រអ្វីទេ ។ ជនណាដែលបានប្រាស្រ័យជាមួយលោកម្តងហើយ ជននោះរមែងចង់ប្រាស្រ័យម្តងទៀត ដើម្បីស្តាប់លោកអធិប្បាយ វែកញែកអំពីទ្រឹស្តីព្រះពុទ្ធ ដែលដឹកនាំសត្វលោកដល់ត្រើយនៃសុភមង្គល ។ រីឯការបង្រៀនសិស្សវិញ លោកពូកែក្នុងការពន្យល់ ធ្វើឱ្យសិស្សចូលចិត្តរៀនណាស់ សូម្បីតែសាស្ត្រាចារ្យនៅសាលាបាលីជាន់ខ្ពស់ ក៏មិនអាចអត់ទ្រាំសរសើរលោកបានដែរ ។ សិស្សរបស់លោកស្រឡាញ់លោកគ្រប់ៗគ្នា ព្រោះជាសាស្ត្រាចារ្យមិនប្រកាន់ធម៌អគតិ ។ ហើយឃើញសិស្សណាខ្ជិលរៀនសូត្រ លោកតែងពោលចំពោះសិស្សនោះ ដោយសម្លេងថ្នមៗថា : ម៉ែឪយើងនៅក្រោមការត្រួតត្រារបស់បរទេស ព្រះពុទ្ធសាសនាត្រូវចុះអន់ថយជាលំដាប់ អក្សរសាស្ត្រយើងស្ទើរសាបសូន្យទៅហើយ គួរយើងប្រឹងប្រែងកុំខ្ជាចខ្ជឿយហត់ ដើម្បីស្រោចស្រង់មាតុភូមិយើងឱ្យរួចពីខ្ញុំកញ្ជះបារាំង កុំភ្លេចខ្លួនឱ្យសោះថា យើងជាអ្នកបួសរស់នៅដោយសារតែប្រជាជនជាអ្នកចិញ្ចឹម ត្រូវតែមានចំណេះវិជ្ជាជ្រៅជ្រះ ទើបធ្វើឱ្យអ្នកចិញ្ចឹមយើងមានសទ្ធាជ្រះថ្លា ។ ចុះបើយើងល្ងង់ខ្លៅ តើដឹកនាំគេម្តេចកើត? តើនរណាគេគោរពរាប់អានយើង? បញ្ហានេះសូមលោកគិតពិចារណាមើលឱ្យមែនទែន បំណាច់យើងចោលស្រុក ចោលស្រែចំការ ចោលម៉ែឪ បងប្អូនមករៀននៅទីនេះ... តើយើងមកដើម្បីអ្វី? យើងសុទ្ធជាកូនអ្នកក្រដូចគ្នា ត្រូវជួយគ្នាឡើង កុំធ្វេសប្រហែសឱ្យសោះ ប្រយ័ត្នគេមើលងាយណា ! ខ្ញុំគ្មានអ្វីជួយលោកទេ មានតែចំណេះវិជ្ជាដ៏ស្តួចស្តើងប៉ុណ្ណោះ ។ លោកកាលដែលខ្ញុំនិយាយនេះ មិនមែនជាការប្រៀនប្រដៅទេ គឺជាការរំលឹកគ្នាទៅវិញទៅមក ក្នុងឋានៈជាកូនអ្នកស្រែ និងអ្នកបួសដូចគ្នា យើងត្រូវតែណែនាំគ្នាដើម្បីស្វែងរកសុភមង្គលឱ្យប្រទេសយើង ដែលបានបាត់បង់ច្រើនឆ្នាំមកហើយ ។

ពាក្យដាស់តឿនរបស់លោកគ្រូបាឡាត់ឃ្លោសនាគ ហែម-ចៀវ បានធ្វើឱ្យសិស្សសាលាបាលីជាន់ខ្ពស់ស្រឡាញ់ គោរពគ្រូ ហើយខិតខំរៀនសូត្រឥតឥតហ៊ានធ្វេសប្រហែសសោះឡើយ ។ មិនតែស្រឡាញ់ខំរៀនសូត្រប៉ុណ្ណោះទេ ថែមទាំងមានការឈឺចាប់នឹងពួកអាណានិគមបារាំងខ្លាំងឡើងៗជា លំដាប់ធ្វើមជ្ឈដ្ឋានអ្នកស្នេហាជាតិ កោតសរសើរសិស្សសាលាបាលីជាន់ខ្ពស់គ្រប់ៗគ្នា ។ ក្នុងពេលនោះ ហើយដែលធ្វើឱ្យកិត្តិនាមរបស់លោកគ្រូបាឡាត់ ហែម-ចៀវ ក្រអូបសព្វទិសទី ។ (**តទៅលេខក្រោយ**)

## តមកទំព័រទី ១៨ ពេលអស់ត្រីយួនសុំដីមករស់នៅ...

ពីព្រោះនៅលើទឹកងាយស្រួលចាប់ត្រី លុះឥឡូវនេះមច្ឆាជាតិគ្រប់ប្រភេទនៅក្នុងទឹកធ្លាក់ចុះស្ទើរតែអស់ត្រីចាប់លែងបានទៅហើយ ។ ដូច្នេះហើយបានជាជនជាតិយួនទាំងនោះ ឱ្យមេដឹកនាំខ្មែរផ្តល់ដីលើគោកឱ្យបានមករស់នៅបង្កបង្កើតផលក្នុងស្រែចំការវិញម្តងរួមដៃគ្នាជាមួយក្រុមហ៊ុនធំៗយួនដែលបានទទួលដីធ្លីសម្បទានជាច្រើនសែនហិតារួចមកហើយនោះដែរ ។

**សេចក្តីសន្និដ្ឋាន** : មេដឹកនាំខ្មែរសព្វថ្ងៃបានយល់ច្បាស់ពីជនជាតិយួន ជាអ្នកមានមហាឧបការគុណធ្ងន់ណាស់ ត្រូវតែតបស្នងសងគុណវិញជាដាច់ខាត ។

បញ្ហាស្វែងរកដីធ្លីសំរាប់ផ្តល់ឱ្យជនជាតិយួនទាំងអស់ ត្រូវតែជាកង្វល់ធំណាស់ ហើយជាអាទិភាពចាំបាច់ណាស់ ត្រូវតែរកដេញកំចាត់ ដកហូតយកដីពីប្រជាពលរដ្ឋខ្មែរ ទៅប្រគល់ឱ្យក្រុមហ៊ុនធំៗយួនមន្ត្រីឧត្តមសេនីយ ឧកញ៉ាធំៗ ពាសពេញលើប្រទេស។

សរុបសេចក្តីទៅ មាតុភូមិ និងជីវិតជនជាតិខ្មែរកំពុងតែស្ថិតនៅមាត់រណ្តៅនៃមហាគ្រោះថ្នាក់ អាចបណ្តាលឱ្យរលំរលាយប្រទេស និងជាតិសាសន៍ខ្មែរនេះ នៅពេលអនាគតឆាប់ៗនេះជាពិតប្រាកដ ។

ដរាបណាមេដឹកនាំ និងប្រជាពលរដ្ឋខ្មែរទាំងអស់នៅតែកាន់អំណាច ដោយពុំមានត្រូវបានផ្លាស់ប្តូរចេញទេ ដរាបនោះ មាតុភូមិខ្មែរ និងប្រជាពលរដ្ឋខ្មែរ ដែលជាសកម្មជន បញ្ញាវ័ន្តស្នេហាជាតិខ្មែរពិតប្រាកដត្រូវតែប្រែក្លាយទៅជាប្រទេសយួន និងជនជាតិយួនយ៉ាងពេញលក្ខណៈ និងពេញច្បាប់ដូចគ្នាដែនដី និងជនជាតិខ្មែរ នៅកម្ពុជាក្រោមជាពិត ប្រាកដ ៕




**ដោយ : គីម ភឿន** (តពីលេខមុន)

•••អានលិខិតនាងចប់ភ្លាម អនុសេនីយឯក គីម វិរៈ មានក្ដីកង្វល់ខ្វល់ខ្វាយយ៉ាងខ្លាំង ព្រោះនាងបានសម្រេចចិត្តយ៉ាងនោះទៅហើយ គឺត្រូវតែបញ្ចប់កម្មវិធីសិក្សាមុននឹងនាងផ្លាញ់ចេញពីវិទ្យាល័យអង្គតាសោម ។ នាងក៏ជាសាស្ត្រាចារ្យមានគុណធម៌ខ្ពស់ដែរ ។ នាងស្រឡាញ់ អាណិតសិស្សរបស់នាង ។ រយៈពេលពីរខែ ដែលត្រូវរង់ចាំបញ្ចប់កម្មវិធីនេះ មិនដឹកនឹងមានហេតុការណ៍អ្វីនឹងកើតឡើងខ្លះ ព្រោះទីកន្លែងដែលនាងកំពុងរស់នៅ និងបំពេញភារកិច្ចមានភាពមិននឹងនរទេ ។ វាអាចនឹងមានគ្រោះថ្នាក់ដល់រូបនាង ។ តែបើនាងសម្រេចចិត្តយ៉ាងនេះទៅហើយ គេក៏មិនហ៊ានបង្ខំចិត្តនាងធ្វើខុសពីនេះបាន ។ គេខំតែបន់ស្រន់សុំឱ្យនាងបានសុខ ដើម្បីបំពេញភារកិច្ចជាអ្នកគ្រូល្អ សម្រាប់សិស្សរបស់នាង ។ តែទោះជាគេខំបន់ស្រន់យ៉ាងណា ក៏អារម្មណ៍របស់គេមិនស្ងប់សោះ ព្រោះហេតុការណ៍ដែលប្អូនធម៌របស់គេ ឈ្មោះ ងួន ឡេង លែបានត្រូវខ្មែរក្រហមចាប់ធ្វើជាចំណាប់ខ្មាំងនោះ ជាមេរៀនស្រាប់ ។ តែ ងួន ឡេងមានសំណាងបានរំដោះមកវិញ ចុះបើបុប្ផារបស់គេត្រូវចាប់ តើអ្នកណានឹងរំដោះនាងមកវិញ អ្នកណាជួយនាង ។ នឹកដល់រឿងនេះ វិរៈ មានតែបន់ព្រះ សំពះទេវតា សុំឱ្យនាងបានសុខ កុំឱ្យនាងជួបផលវិបាកអ្វីឱ្យសោះ ។ នាងមានរឿងអាក្រក់អ្វីកើតឡើង ជីវិតគេក៏នឹងមានវិបត្តិកើតឡើងមិនខានឡើយ ព្រោះគេមានសង្ឃឹមលើរូបនាងតែម្នាក់គត់ ដែលអាចចម្លងជីវិតគេទៅរកភាពរីករាយ និងអត្ថន័យនៃជីវិត ដែលគួរឱ្យរស់នៅ ។

ឪពុកម្ដាយធម៌ និងបងប្អូនធម៌របស់លោកអនុសេនីយ៍ឯក គីម វិរៈ បានយកចិត្តទុកដាក់ក្នុងការចូលស្ដីដណ្ដឹង និងរៀបអាពាហ៍ពិពាហ៍ឱ្យអនុសេនីយ៍ឯកនេះណាស់ ។ លោកថៅកែ ងួន ហាក់ សង្ឃឹមថា ចំណងទាក់ទងនេះនឹងជួយឱ្យមុខរបរជំនួញរបស់គាត់មានជំហររឹងមាំខ្លាំងឡើង ។ ឯលោក អ៊ុំ សាវុធ ជាបងធម៌នោះ ក៏សប្បាយនឹងពង្រីងភាពស្និទ្ធស្នាលជាមួយចៅហ្វាយខ្លួនបានមួយកម្រិតទៀត ដោយគាត់បានជួយជ្រើសរើសកូនប្រសារយ៉ាងល្អជូនចៅហ្វាយរបស់ខ្លួន ។ នេះជាមុខជំនួញមួយមានប្រយោជន៍គ្រប់ភាគីទាំងអស់ ។ ហេតុនេះម្នាក់រង់ចាំឱ្យតែថ្ងៃមង្គលនោះចូលមកដល់ឱ្យកាន់តែឆាប់ កាន់តែល្អ ។ ថ្ងៃមួយមានឧទ្ធម្ភាចក្រចុះមកក្នុងបន្ទាយតាំងគោក ដោយ វិរៈ ពុំបានដឹងមុន។ បន្តិចក្រោយមក វិរៈ ភ្ញាក់ផ្អើលនឹងវត្តមានរបស់លោកវរៈសេនីយ៍ឯក អ៊ុំ សាវុធ និងលោកថៅកែ ងួនហាក់ ដឹកនាំដោយលោកវរៈសេនីយ៍ឯក ណៃខុន ជាមេបញ្ជាការនៃបន្ទាយតាំងគោក តម្រង់ទៅកាន់ការិយាល័យរបស់អនុសេនីយ៍ឯក គីម វិរៈ ។ កំពុងតែអានរបាយការណ៍សម្ងាត់ពីសមរភូមិទាំងឡាយរបស់ស្រុកតាំងគោក លោកអនុសេនីយ៍ឯកក្រោកឈរគំនាប់ជនទាំងបីដោយងឿងឆ្ងល់ ។ លោកមេបញ្ជាការ ណៃខុន នាំមុនគេនិយាយទៅរកលោក គីម វិរៈ ដោយភាពរីករាយ :

- លោកអនុសេនីយ៍ឯក ! ភ្ញៀវមកដល់ហើយ មានទាមាន់ទេ យកមកទទួលភ្ញៀវឱ្យបានសប្បាយម្ដង !។ និយាយចប់ហើយ គាត់បែរទៅរកលោកសក្ដិ៥ អ៊ុំ សាវុធ និងលោកថៅកែ ងួន ហាក់ ដោយរីករាយ :

- សូមបងទាំងពីរជួបលោក វិរៈ ចុះ ខ្ញុំមានកិច្ចការត្រូវធ្វើទៀត ។

ក្រោយពីសន្ទនាបន្តិចមក ទើបវិរៈយល់ថា លោក អ៊ុំ សាវុធ និងលោកថៅកែ ងួន ហាក់ ទើបមកពីភ្នំពេញ ដើម្បីស្ដីដណ្ដឹងអ្នកគ្រូកល្យាណបុប្ផា តាមគន្លងប្រពៃណីរួចហើយ ។ ទើបនាំដំណឹងនេះមកប្រាប់គេ ព្រោះគេទាំងពីរចង់នាំការភ្ញាក់ផ្អើលឱ្យខ្លួនគេ ។ វិរៈ អរគុណលោកទាំងពីរដោយខំឈឺឆ្អាលពីរឿងរបស់ខ្លួន ។ បងធម៌គេសួរដោយកំប្លែងផង:

-អាប្អូនឯងមិនខឹងនឹងបង ដែលបានចូលស្ដីកូនគេឱ្យឯង ដោយពុំឱ្យឯងជាម្ចាស់ខ្លួនបានដឹងមុននោះឬទេ?

-មិនខឹងទេ តែខ្ញុំចង់ដឹងថា លោកឪពុកអ្នកម្ដាយក្មេកអនាគតរបស់ខ្ញុំ គាត់មានយោបល់យ៉ាងណាដែរ?

-អាប្អូនឯងសួរទៅលោកថៅកែ ងួន ហាក់ ទៅ គាត់ជាតន្លង គាត់ដឹងកិច្ចការនោះច្រើនជាងបង ។ លោកថៅកែ ងួន ហាក់ ក៏ចាប់ផ្ដើមរ៉ាយរ៉ាប់ដោយរស់រាន :

-រឿងនេះជាអញ្ចេសទេ ប៉ាបានសុំឱ្យលោកបង អ៊ុំ សាវុធ របស់កូនជួយប៉ា ឱ្យបានដាច់ស្រេចក្នុងរឿងស្ដីដណ្ដឹងកូនក្រមុំគេនេះឱ្យជ្រះស្រឡះសិនទៅ ស្រួលប៉ាម៉ាក់គិតគូរឱ្យកូនមានគូរស្រករនឹងគេឆាប់ៗ ។ លោក អ៊ុំ សាវុធ គាត់មិនចង់ឱ្យប៉ាម៉ាក់ប្រាប់កូន ទុកឱ្យកូនភ្ញាក់ផ្អើលម្ដង ប៉ាម៉ាក់ ក៏គិតរឿងនេះស្ងៀមៗតែឯងទេ ។ ឥឡូវរឿងនេះ បានសម្រេចដោយរីករាយហើយ តែប៉ាក៏មិនទាល់ទាំងបានឃើញកូនប្រសារផង នាងនៅជាប់បង្រៀនឯអង្គតាសោមឯនោះ ដោយពុំដឹងខ្លួនផងដែរ ។ ឯឪពុកម្ដាយកូនស្រី ក៏និយាយកំប្លែងជាមួយប៉ាម៉ាក់កូនកម្លោះដែរថា : "មិនចាំបាច់បង្ហាញកូនក្រមុំអីទេ ព្រោះកូនក្រមុំ និងកូនកម្លោះគេឃើញគ្នាគេអស់រួចហើយដែរ ចាំថ្ងៃរៀបការចាំឃើញកូនប្រសាររៀងៗខ្លួនតែម្ដងទៅ ។

- ឱ ! បើអញ្ចឹងម៉ាក់គាត់មានទៅភ្នំពេញដែរ ម៉េចមិនឃើញគាត់អញ្ជើញមក ?

- អើ ! គេនៅលេខជាមួយប្អូនកូនឯភ្នំពេញ បានពីរ បីថ្ងៃ ទើបមកតាំងគោកវិញ ។ ឥឡូវនេះគ្មានអីជាឧបសគ្គក្នុងរឿងរៀបអាពាហ៍ពិពាហ៍រវាងកូនទាំងពីរទៀតទេ ត្រូវរៀបចំខ្លួនត្រៀមរៀបការចុះ ។ គ្មានអ្វីសង្ស័យទៀតឡើយ ខាងកូនក្រមុំរង់ចាំតែពេលវ៉ាកងនឹងអនុញ្ញាតិឱ្យខាងកូនកម្លោះរៀបចំកម្មវិធីតែប៉ុណ្ណោះ ។ ប៉ាម៉ាក់អស់បារម្ភពីឪពុកម្ដាយខាងកូនក្រមុំមិនអនុញ្ញាតិឱ្យកូនស្រីលោករៀបការជាមួយកូនទៀតហើយ ហើយថែមទាំងស្វាគមន៍ចំពោះកូនយ៉ាងខ្លាំងទៀតផង ។

នេះក៏ដោយសារលោកបងធម៌ អ៊ុំ សាវុធ របស់កូនជួយជ្រោមជ្រែងយ៉ាងពេញទំហឹងនោះហើយ ។

លោក អ៊ុំ សាវុធ ញញឹម :

- យើងបានប្រឹងប្រែងទាំងអស់គ្នា ព្រោះចង់ឱ្យក្មេងៗបានសុខតែប៉ុណ្ណោះ ។

(រង់ចាំអានបន្តនៅលេខក្រោយទៀត)

ឆ្លើយតបសំនួរមិត្តអ្នកអាន

# Three Cups of Tea
# ទឹកតែ៣ពែង

(តពីលេខមុន)



**ដោយ : គីមភឿន**

*សរសេរតាមលំនាំរឿងពិត*

•••លោកតា ហៃជីអាលី បាននាំគ្រែកលុបលែងខ្លួន ហើយក៏បណ្ដើរចូលទៅក្នុងគេហដ្ឋានរបស់គាត់ រៀបចំកន្ទេលខ្នើយឱ្យភ្ញៀវតេងសម្រាកកន្លែងមួយ ដែលគ្រួសារទុកសម្រាប់ទទួលភ្ញៀវពិសេស ។ ទឹកតែមួយឆ្នាំបានរៀបចំទុកជាស្រេច ដាក់នៅលើចង្ក្រានដែលមានផ្សែងហុយទៅលើចេញតាមបង្អួចបួនជ្រុងនៅលើដំបូងផ្ទះរាបស្មើ មានក្មេងយ៉ាងច្រើន ដែលបានរត់តាមជនបរទេសនេះ មកមើលហេតុការណ៍ក៏ឡើងលើដំបូងរាបស្មើនេះ ដេកផ្កាប់មុខចុះ ទុកតែប្រឡង់ភ្នែកសម្លឹងមកក្រោម ធ្វើឱ្យគ្រែកគិតថាខ្លួនជាសត្វចំឡែង ដែលក្មេងៗទាំងនោះកំពុងតាមដាន ។

ហៃជីអាលី ព្រមទាំងមេសមាជិកគ្រួសារប្រុសៗប្រហែលម្ភៃនាក់ អង្គុយយ៉ាងស្ងាត់ស្ងៀមជុំវិញគ្រែក ដែលគ្រែក កំពុងសម្រាក ។ លោកតា ហៃជីអាលី ហុចងៀតសាច់មួយចំរៀកដែលអមដោយស្លឹកថ្នាំជក់ឱ្យទៅគ្រែក ។ គេទទួលយក ទោះបីជាគេមិនចូលចិត្តក្លិន និងរស់ជាតិរបស់ងៀតនេះក៏ដោយ ព្រោះគេយល់ថា បើប្រកែកនាំឱ្យមានការអាក់អន់ចិត្តពីម្ចាស់ផ្ទះ និងអ្នកស្រុកទាំងនេះ ។ គេទទួលយក ហើយទំពារលេបដោយគ្មានបង្អង់ដៃឡើយ ។ រួចហើយលោកតា ហៃជីអាលី ហុចឱ្យគេនូវទឹកតែប៉ាយូឆាមួយពែងទៀត ។ គេទទួលយក ហើយផឹកម្ដងនេះ ហាក់ដូចជាស្រួលលេបជាលើកមុនៗ ។

ការទទួលរាក់ទាក់ភ្ញៀវ ក៏បានធ្វើឡើងដោយត្រឹមត្រូវតាមប្រពៃណីអស់ហើយ ទើបលោកតាមេភូមិ ហៃជីអាលី ឱនមុខចុះទៅជិតមុខភ្ញៀវដោយស្និទ្ធស្នាល សួរពីដំណើរដើមទងថា ហេតុអីបានជាលោកគ្រែកដើរមកកាន់ភូមិរបស់គាត់នេះ ? គ្រែកក៏អាចយល់បាននូវសំនួរនេះ ព្រោះមេភូមិបានប្រើភាសាបាល់ទី ដើម្បីសន្ទនាគ្នា ។ គ្រែកក៏បានឱ្យដឹកថា គេប៉ុនប៉ងឡើងដល់កំពូលភ្នំ K2 តែពុំបានសម្រេច គេធ្លាក់ខ្លួនឈឺ ចុះខ្សោយ ហើយក៏ដកខ្លួនថយចុះមកវិញ ហើយព្យាយាមដើរតម្រង់ទៅរកភូមិអាស់ស្កុល ដើម្បីជួបជាមួយមូស្សាផឿ ជាអ្នកជំនួយការបានដឹកជញ្ជូនគ្រឿងបរិក្ខាឡើងភ្នំរបស់គេយកទៅមុនអស់ទៅហើយ បន្ទាប់មកទៅគេនឹងទៅកាន់ទីក្រុងធំ ដើម្បីរកទិញសំបុត្រយន្តហោះត្រឡប់ទៅសហរដ្ឋអាមេរិកវិញ ។

លោក ហៃជីអាលី ក៏លាន់មាត់ថា "ទីនេះមិនមែនអាស់ស្កុលទេ គឺជាទឹកដីភូមិកម្ព័ ! ពិតជាព្រះអាឡា បាននាំផ្លូវលោកមកកាន់ទីនេះហើយ" ។ ឮសំដីនេះ គ្រែកអស់សង្ឃឹមផង ខឹងនឹងខ្លួនឯងផង ព្រោះខំដើរយ៉ាងប្រយ័ត្នប្រយែងតាមពីក្រោយមូស្សាផឿ មិនគួរវង្វេងផ្លូវម្ដងទៀតយ៉ាងនេះសោះ។ គេក្រោកអង្គុយ តែលោកតា ហៃជីអាលី រុញគេឱ្យគេងចុះទៅលើខ្នើយវិញ ដោយពន្យល់ប្រាប់គេឱ្យគេងចុះទៅវិញទៅ ។ ដោយខ្លាចគេពុំយល់អស់សេចក្ដី កូនប្រុសលោកតា ហៃជីអាលី ឈ្មោះ ត្វាហា ចេះភាសាអង់គ្លេសបន្តិចបន្តួច ក៏ខំបកប្រែអត្ថន័យរបស់ឪពុកគេមកជាភាសាអង់គ្លេស ដើម្បីឱ្យគេងាយយល់ : "ភូមិអាស់ស្កុល មិនអាចទៅបានទៅនៅថ្ងៃនេះ ។ គេត្រូវដើរកន្លងថ្ងៃទើបដល់ ។ ព្រឹកស្អែកចាំគេចាត់មនុស្សឱ្យទៅរកមូស្សាផឿ មកឱ្យ ខំគេងយកកម្លាំងសិនទៅ" ។ ទោះបីគេមានកង្វល់ផង ខឹងនឹងខ្លួនឯងផង ដោយបានវង្វេងផ្លូវម្ដងហើយម្ដងទៀតតែគេដាក់ខ្លួនចុះលើគ្រែភ្លាម ក៏បានលង់លក់ដោយសុខស្រួល ។

**ជំពូកទី៣**

**ខ្ញុំនឹងសង់សាលារៀនមួយឱ្យអ្នក**

នេះជាលើកដំបូងហើយ ដែលគ្រែកបានគេងលក់ក្រោមដំបូង ក្រោយពីដេកវាលអស់រយៈពេលបីខែ។ ភ្ញាក់ឡើងព្រឹកនេះ គ្រែកឃើញខ្លួនគេគ្រប់ដណ្ដប់ដោយភួយមួយ ដែលដេរភ្ជាប់ដោយផ្ទាំងក្រណាត់ពីរជាន់យ៉ាងកក់ក្ដៅ ។ ស្រាប់តែភរិយាលោកតា ហៃជីអាលី លោកអាហារពេលព្រឹកចូលមកដល់កន្លែងគេសម្រាក ដែលមានភេសជ្ជៈឈ្មោះ ឡាស៊ី ភេសជ្ជៈធ្វើអំពី យ៉ាអួ ញ៉ាំ ជាមួយនំដុតសំប៉ែតហៅថា ឆាប់ប៉ាទី ថែមទាំងទឹកតែមួយពែងឆុងជាមួយស្ករយ៉ាងក្រាស់ ។ គ្រែកបានទទួលអាហារពេលព្រឹកទាំងនោះមកទទួលទានដោយភាពស្រេកឃ្លានបំផុត។ អ្នកស្រី សាគីណា ត្រូវជាប្រពន្ធលោក ហៃជីអាលី ឃើញគ្រែកញ៉ាំយ៉ាងឆ្ងាញ់ពិសារយ៉ាងនោះ ក៏អស់សំណើច ហើយបន្ថែមទឹកតែដែលមានលាយស្ករគ្រាស់នោះមួយពែងទៀត ។ ប្រសិនបើគ្រែតដឹងថា ស្ករជារបស់មានតម្លៃ ហើយវត្ថុកម្ររកបានសម្រាប់អ្នកភូមិកម្ព័ ប្រហែលមិនហ៊ានទទួលពែងទី២នេះទៀតទេ។ តែដោយពុំបានដឹងរឿងនេះ គ្រែកក៏បានទទួល ហើយបានផឹកយ៉ាងរហ័យទៅទៀតផង ។ សាគីណា ក៏លាចេញទៅក្រៅ ទុកឱ្យគ្រែកសម្រាកម្នាក់ឯង ។ គេមានពេលសង្កេត ពិនិត្យវត្ថុផ្សេងៗនៅជុំវិញខ្លួនគេយ៉ាងយកចិត្តទុកដាក់ ។ ផ្ទាំង ធរខ្នះ ចង្កៀងប្រេងដែលដុតបំភ្លឺពេលយប់ ទាំងអស់នេះសុទ្ធតែត្រូវបានប្រើប្រាស់ដោយត្រឹមត្រូវ ថៃថ្នូន។ សម្លឹងមកកន្លែងគេកំពុងគេង ក៏គេឃើញភួយ និងខ្នើយ ព្រមទាំងក្រមាសុទ្ធតែរបស់យ៉ាងមានតម្លៃល្អប្រណិត ។ គេបានគិតក្នុងចិត្តថា គ្រួសារលោកមេភូមិបានប្រមូលសុទ្ធតែរបស់មានតម្លៃមកទទួលគេជាមនុស្សពិសេស ។ គេបានសម្រាកពេញមួយថ្ងៃនៅក្នុងគ្រួសារមេភូមិកម្ព័នេះ រហូតដល់ល្ងាច គេឮសម្លេងស្រែកហៅឈ្មោះគេ ។ មនុស្សនៅក្នុងភូមិចេញទៅរកមើលសម្លេងស្រែកនោះជាមួយនឹងខ្លួនគេដែរ ។ នៅឯឆ្ងាយគេឃើញស្រមោលមនុស្សម្នាក់កំពុងឆ្លងកាត់ពីនាយទន្លេ Braldu មកខាងអាយដែលជាភូមិកម្ព័ ។ របៀបឆ្លងកាត់ទន្លេនេះ គឺគេប្រើធុងឈើបួនជ្រុងជាគីបមួយ ព្យួរនឹងខ្សែកាប ហើយគេអូសខ្សែកាបនេះឱ្យធុងនេះធ្វើចលនាឆ្លងកាត់ទន្លេ ប្រសិនបើខ្សែកាប់នេះត្រូវដាច់ជីវិតមនុស្សជិះលើនោះក៏គ្មានសង្ឃឹមនឹងបានរស់រានមានជីវិតទៀតឡើយ ។ ពេលធុងគីបនេះបានមកដល់ពាក់កណ្ដាលទន្លេ ទើបគ្រែកយល់ច្បាស់ថា មនុស្សដែលជិះនៅលើធុងនោះ គឺជំនួយការរបស់គេ ឈ្មោះ មូស្សាផឿ កំពុងដឹកជញ្ជូនរបស់របរឡើងភ្នំមកឱ្យគេវិញ ។ ហេតុដែលបណ្ដាលឱ្យគេជិះយ៉ាងប្រថុយប្រថានលើធុងឈើខ្សែកាបនេះ ព្រោះវាចំណេញពេលជាងកន្លះថ្ងៃ ប្រសិនគេដើរទៅរកស្ពាន ដើម្បីឆ្លងទន្លេនេះតាមផ្លូវវាង ។ ពេលមកដល់ត្រើយខាងអាយហើយ មូស្សាផឿ សប្បាយរីករាយយ៉ាងខ្លាំង យកដៃទះខ្នងគ្រែកស្រាលៗ : "អាឡាអាក់កាបា ! ព្រះអាឡាជួយលោកហើយ !" ។

(រង់ចាំអានបន្តនៅលេខក្រោយទៀត)

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណើចប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៤ ខែឧសភា ឆ្នាំ២០១០

# Next Stage of Killing Fields Deal Not Yet Finalized

*Ticket prices for memorial slated to rise, site manager says*

By Kuch Naren and Mark Worley
THE CAMBODIA DAILY

Five years after a Japanese company signed a 30-year agreement to manage the Choeung Ek killing fields memorial site, the second stage of the company's financial arrangement with Phnom Penh municipality has not yet been finalized, the site's general manager said yesterday.

In April 2005, it was made public that JC Royal—a little-known Japanese company linked to members of the ruling CPP—had been granted an exclusive 30-year contract to promote and manage the Choeung Ek genocide memorial as a tourist destination.

In exchange for the concession to manage the well-visited memorial, JC Royal was required to pay just $15,000 a year to the Phnom Penh Municipality for the first five years of the contract. This time period has now elapsed, but Choeung Ek's general manager, Chour Sokty, does not know what the new annual payment arrangement with City Hall will be.

"We don't know the next plan yet," Mr Sokty said yesterday.

"We [will] probably give the same share [of money] to City Hall as we have been doing since around five years ago, since it was privatized for the firm at $15,000 annually," he said.

Municipal Governor Kep Chuktema declined to speak to a reporter about the killing fields privatization deal yesterday, referring questions to his cabinet chief Nuon Sameth. Reached by phone yesterday, Mr Sameth declined to comment when asked about the deal, saying he was busy.

Despite the lack of information about financial arrangements, the site's manager Mr Sokty said there are plans afoot to increase the price of admission for foreigners.

The $1 general admission fee will soon rise to $3 for non-Cambodians, he said.

"We are planning to increase the ticket price to $3 in the near future, which is why we have made a survey from visitors," Mr Sokty said in an interview at Choeung Ek yesterday.

"About 70 percent of visitors said it is okay [to raise the price], while a number expressed suspicion and doubted why we need to raise up the price and where the money goes to," he said.

Youk Chhang, the Documentation Center of Cambodia's executive director, said yesterday that he was disappointed that the private company controlling the Choeung Ek site was going to up the cost of entry.

"How can you sell the memory of a nation?" Mr Chhang asked, adding that the privatization of the memorial had commercialized what he believes is a sacred site.

Financial figures provided by Mr Sokty show that the number of visitors to Choeung Ek in the first quarter of 2010 increased significantly from the same period in 2009.

From Jan 1 to March 31 this year, the figures show that 67,013 people visited the site, compared to 56,758 in 2009's first quarter.

The figures show that 59,752 of the visitors in the first three months of 2010 were foreigners, meaning the site made $119,504 in gate takings during the quarter alone.

According to Mr Sokty, after the $15,000 is paid to City Hall each year, the gate takings at Choeung Ek are transferred from JC Royal to the Sun Fund, an education fund reportedly established by Prime Minister Hun Sen in 2002 that sponsors Cambodian students.

Chea Vandeth, chief of cabinet for Cabinet Minister Sok An, who in 2005 was JC Royal's chairman and the Sun Fund's secretary-general, said Tuesday that he would not be able to answer questions about the Choeung Ek site until after the three-day King's Birthday holiday.

# ដំណាក់កាលបន្ទាប់នៃកិច្ចព្រមព្រៀង វាលពិឃាតជើងឯកមិនទាន់ត្រូវបានបញ្ចប់

ដោយ : Mark Worley និង គុច ណារ៉េន
THE CAMBODIA DAILY

រយៈពេល៥ឆ្នាំបន្ទាប់ពីក្រុមហ៊ុនជប៉ុនមួយបានចុះហត្ថលេខាលើកិច្ចព្រមព្រៀងរយៈពេល៣០ឆ្នាំ ដើម្បីរៀបចំគ្រប់គ្រងកន្លែងរំលឹកវាលពិឃាដជើងឯកមក ដំណាក់កាលទីពីរនៃការបាត់បង់ហិរញ្ញវត្ថុរបស់ក្រុមហ៊ុននេះជាមួយសាលាក្រុងភ្នំពេញ មិនទាន់បានបញ្ចប់នៅឡើយទេ នេះបើតាមអ្នកចាត់ការទូទៅនៅកន្លែងនោះបាននិយាយកាលពីម្សិលមិញ។

កាលពីខែមេសាឆ្នាំ ២០០៥ មានការប្រកាសជាសាធារណៈថា ក្រុមហ៊ុនជប៉ុនមួយដែលគេមិនសូវស្គាល់ឈ្មោះ JC Royal ដែលត្រូវបាននិយាយថា មានទំនាក់ទំនងជាមួយសមាជិកគណបក្សប្រជាជនកម្ពុជា កំពុងកាន់អំណាចនោះ ត្រូវបានផ្តល់កិច្ចសន្យាផ្តាច់មុខរយៈ៣០ឆ្នាំ ដើម្បីអភិវឌ្ឍន៍ និងរៀបចំកន្លែងរំលឹករបបប្រល័យពូជសាសន៍ជើងឯកនេះ ឱ្យទៅជាគោលដៅទេសចរណ៍។ ជាថ្នូរការទទួលបានសម្បទានដើម្បីរៀបចំកន្លែងរំលឹកដែលមានភ្ញៀវមកទស្សនាច្រើននេះ ក្រុមហ៊ុន JC Royal ត្រូវបានតម្រូវឱ្យបង់ប្រាក់១៥.០០០ដុល្លារប៉ុណ្ណោះ ក្នុងមួយឆ្នាំទៅឱ្យសាលាក្រុងភ្នំពេញសម្រាប់រយៈពេល៥ឆ្នាំដំបូងនៃកិច្ចសន្យា។

ឥឡូវពេលវេលានេះ បានកន្លងផុតទៅហើយ ប៉ុន្តែលោក ជូ សុខទី អ្នកចាត់ការទូទៅនៅកន្លែងរំលឹកជើងឯកនេះ មិនដឹងថា តើការចាត់ចែងប្រាក់ប្រចាំឆ្នាំថ្មីជាមួយសាលាក្រុងនិងមានចំនួនប៉ុន្មាននោះទេ។

លោក សុខទី បានមានប្រសាសន៍កាលពីម្សិលមិញថា "យើងមិនទាន់ដឹងពីផែនការបន្ទាប់នៅឡើយទេ"។ លោកបានមានប្រសាសន៍ថា "យើងប្រហែលជានឹងផ្តល់តម្លៃដដែលដល់សាលាក្រុងដូច ដែលយើងបាននឹងកំពុងធ្វើរយៈពេល៥ឆ្នាំកន្លងមកនេះ អ៊ីចឹងពីព្រោះវាត្រូវបានធ្វើឱ្យទៅជាលក្ខណៈឯកជនសម្រាប់ក្រុមហ៊ុននេះក្នុងតម្លៃ ១៥.០០០ ដុល្លារក្នុងមួយឆ្នាំ"។

លោក កែប ជុតិមា អភិបាលក្រុងបានបដិសេធមិននិយាយទៅកាន់អ្នកយកព័ត៌មានអំពីកិច្ចព្រមព្រៀងនៃការធ្វើឱ្យទៅជាលក្ខណៈឯកជននៃវាលពិឃាដនេះទេ កាលពីម្សិលមិញដោយបង្វែរសំណួរឱ្យទៅសួរលោក នួន សាម៉េត ប្រធានខុទ្ទកាល័យរបស់លោក។

ដោយត្រូវបានទាក់ទងតាមទូរស័ព្ទកាលពីម្សិលមិញ លោក នួន សាម៉េត បានបដិសេធមិនធ្វើការអធិប្បាយទេនៅពេលដែលត្រូវបានសួរអំពីកិច្ចព្រមព្រៀងនេះ ដោយបានមានប្រសាសន៍ថា លោករវល់ណាស់។

បើទោះជាពុំមានព័ត៌មានគ្រប់គ្រាន់អំពីការចាត់ចែងហិរញ្ញវត្ថុនេះក៏ដោយ ក៏លោក សុខទី អ្នកចាត់ការនៅកន្លែងនេះបាននិយាយថា គេមានគម្រោងដំឡើងតម្លៃសំបុត្រចូលទស្សនាសម្រាប់ជនបរទេស ។ លោកបានមានប្រសាសន៍ថា តម្លៃសំបុត្រចូលទស្សនាទូទៅចំនួនមួយដុល្លារនៅពេលឆាប់ៗ នេះនឹងដំឡើងដល់៣ដុល្លារសម្រាប់ជនបរទេស។

លោក សុខទី បានមានប្រសាសន៍នៅក្នុងបទសម្ភាសន៍មួយនៅជើងឯកកាលពីម្សិលមិញថា យើងគ្រោងនឹងដំឡើងតម្លៃសំបុត្រដល់៣ដុល្លារក្នុងពេលឆាប់ៗខាងមុខនេះ ហេតុដូច្នេះហើយបានជាយើងធ្វើការស្ទង់មតិភ្ញៀវនានា។

លោកបានមានប្រសាសន៍ថា ភ្ញៀវប្រហែល៧០ភាគរយបាននិយាយថា វាគ្មានបញ្ហាទេ(ចំពោះការដំឡើងតម្លៃសំបុត្រនេះ)ចំណែកឯមនុស្សមួយចំនួនបានសម្តែងការសង្ស័យ ហើយបញ្ចេញចម្ងល់ថា ហេតុអ្វីបានជាយើងចាំបាច់ត្រូវដំឡើងតម្លៃសំបុត្រនេះ ហើយលុយទាំងនេះនឹងធ្លាក់ទៅណា?។

លោក ឆាំង យុ នាយកប្រតិបត្តិនៃមជ្ឈមណ្ឌលឯកសារកម្ពុជា បានមានប្រសាសន៍កាលពីម្សិលមិញថា លោកខកចិត្តណាស់ដែលក្រុមហ៊ុនឯកជន ដែលគ្រប់គ្រងកន្លែងរំលឹកជើងឯកនេះនឹងដំឡើងតម្លៃសំបុត្រចូលទស្សនានោះ។

លោក ឆាំង យុ បានសួរថា តើអ្នកអាចលក់កន្លែងរំលឹករបស់ជាតិយ៉ាងម៉េច? ដោយលោកបានបន្ថែមថា ការធ្វើឱ្យទៅជាលក្ខណៈឯកជននៃកន្លែងរំលឹកនេះជាការធ្វើអាជីវកម្មលើអ្វីដែលលោកជឿថា ជាកន្លែងដ៏ពិសិដ្ឋ។

តួរលេខហិរញ្ញវត្ថុដែលផ្តល់ដោយលោក សុខទី បង្ហាញថា ចំនួនភ្ញៀវទេសចរណ៍ដែលមកទស្សនាជើងឯកនៅក្នុងរយៈពេល៣ខែដំបូងនៃឆ្នាំ២០១០ នេះបានកើនឡើងគួរឱ្យកត់សម្គាល់ធៀបនិងរយៈពេលដូចគ្នាក្នុងឆ្នាំ២០០៩។

ចាប់ពីថ្ងៃទី១ខែមករា ដល់ថ្ងៃទី៣១ខែមីនា ឆ្នាំនេះ តួរលេខបង្ហាញថា មានមនុស្ស៦៧.០១៣ នាក់បានមកទស្សនាកន្លែងនេះបើប្រៀបធៀបទៅនឹងរយៈពេល៣ខែដំបូងនៃឆ្នាំ២០០៩ ដែលមានចំនួន៥៦.៧៥៨នាក់។

តួរលេខបង្ហាញថា អ្នកមកទស្សនាចំនួន៥៩.៧៥២ នាក់ ក្នុងចំណោមអ្នកមកទស្សនាទាំងអស់ក្នុងរយៈពេល៣ខែដំបូងនៃឆ្នាំ ២០១០ នេះ គឺជាជនបរទេសមានន័យថា កន្លែងនេះរកចំណូលបានពីការចូលមកទស្សនាចំនួន ១១៩.៥០៤ដុល្លារ គ្រាន់តែនៅក្នុងអំឡុងរយៈពេល៣ខែតែប៉ុណ្ណោះ។

យោងតាមលោក សុខទី បានឱ្យដឹងថា បន្ទាប់ពីការបង់ប្រាក់ចំនួន១៥.០០០ដុល្លារទៅឱ្យសាលាក្រុងក្នុងមួយឆ្នាំៗរួចតម្លៃសំបុត្រដែលបានមកពីការចូលទស្សនានៅជើងឯកត្រូវបានផ្ទេរពីក្រុមហ៊ុន CJ Royal ទៅឱ្យមូលនិធិ Sun Fund ជាមូលនិធិផ្នែកអប់រំដែលតាមព័ត៌មានថា ត្រូវបានបង្កើតឡើងដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ក្នុងឆ្នាំ២០០២ ដើម្បីឧបត្ថម្ភដល់និស្សិតខ្មែរ។

លោក ជា វណ្ណដេត ប្រធានខុទ្ទកាល័យរបស់ លោក សុខ អាន រដ្ឋមន្ត្រីទីស្តីការគណៈរដ្ឋមន្ត្រីដែលកាលពីឆ្នាំ ២០០៨ ជាប្រធានក្រុមហ៊ុន CJ Royal និងជាអគ្គលេខាធិការមូលនិធិ Sun Fund នោះ បានមានប្រសាសន៍កាលពីថ្ងៃអង្គារថា លោកមិនអាចឆ្លើយសំណួរពាក់ព័ន្ធនឹងកន្លែងរំលឹកជើងឯកបានទេ រហូតដល់ក្រោយពេលបុណ្យចម្រើនព្រះជន្មព្រះមហាក្សត្ររយៈពេល៣ថ្ងៃរួច៕

តមកទំព័រទី ០១

# យុទ្ធនាការរួម សម រង្ស៊ី_ស៊ាន ប៉េងសែ...

**I-ធ្វើនៅកន្លែងណាខ្លះ?**

តំណាង គណបក្ស សម រង្ស៊ី នៅតំបន់ចំនួន ១០ ជាអ្នករៀបចំបដិសណ្ឋារកិច្ចចំពោះប្រធានគេនឹងភ្ញៀវកិត្តិយសរបស់ពួកគេ : ចាប់ផ្តើមនៅឡូវែល រដ្ឋម៉ាសាឈូសេត គឺជាទីបញ្ជាការគណបក្ស សម រង្ស៊ី ធំជាងគេ

1-**ថ្ងៃសៅរ៍ ទី២២ ខែឧសភា ឆ្នាំ២០១០ ម៉ោង ៩ព្រឹក-២រសៀល នៅភោជនីយដ្ឋាន សំពៅមាស**
450 CHELMSORD .ST,
LOWEL , MA 01851
CHEA KIM (978) 397 6858

2-**ហ្វីឡាដែលហ្វៀ ខែមិថុនា ឆ្នាំ២០១០ ម៉ោង ៦-៩ យប់**
GRAND KING RESTAURANT
40-44 SNYDER AVE
PHILADELPHIA, PA 19148
MEAS CHEA (215) 833-3669

ឥតមានផ្សាយឈ្មោះលោក ស៊ាន ប៉េងសែ មកជាមួយលោក សម រង្ស៊ី ទេ

3-**យូស្តុន តិចសាស 26 ឧសភា 2010 ម៉ោង ៧ ដល់ ៩យប់**
ANNAGREEN ST. HOUSTON, TX 77084
KOVID (832) 577 1653
BUNTHOEUN (713) 517 0056

4-**តាកូម៉ា-ស៊ីអាតុល ២៨ ឧសភា ២០១០ ម៉ោង ៦-១១:៣០ យប់**
BITTER LAKE COM.CENTER
12035 LINDEN AVE.
N.SEATLE, WA 98133
LARRY SENG :(425) 280-8242

5-**ឡុងប៊ិច.កាលីហ្វ័រនីញ៉ា ២៩ ឧសភា ២០១០**
Dragon Sea Restaurant
1223 East Anaheim St
Long Beach , CA 90813
Ph : LEANG VANNAK
(562) 607-5511

6- **សាន់ហូសេ-អូកឡិន ៣០ ឧសភា ២០១០ ម៉ោង ៦ ដល់ ១២:០០ អាធ្រាត**
**ម៉ោង ១១ ដល់ ម៉ោង ៣ រសៀល វត្តខេមរា រង្សី**
1594 Conningham Ave.
San Jose, CA 95122
Ph: PHILLIP LIM (408) 439-7564

7- **ស្តុកតុន ៣០ ខែ មិថុនា ២០១០**
Stokton Palace Restaurant 8118
West Lane -Stockton, CA 95210
Ph: Vannol Tear (209) 481-0838

8- **តូរ៉ុង- កាណាដា ៤ មិថុនា ២០១០ (ឥតទាន់មានព័ត៌មាន)**

9- **ម៉ុងរ៉េអាល់-កាណាដា ៥ មិថុនា ២០១០ ម៉ោង ២-៦ ល្ងាច**
Centre Gabrielle Roy 8699 Boul. St.
Michel Montreal, QC . Canada
Ph: Heng Pang (450) 934-3873

10-**អឡង់ឌូ-ហ្វ្លរីដា ៦ មិថុនា ២០១០ (មិនទាន់មានព័ត៌មាន)**

**II- ឃោសនានៅសហរដ្ឋអាមេរិក មានប្រយោជន៍អ្វី ?**

ធ្លាប់នៅក្រោមអាណានិគមបារាំង ប្រជាពលរដ្ឋខ្មែរជាច្រើន ជាពិសេសក្រុមបញ្ញវន្តខ្មែរ បានគេចផុតពីសេចក្តីស្លាប់នាជំនាន់នយោបាយតឹងតែងនៃសង្គមរាស្ត្រនិយម បន្ទាប់មករបបសង្គ្រាមសាធារណរដ្ឋ និងរបបកុម្មុយនិស្តបន្តបន្ទាប់បានយកប្រទេសបារាំងជាជម្រកភៀសខ្លួន ។ ខ្មែរប្រមាណ ៤០ ទៅ ៥០ម៉ឺននាក់ សម្បូរដោយបញ្ញវន្តតែពុំមានរចនាសម្ព័ន្ធនយោបាយ ឬសង្គមចេញបង្ហាញមុខជាសាធារណបានច្រើននោះទេ កំពុងរស់នៅប្រទេសបារាំងនោះ ។

រីឯនៅ ស.រ.អា នេះថ្វី ត្បិតតែជនភៀសខ្លួនខ្មែរចាប់ផ្តើមនាចុងបញ្ចប់នៃសម័យសាធារណរដ្ឋខ្មែរមែន តែមួយចំនួននេះ បានកើនចំនួនលឿនជាងអ្នកនៅស្រុកបារាំង ឥឡូវនេះអាចមានចំនួន ៥០ទៅ ៦០ម៉ឺននាក់ហើយ ក៏ប៉ុន្តែខុសគ្នានឹងអ្នកទៅស្រុក បារាំង គឺបញ្ញវន្តមកតិចជាង....ច្រើនតែអតីតយុទ្ធជន និងពលរដ្ឋតូចតាចនៅទីក្រុង ឬក៏អ្នកជនបទ ។ រចនាសម្ព័ន្ធនៃប្រទេសលោកសេរីមួយនេះ បានផ្តល់ឱកាសឱ្យពលរដ្ឋភាគតិចបង្ហាញសកម្មភាព និងបំណងរបស់ខ្លួនក្នុងភាពងាយស្រួលជាប្រទេសណាៗទាំងអស់ ជាពិសេសអ្នកនយោបាយ គេស្តាប់សម្លេងជនភាគតិច ហើយប្រើជានយោបាយកិច្ចការបរទេសគេបានដោយគ្មានទើសទាល់ ។ ខ្មែរនៅហ្វីឡាដែលហ្វៀនេះ (ជាង២ម៉ឺន) មានចិត្តសទ្ធាច្រើនមិនខុសពីខ្មែរនៅតំបន់ឯទៀតៗទេ ពួកគាត់ចំណាយ (ប៉ាន់ស្មាន) មិនតិចជាង ៦-៧លានដុល្លារទេ សម្រាប់ចំណាយទាក់ទងទៅនឹងកម្ពុជា-នៅឡូវែលមានចំនួនមនុស្សបីដងលើស រីឯនៅឡុងប៊ិច មានចំនួន ៥ ដងលើសនឹងតំបន់ឯទៀតៗ ដែលមានពលរដ្ឋពី ៥០០០ ទៅ ១ម៉ឺននាក់នោះ ច្រើនកន្លែងដែលគេប៉ាន់ស្មានថាចំណាយសំរាប់កិច្ចការកម្ពុជា របស់ពលរដ្ឋខ្មែរ-អាមេរិកាំងនេះ មិនតិចជាង៥០លានដុល្លារទេ ក្នុងមួយឆ្នាំៗ ។ រូបភាពធូធានឹងបើកចំហររបស់អ្នកស្រុកអាមេរិកនេះមានឥទ្ធិពលទៅលើនយោបាយកម្ពុជា ច្រើនលើកច្រើនសាមកហើយ ដែលជាហេតុធ្វើឱ្យអ្នកនយោបាយណាដែលមានភាពបរិសុទ្ធ ហើយក្លាហានអាចទាក់ទាញការគាំទ្របានច្រើនមកខាងខ្លួន ។ ចំណែកឯកអ្នកមិនសូវបរិសុទ្ធ គេប្រើមធ្យោបាយ "ឡុបប៊ី" គឺបញ្ចុះបញ្ចូលសម្ងាត់ ឬឯកជននេះបានផលតិចៗដែរ ។

អង្គការក្នុង ឬក្រៅនយោបាយខ្មែរបួន កំពុងមាន



ប្រជាប្រិយភាព ហើយបានបំពេរអារម្មណ៍ខ្មែរអាមេរិកាំងឱ្យចំហរបេះដូង និងហោប៉ៅឱ្យបានធំ គឺ : គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សរបស់លោក កឹម សុខា កំពុងប្រកែកគ្នាក្នុងករិតខ្ពស់នៅពាសពេញ ស.រ.អា នេះ - គណបក្សសិទ្ធិមនុស្សជាបក្សថ្មីទេ តែមានច្រើនសមាជិកសាខាធំរបស់នៅហ្វីឡាដែលហ្វៀ កំពុងស្វែងរកការចងសម្ព័ន្ធភាពជាមួយគណបក្ស សម រង្ស៊ី តែរកគន្លឹះមិនទាន់ឃើញនៅឡើយទេ ។ គណបក្សប្រជាជនមានសមាជិកតិចតួច ដែលមានសាខាធំនៅ ស.រ.អា ស្ថិតនៅហ្វីឡាដែលហ្វៀ ហើយកំពុងតែពង្រីកសាខារបស់ខ្លួននៅឡុងប៊ិចទៀត ។ ចលនាការពារព្រំប្រទល់ដែនរបស់លោក ស៊ាន ប៉េងសែ នៅរាយច្រើនកន្លែងនៅអាមេរិកាំងខាងជើង តែពុំមានសកម្មភាពធំដុំទេ នៅពេលដែលប្រធាន ស៊ាន ប៉េងសែ មិននៅ ។ រីឯចលនាដែលធំជាងគេ សកម្ម ហើយស្រុះស្រួលគ្នាណាស់នោះ គឺក្រុមសហព័ន្ធខ្មែរកម្ពុជាក្រោម មានទីស្នាក់ការសំខាន់នៅហ្វីឡាដែលហ្វៀ និង ស៊ីអាថុល ជាចលនាអព្យាក្រឹត្យ- តស៊ូដើម្បីសេរីភាពនៅដែនដីកម្ពុជាក្រោម ។

លោក សម រង្ស៊ី បានឃើញកម្លាំងនៃខ្មែរ-អាមេរិកាំងយ៉ាងជាក់ស្តែង មិនត្រឹមតែអាចជួយកិច្ចការព្រំដែន ឬនយោបាយកម្ពុជាទេ តែអាចសង្ឃឹមថា នឹងនាំរូបលោកឱ្យត្រឡប់ទៅកម្ពុជា បានដោយសុវត្ថភាពទៀតផង ។ រីឯលោក ស៊ាន ប៉េងសែ បានដាក់ចិត្តធ្វើ ដំណើរឃោសនាជាមួយលោក សម រង្ស៊ី នាពេលនេះ ក៏ព្រោះតែបញ្ហាព្រំប្រទល់ដែនខ្មែរ វាកាន់ដុនដាបណាស់ទៅហើយ ហើយត្រូវបណ្តាញផ្សព្វផ្សាយរដ្ឋាភិបាលខ្មែរ ធ្វើឱ្យមានការយល់ឃើញច្របូកច្របល់ដែលនឹងបណ្តាលឱ្យការច្រឡំយកដែនដីខ្មែរក្លាយជាការពិតបាន ។ លោក ស៊ាន ប៉េងសែ ជាអ្នកឯកទេសអន្តរជាតិ ខាងភូមិសាស្ត្រខ្លួនឯងផង អមជុំញដោយអ្នកឯកទេសខ្មែរ និងបរទេសជាច្រើនទៀតផង អាចផ្តល់ទម្ងន់យ៉ាងធំធេងដល់អធិការនៃព្រំដែនកម្ពុជាថា "ការដកបង្គោលសីមាដែលរដ្ឋាភិបាលខ្មែរ-វៀតណាម បានដាំនោះ នរណាជាអ្នកធ្វើត្រូវ? នេះម្យ៉ាង ហើយម្យ៉ាងវិញទៀត លោកអាចជាអ្នកផ្តល់ឋាមពលដល់ខ្មែរ-អាមេរិកាំង ក្រោកឡើងយ៉ាងរឹងប៉ឹង លើកបញ្ហាព្រំប្រទល់ដែនខ្មែរ មកដាក់លើជញ្ជីងយុត្តិធម៌វិញយ៉ាងសកម្មបាន ។

ដំណើរទស្សនកិច្ចនៃលោក សម រង្ស៊ី-លោក ស៊ាន ប៉េងសែ នាពេលនេះ ក៏អាចជាឱកាលឱ្យក្រសួងការបរទេសអាមេរិកាំង ពិនិត្យជំហររបស់ខ្លួនចំពោះកម្ពុជា សាជាថ្មីឡើងវិញ ពីព្រោះអ្នកទាំងពីរនឹងបង្កើនចលនាសាធារណមតិខ្មែរអាមេរិកាំង ដែលនៅនគរមហាអំណាចនេះ គេនិយមសម្លេងមតិច្រើនគ្នានោះ



ណាស់ ។ លោកស្រី ហ៊ីឡារី គ្លីងតុន រដ្ឋលេខាធិការក្រសួងការបរទេសអាមេរិកាំង ជាអ្នកនយោបាយដ៏ឆ្នើមមួយរូប អាចនឹងមើលឃើញការប៉ុនប៉ងចាប់លោក សម រង្ស៊ី ជាសមាជិកសភាជាតិ ដាក់ពន្ធនាគារថាជាការរំលោភរបស់ មេដឹកនាំរដ្ឋាភិបាលខ្មែរ បានយ៉ាងងាយស្រួល ៕

# HONG KONG SUPERMARKET

## FAMER´S BEST

HONG KONG SUPERMARKET
(PA) WEEKLY PROMOTION ITEMS
លក់ចុះថ្លៃពីថ្ងៃ ២១/ឧសភា_២៧/ឧសភា/២០១០
ON SALE PERIOD
May 05/21-05/27/2010



$2.99 a LB

**Newly Renovated.**
**Added new section .**
**Clean and Improved management !**
ទើបនឹងកែលំអរថ្មីឡើងវិញ
-បន្ថែមផ្នែកលក់ថ្មីទៀត
ហាងស្អាត ហើយបង្កើន
គុណភាពគ្រប់គ្រង

**Weekly Sale**
លក់ចុះថ្លៃរៀងរាល់សប្តាហ៍



$1.99 a Can



$1.69 a Jar



$3.49 a Tin



$0.99 a LB



$2.99 per LB



$1.79 a LB



59c a LB



$2.99 - LB



$1.69 per Blt



99c per Blt



2 for $5.00.



99c per bag



3 bag for $10.00



$2.69 per bag



99c per bag

**OPEN 7 DAY**
**8:00-9:00**

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-7281300 Fax: 215-728-1600

- ចំណាយ **$140**ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ **$100**ដុល្លារ ទទួលបាននូវភេសជ្ជៈ ឬទឹកញ៉ូប៉មួយប្រអប់( តម្លៃ **8.99**)
- ចំណាយ **$25** ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(តពីលេខមុន)

ដោយ : ពិន នារីពិទូ

ដែលឈរបោយដៃបែរមុខទៅអាវ៉ាមកាតូលិកប៉ូឡូញនៃវិថី សាំងគ្រីស្តុហ (St. Christopher) និងបន្ទាប់មកទៅទស្សនាសារៈមន្ទីរប្រវត្តិសាស្ត្រនៃទីក្រុងប្រែស (Brest) ដោយបង់ថ្លៃទិញសំបុត្រចូលទស្សនាសំរាប់ជនបរទេស និងបានទស្សនាការដាក់តាំងពិព័រណ៍ត្រឹមតែពីរកន្លែងដែលមានការអធិប្បាយជាភាសាដើម ។

យើងបានចាកចេញពីទីក្រុង ប្រែស (Brest) នៅវេលាម៉ោង១១និង២២នាទី ដែលមានចំងាយផ្លូវ ៣៤០ គីឡូម៉ែត្រ យើងបានមកដល់រាជធានី មីង (Minsk) ដែលជារាជធានីធំជាងគេរបស់សាធារណរដ្ឋបេឡារីស (Belarus) នៅម៉ោង១៥និង៣០នាទីក្រោមមេឃពណ៌ខៀវស្រឡះល្អ ។ នៅម៉ោង៤និង១០នាទី យើងបាននាំគ្នាបើកបរ រួចឈប់សំចតរថយន្តនៅកន្លែងយាមកាមមួយអស់រយៈពេលពីរថ្ងៃ ។ យើងក៏បន្តដំណើរដោយថ្មើជើង តាមផ្លូវក្រោមដីនៃមហាវិថីនៃទីក្រុង មីង (Minsk) ដែលប្រកបដោយអាគារដ៏ទំនើបៗធំស្កឹមស្កៃព្រមទាំងរូបចម្លាក់អ្នកប្រហារនៅសម័យសាធារណៈរដ្ឋសង្គមនិយមសហភាពសូវៀត ។ មនុស្សម្នានៅទីនោះនិយមជជែកកំសាន្ត ជក់បារី និងផឹកស្រាបៀរនៅតាមតៀមស្ត្រីភាគ ច្រើនមានរាងខ្ពស់ស្តើង ស្បែកស និងនិយមស្លៀកសំពត់ ឬខោខើចខ្លី ។ យើងបានមក



ឈប់សម្រាកបន្ទាប់ពីការធ្វើដំណើរជាង ៣០០០គីឡូម៉ែត្រ

ដល់ដីកោះ ស៊ីលីយូ អូស្ត្រូ (Silioz Ostrov) ជាទីកន្លែងសក្ការៈរំលឹកនូវវិញ្ញាណក្ខ័ន្ធជនរងគ្រោះដែលបានស្លាប់ក្នុងសម័យសង្គ្រាម ព្រមទាំងទស្សនារូបចម្លាក់ស្ត្រីដ៏គួរឱ្យចាប់អារម្មណ៍យ៉ាងខ្លាំងអមដោយសេនា ដែលកំពុងយំព្រោះមិនអាចការពារក្រុមរបស់ខ្លួនបាន ។ អស់រយៈពេល៧ទសវត្សរ៍ស្ថិតជាអតីតរដ្ឋមួយនៃសហភាពសូវៀត បេឡារីស (Belarus) បានទទួលឯករាជ្យភាពរបស់ខ្លួននៅឆ្នាំ ១៩៩១ ហើយបច្ចុប្បន្ននេះប្រែក្លាយជាសាធារណៈរដ្ឋបេឡារីស (Belarus) ។ បន្ទាប់មកយើងបានមកដល់ផ្សារយាគុប កូឡាសា (Yakub Kolassa) ដែលនៅទល់មុខប្រាសាទដ៏ធំស្កឹមស្កៃរបស់លោកប្រធានាធិបតីលូកាសិងកូ (Lukashenko) ស្តង់ដាក់លក់ម្ហូបអាហារ និងផ្លែឈើក្នុងទីផ្សារនេះត្រូវបានរៀបចំយ៉ាងមានសណ្តាប់ធ្នាប់ រួមទាំងបុគ្គលិកស្លៀកពាក់ឯកសណ្ឋានទីផ្សារនេះ មើលទៅគួរឱ្យស្ងប់ស្ងែង ។ ទីផ្សារនេះសំបូរផល្លានុផលដោយប្រទេសនេះ មានផ្ទៃដីសរុបចំនួន ២០៧.៦០០ គីឡូម៉ែត្រក្រឡា ក្នុងនោះ៤០ភាគរយគ្របដណ្តប់ដោយព្រៃឈើសក្តានុពលផ្នែកសេដ្ឋកិច្ចសំខាន់លើកសិ-ឧស្សាហកម្ម ។

នៅថ្ងៃទី១៩ ខែសីហា ឆ្នាំ ២០០៦ យើងបានមកដល់ព្រំដែនរវាងសាធារណៈរដ្ឋប្រែស (Belarus) និងសហព័ន្ធរុស្ស៊ី Russia នៅតាមព្រំដែនយើងមានការលំបាកក្នុងការទំនាក់ទំនងផ្នែកភាសា ប៉ុន្តែដោយមានការជួយសម្របសម្រួលយ៉ាងរហ័សពីបុគ្គលិក នៅទីនោះ លើផ្នែកនិតិវិធីរដ្ឋបាលដោយប្រើប្រាស់ត្រឹម



តែរយៈពេលពីរម៉ោង ។ ព្រឹកនេះយើងបានមកដល់ទីក្រុងមូស្គូ Moscow ជារាជធានីដែលមាន ប្រជាជននិយមរស់នៅច្រើនជាងគេ និងជាទីក្រុងស្អាតលំដាប់ទី៧នៅលើពិភពលោកមានផ្ទៃដីចំនួន 1,081 គីឡូម៉ែត្រក្រឡា និងមានប្រជាជនចំនួន ១០.៥៣៥.១០០ នាក់រស់នៅទីក្រុងមូស្គូ The Moscow, ក្រិមឡាំង Kremlin ជាទីក្រុងដែលទទួលបានការអភិរក្ស និង



ចុះបញ្ជីជាកេរ្តិ៍ដំណែលវប្បធម៌ពិភពលោករបស់អង្គការយូណេស្កូ ។ ទីក្រុងម៉ូស្គូជាមជ្ឈមណ្ឌលប្រតិបត្តិសកម្ម និងសំខាន់លើគ្រប់វិស័យដូចជា ផ្នែកនយោបាយសេដ្ឋកិច្ច វប្បធម៌ ជំនឿសាសនា ហិរញ្ញវត្ថុ គ្រឹះស្ថានសិក្សា និងអប់រំ ហើយក៏ជាមជ្ឈមណ្ឌលពាណិជ្ជកម្ម និងដឹកជញ្ជូនដ៏សំខាន់របស់ប្រទេសរុស្ស៊ី និងនៅលើពិភពលោក ។

ថ្ងៃនេះយើងបានទស្សនាទីក្រុងដ៏ធំគឺ ក្រិមឡាំង the Kremlin ដោយបើកបរតាមផ្លូវអយស្ម័យយាន ព្រមទាំងស្ថានីយដែលស្អាតជាងគេបំផុតនៅលើពិភពលោក ស្ថានីយនីមួយៗ ប្រៀបដូចជាសណ្ឋាគារដ៏ធំមួយ ។ នៅទីក្រុងនេះសំបូរដោយវិហារកាតូលិចជាច្រើនតាមបែបសាសនាផ្សេងៗ ដែលមានអ្នកទេសចរណ៍ជនជាតិបារាំងមកទស្សនាជាច្រើន ។ យើងមិនអាចភ្ជាប់ប្រពន្ធ័អ៊ិនធើណេតបានដោយសារមានខ្យល់ព្យុះមួយរំពេច ។ យប់នេះយើងបានបរិភោគអាហារនៅអាហារដ្ឋានតូចមួយក្បែរសណ្ឋាគារដែលពួកយើងស្នាក់នៅ ដែលបញ្ជីរាយមុខម្ហូបនីមួយៗសរសេរជាភាសារុស្ស៊ី ដូចនេះ យើងត្រូវត្រៀមឧបករណ៍បកប្រែ ឬសៀវភៅវចនានុក្រមមកជាមួយទើបអាចពន្យល់គ្នាបានខ្លះ ។

ប្រទេសរុស្ស៊ីតែងតែប្រារព្ធទិវាជ័យជំនះរបស់ខ្លួននៅថ្ងៃទី៩ ខែឧសភា ដោយឱ្យឈ្មោះថា ជាមហាសង្គ្រាមការពារទឹកដីរបស់សហភាពសូវៀតពីព្រោះកាលនោះប្រទេសមហាអំណាចរុស្ស៊ីដែលជាសរសរទ្រូងរបស់សហភាពសូវៀត បានធ្វើសង្គ្រាមស្លាប់រស់ជាមួយនឹងទ័ពហ្វាស៊ីសអាឡឺម៉ង់ ដែលបានចូលវាតទីដល់ក្នុងព្រំដែនសហភាពសូវៀតនៅឆ្នាំ





១៩៤១ រហូតដល់ថ្ងៃដែលមេទ័ពរបស់ហ៊ីត្លែបានចុះហត្ថលេខាសុំចុះចាញ់ ។ ពិធីចុះហត្ថលេខានៅទីក្រុងប៊ែឡាំងប្រទេសអាឡឺម៉ង់ ដោយមេទ័ពនៃរបបហ្វាស៊ីសអាឡឺម៉ង់នៅចំពោះមុខមេទ័ពនៃសម្ព័ន្ធប្រឆាំងហ៊ីត្លែ គឺ សូវៀត អាមេរិក អង់គ្លេស បារាំង បានប្រព្រឹត្តិទៅនៅថ្ងៃទី៨ ខែឧសភា ឆ្នាំ១៩៤៥ ដែលត្រូវនឹងថ្ងៃទី៩ ខែឧសភា នៅប្រទេសសូវៀត ។ ការចុះហត្ថលេខានេះ ជាសញ្ញានៃការបញ្ចប់សង្គ្រាមលោកលើកទីពីរនៅទ្វីបអឺរ៉ុប ។ ប្រទេសទាំង២៦ នៃសម្ព័ន្ធប្រឆាំងហ្វាស៊ីស និងយោធានិយមដែលនាំមុខដោយសហភាពសូវៀត អង់គ្លេស សហរដ្ឋ អាមេរិក និងបារាំង បានចុះហត្ថលេខាប្រឆាំងតទល់នឹងសម្ព័ន្ធត្រីភាគី អាឡឺម៉ង់ អ៊ីតាលី និងជប៉ុន ដែលមានមហិច្ឆិតាក្តោបក្តាប់យកពិភពលោកទាំងមូល ។

ទោះជាអាកាសធាតុនៅទីក្រុងមូស្គូនេះ មានការប្រែប្រួលយ៉ាងណាក៏ដោយ ពួកយើងនៅតែអាចធ្វើដំណើរទៅមុខជានិច្ច ។

ថ្ងៃទី២០ ខែសីហា ឆ្នាំ២០០៦ : ពួកយើងបានធ្វើដំណើរចាកចេញពីទីក្រុងមូស្គូនៅម៉ោង១១និង១៦នាទីព្រឹក ឆ្ពោះទៅទីក្រុងវ្ល៉ាឌីមា Vladimir ដែលស្ថិតតាមបណ្តោយទន្លេ Klyazma River ភាគខាងកើតទីក្រុងមូស្គូ យើងនឹងទៅដល់គោលដៅក្នុងចំងាយផ្លូវ២០០គីឡូម៉ែត្រ ដោយបើកបរអស់រយៈពេល១៥ ម៉ោង ប៉ុន្តែតំបន់ខ្លះមានភាពស្មុកស្មាញបន្តិចក្នុងការបើកបរ (តទៅលេខក្រោយ)

# NEW GOLDEN PALACE

**SEAFOOD RESTAURANT**
**801-21 Washington Avenue.**
**Philadelphia, Pa 19147**

**Tel: 215-627-2822**

Business Hours: Monday–Sunday. 10 a.m.–10 p.m.

សូមអញ្ជើញគ្រោងពិធីរបស់លោកអ្នកជាមួយនឹងយើងខ្ញុំ

*Plan your next event here!*



- *Wedding Reception* •ពិធីមង្គលការ
- *Birthday Parties* •បុណ្យខួបកំណើត
- *Business Meetings* •ប្រជុំការងារជំនួញ
- *Private Parties* •ពិធីជប់លៀងជាឯកជន
- *Fundraisers* •បុណ្យរៃអង្គាសប្រាក់
- *We Accept Reservation for Holidays* •យើងទទួលឱ្យកក់កន្លែងធ្វើពិធីនៅថ្ងៃឈប់បុណ្យទានបាន

យើងបំរើម្ហូប ឌិម ស៊ុម រាល់ថ្ងៃ ពីព្រឹកដល់ល្ងាច



**We Serve Dim Sum Daily All Day Long &**



**Also Try Our Vietnamese Phở**

កុំភ្លេច ភ្លក់ "ហ្វើ" វៀតណាមរបស់យើង

**From 10 a.m. – 10 p.m.**

ពិធីជប់លៀងល្ងាចពិសេស ជាមួយក្រុមគ្រួសារ

## ROYAL FAMILY DINNER PACKAGE

សំរាប់៦នាក់-ម្ហូប៧មុខ- $78

**DINNER FOR 6 - 7 Entrées $78**



1. Vietnamese Spring Roll
2. Sweet Sour Pork Chops
3. Seafood Bean Curd Soup
4. Lobster with Ginger & Scallion
5. Steam Fish
6. House Special Fried Rice
7. Seasonal Fruit

សំរាប់៨នាក់-ម្ហូប៨មុខ- $98

**DINNER 8 – 8 Entrées $98**

1. Palace Appetizer
2. Shrimp Hot & Sour Soup
3. Baby Claims with Black Bean Sauce
4. Sautéed seafood with Chinese Vegetables
5. Lobster with Ginger & Scallion
6. Steam Fish
7. House Special Lo Mein
8. Seasonal Fruit

សំរាប់១០នាក់-ម្ហូប៩មុខ- $128

**DINNER 10 – 9 Entrées $128**

1. Fried Shrimp Rolls
2. Salt Baked Shrimp
3. Seafood with Sweet Corn Soup
4. Seafood Bird's Nest
5. Crispy Fried Chicken
6. Double Lobsters with Ginger Scallion
7. Steam/Fried Fish Tilapia
8. House Special Fried Rice
9. Seasonal Fruit

# COMPUTER+ LLC

SURVEILLANCE SYSTEM, COMPUTER RETAILER, REPAIR & SERVICES

ជំនាញការខាងជួសជុលកុំព្យូទ័រ លក់គ្រឿងកុំព្យូទ័រ
និងដាក់គ្រឿងថតវីដេអូសំរាប់ការពារសន្តិសុខ

REMOTE VIEWING

Remote Monitoring, Recording, Controlling through Internet from *anywhere* at *anytime*



*Stand-Alone System*



*PC-Base System*






*HOME or VACATION*

On the ROAD

5709 N. 5th St., Phila, PA 19120 Open: *Mon-Sat; 10am—6:00pm*
*Peter Hong Ching* * Tel: (215) 276-7000 * Fax: (215) 276-7001
E-mail: peterchng_99@yahoo.com www.computerplusllc.com




# Nationwide

Insurance & Financial Service

សេវាធានារ៉ាប់រង និងហិរញ្ញវត្ថុ

We offer Cheap Price for Every Client

យើងធ្វើជូនគ្រប់ភ្ញៀវដោយតម្លៃទាប

| | |
|---|---|
| Business Liability Insurance | ធានារ៉ាប់រងជំនួញលោកអ្នក |
| Home Insurance | ធានារ៉ាប់រងផ្ទះសម្បែង |
| Health Insurance | ធានារ៉ាប់រងសុខភាព |
| Auto Insurance | ធានារ៉ាប់រងរថយន្ត |
| Life Insurance | ធានារ៉ាប់រងជីវិត |

Discount 30% when you purchase
Home & Auto Insurance

ចុះតម្លៃ ៣០ % បន្ថែមបើលោកអ្នកទិញ
ធានារ៉ាប់រងផ្ទះ និងរថយន្តរួមគ្នា

South Philadelphia office:
600 Washington Ave Suite #8 Philadelphia, PA 19147
Tel: (215) 463-1257 , Fax: (215) 463-2036

ឌឹ ខេមបូឌា ដេលី The Cambodia Daily

# Chea Mony Plans To Resign as President of FTU

BY YUN SAMEAN
THE CAMBODIA DAILY

As membership and dues decline at the Free Trade Union, union president Chea Mony will resign six years after he stepped into the shoes of his brother, murdered union leader Chea Vichea.

Mr Mony said yesterday that health issues, including lung problems, were his main impetus for leaving his position. He said he planned to support Cambodian Confederation of Unions President Rong Chhun to replace him in union elections on June 27.

"I don't want to be the Free Trade Union president candidate because of my health problems and the large workload," he said. "Free Trade Union is a big union. We need an experienced leader."

For years the union has lost membership, which once stood at 80,000, he said. Although it is difficult to determine the precise number of FTU members, only about 24,000 workers currently pay dues, according to Mr Mony.

"We don't have the budget. We are weak," he said, adding that he does not have the same skills as his charismatic brother did.

"Compared to the former president, Chea Vichea, he was good at public communications and diplomacy, [but] I don't speak the language," he said.

Mr Chhun said he would run for the FTU post.

"If Chea Mony resigns from the position and he gives me the opportunity, I will help the unions. I will continue former Free Trade Union President Chea Vichea's legacy and I will lead the unions," he said. If elected he would attempt to merge his 9,000-member union with the FTU.

He pledged to reform unions at a particularly difficult time for the garment industry, which has suffered the brunt of the financial crisis in Cambodia.

Mr Chhun said he would focus on giving more power and providing more educational opportunities to union activists.

"We need to build up our membership, otherwise the government won't be afraid of us," he said.

Tola Moeun, a project coordinator with the legal aid organization Community Legal Education Center who works with the country's unions, said that FTU and the union movement never recovered from Mr Vichea's assassination, and that he hoped the election of a new FTU leader would distribute power more evenly among local representatives.

"After Chea Vichea, the FTU seems a bit weaker than when Chea Vichea was alive," he said.

Although he called Mr Chhun a good candidate, he said he hoped workers would be able to choose from a variety of candidates with fresh ideas.

"It's good that he will let the new generation stand for election," he said of Mr Mony.

Mr Moeun agreed that one of the new leader's most crucial tasks will be to build trust by giving workers more in return for their membership of the FTU. That includes more education and expanding collective bargaining, he said.

*(Additional reporting by Tim Sturrock)*

# លោក ជា មុនី នឹងលាលែងពីប្រធានសហជីពសេរីកម្មករ

ដោយ : យ៉ុ សាមៀន
THE CAMBODIA DAILY

នៅពេលដែលសមាជិកភាព និងថវិកាធ្លាក់ចុះនៅសហជីពសេរីកម្មករនោះ លោក ជា មុនី ប្រធានសហជីពនេះ នឹងលាលែង៦ឆ្នាំក្រោយពីលោកបានធ្វើការងាររបស់បងប្រុសលោក គឺលោក ជា វិជា មេដឹកនាំសហជីពដែលត្រូវបានគេធ្វើឃាត ។


លោក ជា មុនី


លោក រ៉ុង ឈុន

លោក ជា មុនី បានមានប្រសាសន៍កាលពីម្សិលមិញថា បញ្ហាសុខភាពរួបទាំងបញ្ហាជំងឺសួត គឺជាហេតុផលចម្បងរបស់លោកចំពោះការចាកចេញពីតួនាទីរបស់លោក ។ លោកបានមានប្រសាសន៍ថា លោកមានគម្រោងគាំទ្រលោក រ៉ុង ឈុន ប្រធានសហព័ន្ធសហជីពកម្ពុជា ឱ្យជំនួសលោកនៅក្នុងការបោះឆ្នោតរបស់សហជីពនៅថ្ងៃទី២៧ខែមិថុនា ។

លោកបានមានប្រសាសន៍ថា"ខ្ញុំមិនចង់ធ្វើជាបេក្ខជនប្រធានសហជីពសេរីកម្មករទៀតទេ ដោយសារបញ្ហាសុខភាពរបស់ខ្ញុំនិងបន្ទុកការងារច្រើន" ។ "សហជីពសេរីកម្មករ គឺជាសហជីពដ៏ធំមួយ ។ យើងត្រូវការមេដឹកនាំដែលមានបទពិសោធន៍ម្នាក់" ។

លោកបានមានប្រសាសន៍ថា អស់រយៈពេលជាច្រើនឆ្នាំមកហើយ ដែលសហជីពនេះ បានបាត់បង់សមាជិកដែលធ្លាប់មានចំនួន ៨០.០០០ នាក់ ។ យោងតាមលោក ជា មុនី បានឱ្យដឹងទៀតថា ទោះបីជាវាមានការពិបាកក្នុងការកំណត់ឱ្យបានច្បាស់លាស់អំពីចំនួនសមាជិករបស់សហជីពសេរីកម្មករ ក៏ដោយ ក៏បច្ចុប្បន្ននេះមានកម្មករប្រហែលតែ ២៤ .០០០នាក់ប៉ុណ្ណោះដែលបង់ថ្លៃ ។

លោកបានមានប្រសាសន៍ថា "យើងមិនមានថវិកាទេ យើងខ្សោយ" ។ លោកបានបន្ថែមថា លោកមិនមានជំនាញដូចបងប្រុសដ៏ប៉ិនប្រសប់របស់លោកនោះទេ ។

លោកបានមានប្រសាសន៍ថា "បើប្រៀបធៀបទៅនឹងអតីតប្រធានគឺលោក ជា វិជ្ជា គាត់ពូកែខាងទំនាក់ទំនងសាធារណៈ និងការទូត(ប៉ុន្តែ)ខ្ញុំមិនចេះនិយាយភាសារនេះទេ" ។

លោក រ៉ុង ឈុន បានមានប្រសាសន៍ថា លោកនឹងឈរឈ្មោះសម្រាប់តួនាទីជាប្រធានសហជីពសេរីកម្មករ ។

លោកបានមានប្រសាសន៍ថា "ប្រសិនបើលោក ជា មុនី លាលែងពីតួនាទីនេះ ហើយលោកផ្តល់ឱកាសឱ្យខ្ញុំ ខ្ញុំនឹងជួយសហជីពទាំងនេះ ខ្ញុំនឹងបន្តកេរដំណែលរបស់លោក ជា វិជ្ជា អតីតប្រធានសហជីពសេរីកម្មករ ហើយខ្ញុំនឹងដឹកនាំសហជីពទាំងនេះ" ។ ប្រសិនបើជាប់ឆ្នោត លោកមានបំណងបញ្ចូលសហជីពដែលមានសមាជិក ៩.០០០នាក់របស់លោកជាមួយសហជីពសេរីកម្មករ ។

លោកបានសន្យាកែទម្រង់សហជីពនៅអំឡុងពេលមានការពិបាកចំពោះឧស្សាហកម្មកាត់ដេរ ដែលបានទទួលរងនូវស្ថានភាពដ៏អាក្រក់នៃវិបត្តិហិរញ្ញវត្ថុនៅកម្ពុជា ។

លោក រ៉ុង ឈុន បានមានប្រសាសន៍ថា លោកនឹងផ្តោតលើការផ្តល់អំណាចនិងផ្តល់ឱកាសអប់រំថែមទៀតដល់សកម្មជនរបស់សមាជិក ។

លោកបានមានប្រសាសន៍ថា"យើងត្រូវបង្កើតសមាជិកភាពរបស់យើង បើមិនដូច្នេះទេ រដ្ឋាភិបាលនឹងមិនខ្លាចយើងឡើង" ។

លោក មឿន តុលា អ្នកសម្របសម្រួលគម្រោងនៅមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ជាអង្គការជំនួយផ្នែកច្បាប់ដែលធ្វើការជាមួយសហជីពនានានៅក្នុងប្រទេសបានមានប្រសាសន៍ថា សមាជិកសហជីពសេរីកម្មករ និងចលនារបស់សហជីពមិនដែលមានអារម្មណ៍ធូរស្រាលពីការធ្វើឃាតលោក ជា វិជ្ជា ទេ ហើយថា លោកសង្ឃឹមថា ការបោះឆ្នោតជ្រើសរើសមេដឹកនាំសហជីពសេរីកម្មករថ្មីនឹងបែងចែកអំណាចកាន់តែស្មើភាពថែមទៀត ក្នុងចំណោមអ្នកតំណាងមូលដ្ឋាន ។

លោកបានមានប្រសាសន៍ថា "បន្ទាប់ពីលោក ជា វិជ្ជា សហជីពសេរីកម្មករហាក់បីដូចជាទន់ខ្សោយជាងនៅពេលដែលលោក ជា វិជ្ជា នៅរស់" ។

ទោះបីជាលោកចាត់ទុកលោក រ៉ុង ឈុន ជាបេក្ខជនល្អម្នាក់ក៏ដោយ ក៏លោកបានមានប្រសាសន៍ថា លោកសង្ឃឹមថា កម្មករនិងអាចជ្រើសរើសប្រធានពីបេក្ខជនជាច្រើនដែលមានគំនិតថ្មីៗ ។

លោកបានមានប្រសាសន៍អំពីលោក ជា មុនី ថា "វាជាការល្អដែលលោក និងអនុញ្ញាតឱ្យមនុស្សជំនាន់ថ្មីឈរឈ្មោះបោះឆ្នោត" ។

លោក មឿន តុលា បានយល់ស្របថា ភារកិច្ចមួយក្នុងចំណោមភារកិច្ចចាំបាច់បំផុតរបស់មេដឹកនាំថ្មី គឺត្រូវបង្កើតការទុកចិត្តដោយការផ្តល់ជំនឿទុកចិត្តថែមទៀត ដល់កម្មករជាថ្នូរនឹងសមាជិកភាពរបស់ពួកគេនៅសហជីពសេរីកម្មករ ។ លោកបានមានប្រសាសន៍ថា ការផ្តល់នោះរួមមានការអប់រំបន្ថែមនិងការពង្រីកកិច្ចពិភាក្សាគ្នា ៕

# ចោទប្រកាន់បុរសម្នាក់ពីបទរំលោភកូនស្រី

ដោយ : ឃួន ណារិទ
THE CAMBODIA DAILY

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា តុលាការខេត្តសៀមរាបបានចោទប្រកាន់បុរសអាយុ៣៨ ឆ្នាំម្នាក់ពីបទរំលោភកូនស្រីរបស់ខ្លួនអាយុ១២ឆ្នាំ ពីរលើកនិងពីបទបៀតបៀនកេរ្តិ៍ខ្មាសកូនស្រីពីរនាក់ទៀតអាយុ៩ឆ្នាំ និង៦ឆ្នាំ ។ លោក ទី សុរិនថាល់ ព្រះរាជអាជ្ញាតុលាការខេត្តថ្លែងកាលពីម្សិលមិញថា ជនសង្ស័យឈ្មោះ ធុយ សារី ត្រូវបានតុលាការចោទប្រកាន់កាលពីថ្ងៃពុធ និងឃុំខ្លួន បណ្តោះអាសន្ន ។ លោក ញ៉ែម សិលា ស្នងការរងប៉ូលិសខេត្តបានថ្លែងប្រសាសន៍ថា លោក សារី បានរំលោភកូនស្រីរបស់ខ្លួនអាយុ១២ឆ្នាំ ពីរលើកកាលពីឆ្នាំមុននៅផ្ទះរបស់គ្រួសារគាត់ក្នុងឃុំកែវពណ៌ ស្រុកពួក ។លោកសិលា បានថ្លែងថា "យើងបានចាប់ខ្លួនជនសង្ស័យនេះ...នៅផ្ទះរបស់គាត់បន្ទាប់ពីប្រពន្ធរបស់គាត់ដាក់ពាក្យបណ្តឹងទៅអង្គការក្រៅរដ្ឋាភិបាលកាលពីថ្ងៃទី២៧ខែមេសា "។ លោក លន់ ស៊ិន អនុប្រធានការិយាល័យប្រឆាំងការជួញដូរមនុស្ស និងការពារអនិតិជននៃកងរាជអាវុធខេត្តបានថ្លែងកាលពីម្សិលមិញថា ជនរងគ្រោះអាយុ១២ឆ្នាំរូបនេះបានប្រាប់ប៉ូលិសថា នាងត្រូវបានរំលោភ១២លើកហើយ ឪពុករបស់នាងបានគំរាមនាងប្រសិនបើនាងប្រាប់នរណាម្នាក់ ។ លោក លន់ ស៊ិន បានថ្លែងថា "ជនសង្ស័យរូបនេះបានសារភាពថា បានរំលោភនាងពីរលើក ហើយស្ទាបអង្អែលរាងកាយកូនស្រីរបស់គាត់ពីរនាក់ទៀត" ៕

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

•••ព្រះពុទ្ធលោកមានឱសថសំរាប់ដកឬបឹត ឬរំលាយពិសពុលបែបនេះចេញពីចិត្តមនុស្សបាន ។

និយាយរួមក្នុងក្របខណ្ឌកុងស្សនិសពេលដឹងខ្លួន waking state គ្មានទេសំរាប់លំហែរ សន្តិភាពផ្លូវចិត្ត មានតែព្យុះចិត្តជានិច្ច សង្គ្រាមជានិច្ច ពីព្រោះមនុស្ស ឋិតនៅក្រោមឥទ្ធិពលនៃមេម៉ូរី ។ បើមើលពីក្រៅ យើងឃើញថា ចិត្តមនុស្សពុំចេះស្កប់ស្កល់ ពុំពេញចិត្តនឹងអ្វីដែលខ្លួនមានឈរពុំនឹង ស្វែងរុករកជានិច្ច បាននេះហើយ ចង់បាននោះទៀត ចិត្តសង្ស័យជានិច្ច

សង្ស័យនឹងខ្លួនឯង សង្ស័យនឹងអ្នកដទៃ សង្ស័យនឹងសភាពការណ៍ ។ នេះជាធម្មជាតិរបស់ចិត្តមនុស្ស ។ ការរស់នៅក្រោមឥទ្ធិពលមេម៉ូរី ដូចពោលខាងលើក្នុងភាសាអង់គ្លេស គេប្រើពាក្យ Man is unconsciouns mind ។ សំនួរមូលដ្ឋានបំផុតនោះ គឺ តើមនុស្សយើងអាចមានលទ្ធភាពរស់នៅក្រៅប្រព័ន្ធមេម៉ូរីបានឬទេ? តាមរបៀបណា? ពិតជាមានលទ្ធភាព ពិតជាមានច្រកចេញ ពិតជាមានទីរំដោះមានសេរីភាព ។ សូមតាមដានអានតទៅទៀត ។

**ទី២. កុងស្សនិសពេលយល់សប្តិ Dreaming state**

លោកអ្នកធ្លាប់ពិសោធន៍ថា តើការយល់សប្តិមានសភាពយ៉ាងណា? ទី១ យើងពុំដឹងខ្លួន ព្រោះដេកលក់ ។ ទី២ ចលនាខួរក្បាល Mental activities ចលនាមេម៉ូរនៅដើរបន្ត ។ យើងពិនិត្យឃើញ ខ្លួនយើងធ្វើសកម្មភាពប្លែកៗ ដូចជាហោះហើរ ធ្វើដំណើរទៅឆ្ងាយៗ ជួបមនុស្សស្លាប់កន្លងមក រួមភេទជាមួយនឹងសង្សា ។ ។ល។និង។ល។ ចំណុចកត់សំគាល់នោះ គឺ :

នៅពេលយើងដេកលក់ មេម៉ូរីនៅតែធ្វើសកម្មភាព មានន័យថា មនុស្សដេកក៏ពិតមែន តែគេពុំបានសំរាកព្រោះថាមពលក្នុងខ្លួននៅប្រើប្រាស់ ។ បើយល់សប្តិមួយយប់ពេញ ភ្ញាក់ឡើងពិតជាអស់កម្លាំងខ្សោះខ្លួនពុំខានឡើយ ។

កុងស្សនិសពេលយប់សប្តិ Dreaming state ពុំត្រឹមតែមាននៅពេលយប់ដេកលក់ប៉ុណ្ណោះទេ វាលាតសន្ធឹងជ្រៀតជ្រែកចូលទៅក្នុងកុងស្សនិសពេលដឹងខ្លួន Waking state ថែមទៀត ។ ឧទាហរណ៍ តើអ្នកធ្លាប់មានពិសោធន៍ដូចខ្ញុំឬទេ? ពេលកំពុងបើកឡាន រឿងអតីតកាលបានជ្រៀបចូលមកក្នុងចិត្តខ្ញុំៗ ភ្លឹកមួយភ្លែតស្រាប់តែទៅដល់កន្លែងមួយ ទើបដឹងខ្លួន សំណាងល្អពុំមានគ្រោះថ្នាក់ឡើយ ។ ប្រហែលពេលនោះ ៩០%នៃកុងស្សនិស ស្រូបទៅក្នុងរឿងអតីតកាល ហើយ១០%កុងស្សនិសនៅនឹងចង្កូតឡាន ទើបបើកឡានបាន ។ សូមកុំប្រឡែងលេងនឹងគ្រោះថ្នាក់បែបនេះ ។ បើតាមពិនិត្យការរស់នៅជាក់ស្តែង ពិសោធន៍បែបនេះ មានច្រើនណាស់ ពិសេសក្នុងពេលយើងជួបប្រទះនឹងរឿងរ៉ាវជីវិតផ្សេងៗ។ យើងស្ទុង ឬភ្លឹកគំនិតជូន២ឬ៣នាទី ជូនរាប់ម៉ោងក៏មាន។ ការរស់នៅបែបនេះ ពុំប្រសើរឡើយ ។ ជាទូទៅមនុស្សភ្លឹក ក៏ពុំដឹងថាខ្លួនឯងភ្លឹកផង ហើយក្លាយទៅជារឿងធម្មតា លែងនឹកនាដល់ទៀតផង។ ដូច្នេះគេរស់នៅក្នុងគុកផ្លូវចិត្តមួយជីវិត ។ ចំណុចនេះហើយដែលសាសនានានាហៅថាអវិជ្ជា ignorance ។

**ទី៣. កុងស្សនិសពេលដេកលក់ស្កប់ស្កល់ Deep sleep**

លោកអ្នកធ្លាប់ពិសោធន៍ហើយមែនទេ? ពេលណាដេកបានស្កប់ស្កល់ ភ្ញាក់ឡើងមានកម្លាំងកំហែងស្វាងស្រឡះមុខមាត់ ស្រួលខ្លួន ញញឹមញញែម ព្រោះទទួលការសំរាក១០០% ។ តើហេតុអ្វីក៏បានសំរាកបរិសុទ្ធបែបនេះ Complete relax ? អ្នកប្រាជ្ញខ្លះបានបញ្ជាក់ថា ក្នុងមួយយប់ មនុស្សយើងដេក៦ម៉ោង ក្នុងនោះរយៈពេលដេកលក់ស្កប់ស្កល់ Deep sleep បានតែកន្លះម៉ោង ទៅមួយម៉ោងប៉ុណ្ណោះ ក្រៅពីនោះ សុទ្ធតែជាពេលយល់សប្តិ ។ រយៈពេលដ៏ខ្លីនេះ មេម៉ូរីពុំវត្តមានឡើយ សកម្មភាពខួរក្បាល Mental activities ត្រូវបានបញ្ឈប់ទាំងស្រុង ។ ពេលនេះ មនុស្សរស់ក្រៅមេម៉ូរីទាំងស្រុង ថាមពលក្នុងខ្លួនពុំបានចំណាយចេញឡើយ Energy is still ។ ធម្មជាតិមានឱកាសធ្វើកិច្ចការរបស់គេដោយគ្មានរំខានទាំងអស់ គេបំពេញថាមពលឱ្យរូបកាយឡើងវិញ ប្រៀបដូចជាការសាកអាគុយឡើងវិញដូច្នោះឯង ។ អាស្រ័យហេតុនេះ ទើបយើងមានកម្លាំង ពេលភ្ញាក់ឡើង ។ ជាទូទៅកុងស្សនិសយល់សប្តិ Dreaming state ជ្រៀតជ្រែកការដេកលក់ស្កប់ស្កល់ នាំមកនូវការរំខានពិតប្រាកដណាស់ ។

សរុបមកវិញ មនុស្សត្រូវការរូបភាពនៃជីវិតដែលមានសកម្មភាពមេម៉ូរីផង និងជីវិតនៃក្រៅប្រព័ន្ធមេម៉ូរីផង (ដូចករណីកុងស្សនិស Deep sleep) ។ យើងពិនិត្យឃើញថា កុងស្សនិសពេលដេកលក់ស្កប់ស្កល់ជាឧទាហរណ៍មួយបង្ហាញថា មនុស្សយើងមានលទ្ធភាពអាចរស់នៅក្រៅប្រព័ន្ធមេម៉ូរីបាន ហើយហុចលទ្ធផលភ្លាមៗ ពោលគឺភាពស្ងប់ សន្តិភាពក្នុងចិត្ត ប្រភពផ្តល់ថាមពលកម្លាំងកំហែង ភាពស្រណុកស្រួល សប្បាយរីករាយ ការសំរាកដ៏បរិសុទ្ធ (complete relax)) ។

តើក្នុងជីវិតជាក់ស្តែងមានឧទាហរណ៍ណាទៀតដែលមានមនុស្សអាចរស់នៅក្រៅប្រព័ន្ធមេម៉ូរីបាន? បាទពិតជាមាន ។ យើងពុំដែលពិនិត្យសង្កេត ។ ខាងក្រោមនេះ ខ្ញុំសូមលើកបន្ថែម ជាមេរៀនជីវិតសំរាប់អ្នកកំណត់ចំណាំ :

**ក. កុមារអាយុ៣-ឬ៥ឆ្នាំ**

មើលចុះពួកគេមានទឹកមុខស្រស់ថ្លា ញញឹមជានិច្ច សប្បាយរីករាយ ក្មេរក្លារ ហូបឆ្ងាញ់ ឃើញចាស់ទុំធ្វើអ្វីមានចិត្តចង់ជួយសំរាលសុខភាពល្អ ។ល។ គុណសម្បត្តិទាំងអស់នេះ ផុសចេះមកពីកុមារទាំងអស់នោះ

(តទៅលេខក្រោយ)




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

- ១១ មិថុនា : ចាប់ខ្លួន ញឹម រស់ (មូលសម្បត្តិ) គណកម្មាភិបាលតំបន់ខាងជើង ឈាងខាងកើត តាំងពីឆ្នាំ ៥០មក ។

- ១២ មិថុនា : នៅតូក្យូ អៀង សារី មកបកស្រាយពីអំពើក្បត់ ឃុបឃិតរបស់CIA និងវៀតណាម ដើម្បីផ្តួលរំលំរបបកម្ពុជាប្រជាធិបតេយ្យ ។

**១៩៧៨ (ត)**

- ២១ មិថុនា : វិទ្យុក្រុងហាណូយ បានចោទប្រកាន់ថ្នាក់ដឹកនាំខ្មែរថា "ធ្វើការសម្លាប់រង្គាលជាស្វ័យប្រវត្តិ" ។

- ២៦-២៨ មិថុនា : វៀតណាមបានវាយលុកតបមកវិញយ៉ាងខ្លាំងក្លា ។

- ១៤ កក្កដា : នៅបាងកក អៀង សារី ខិតខំភ្ជាប់ទំនាក់ទំនងជាមួយសៀម ។

- ២៩ កក្កដា : សុន សេន ទៅប៉េកាំង ដើម្បីសុំបង្កើនជំនួយសម្ភារៈយោធា - ចិនទាមទារឱ្យខ្មែរក្រហមបញ្ចប់នយោបាយ "តឹងតែង" ហើយកែសម្រួលរូបភាពប្រទេសឱ្យអាចទទួលការរាប់អានពី បរទេសបាន ហើយឱ្យយកសម្តេច សីហនុ មកដាក់ជាព្រះប្រមុខរដ្ឋវិញ ។

- ខែសីហា : អ.ស.ប ផ្តើមកិច្ចប្រជុំពិភាក្សាដែលបានបើកកាលពីខែកុម្ភៈ-មីនា នៅក្រោមអនុគណកម្មាធិការសិទ្ធិមនុស្ស ហើយបានស្តាប់ភស្តុតាងយ៉ាងច្រើនពីការសម្លាប់រង្គាលដែលកំពុងអនុវត្តន៍នៅកម្ពុជា - មានរដ្ឋាភិបាលប្រទេសអូស្ត្រាលី, កាណាដា, អង់គ្លេស, ន័រវេស, ស.រ.អា បានផ្តល់នូវរបាយការណ៍ផ្ទាល់ពីការរំលោភច្បាប់អន្តរជាតិនេះនៅកម្ពុជា - អនុកម្មាធិការបានបញ្ចប់កិច្ចប្រជុំដោយដោយកត់ហេតុថា មាន "ការសម្លាប់រង្គាលនៅកម្ពុជា" ។ ប្រទេសស៊ុីស, ឥណ្ឌូនេស៊ី និងជប៉ុន ដាក់ទូតជាមួយកម្ពុជាប្រជាធិបតេយ្យ ។ ខៀវ សំផន និងសម្តេច សីហនុ ចេញធ្វើទស្សនកិច្ចនៅខេត្តកណ្តាល ។

- ខែកញ្ញា : សម្តេច សីហនុ និងព្រះញាតិវង្សរបស់ព្រះអង្គ ត្រូវបានបញ្ជូនមកនៅក្នុងព្រះរាជដំណាក់មួយក្បែរវាំងចតុមុខ ។ ទស្សនកិច្ចបន្តរបស់ ខៀវ សំផន និងសម្តេច សីហនុ នៅក្រុងព្រះសីហនុ ។

- ៨ កញ្ញា : វៀតណាមបានវាយប្រហារមកលើកម្ពុជា ដោយទ័ពអាកាស ។

- ២៨ កញ្ញា : ខៀវ សំផន បានរៀបបដិសណ្ឋារកិច្ចថ្វាយ សម្តេច សីហនុ - ជូនលោក ប៉ែន នុត, លោក សារិន ឆាត និង ឌួង សំអុល ។

- ខែតុលា : តំបន់ខាងកើតនៅប្រទេសត្រូតត្រា ដោយក្រុមខ្មែរប្រឆាំងនឹងរបបខ្មែរក្រហមមួយភ្នែក ហើយមួយផ្នែកទៀតដោយវៀតណាម ។ ជនភៀសខ្លួនខ្មែរ បានឡើងចំនួនដល់ ៤០ម៉ឺននាក់នៅវៀតណាម ។

- ខែវិច្ឆិកា : ចាប់ខ្លួន វ៉ន វ៉េត ឧបនាយករដ្ឋមន្ត្រី, ម៉ី ប្រេង រដ្ឋមន្ត្រីក្រសួងគមនាគមន៍ និង ចេង អាន រដ្ឋមន្ត្រីក្រសួងឧស្សាហកម្ម ។

- ៥ វិច្ឆិកា : ទស្សនកិច្ចរបស់គណប្រតិភូចិនមកត្រួតពិនិត្យជំនួយយោធា ដែលផ្តល់ពីប៉េកាំង - ចិនបានផ្តល់អាវុធយុទ្ធភ័ណ្ឌ មានទាំងរថក្រោះ, ឡានពាសដែក និងយន្តហោះប្រដេញផង ។ អ្នកបច្ចេកទេសចិន បានសង់វាលយន្តហោះមួយនៅកំពង់ឆ្នាំង - មានអ្នកបច្ចេកទេស និងទីប្រឹក្សាចិន ៥០០០នាក់ចូលរួម ។

- ២ ធ្នូ : ក្រុមខ្មែរក្រហមច្រើនរយនាក់ជួបជុំគ្នានៅស្នួល ដើម្បីបង្កើតរណសិរ្ស FUNSK រណសិរ្សរួបរួមជាតិកម្ពុជា ដឹកនាំដោយ ហេង សំរិន។ រណសិរ្ស FUNSK នេះមានកំណត់ប្រវត្តិរបស់ខ្លួនក្នុងចលនាកុម្មុយនិស្តឥណ្ឌូចិន រួចមកក្នុងចលនាខ្មែរ - គេបាននិយាយថា នៅចម្លោះឆ្នាំ១៩៦៣ ដល់ ១៩៧៨ គឺជាគ្រប់គ្រងដោយ ប៉ុល ពត ដែលបានដឹកនាំខុសទិសដៅ ហើយរណសិរ្សថ្មីនេះនាំគ្នាកាន់ទង់ខ្មែរឥស្សរៈសារថ្មីឡើងវិញ ។ ភ្លាមនោះដែរ វៀតណាម ឡាវ និងសូវៀត បានប្រកាសទទួលស្គាល់ ។

- ថ្ងៃ ២២ ធ្នូ : សម្លាប់សាស្ត្រាចារ្យអង់គ្លេស **ម៉ាលគុម ខតវែល** ដែលមកធ្វើទស្សនកិច្ចនៅភ្នំពេញ ជាមួយអ្នកកាសែតពីរនាក់ គឺ អេលីសាបែត បេគៃ និង ឌិក ដាដម៉ាន់ ។

- ថ្ងៃ ២៥ ធ្នូ : ចាប់ពីឆ្នាំ ១៩៧៥ មកខ្មែរក្រហម បានកំទេចទីប្រជុំជននៅវៀតណាមចំនួន ២៥ ភូមិ ចំនួន ៩៦ ធ្វើឱ្យមនុស្ស ២៥៧.០០០នាក់គ្មានជម្រក ហើយសម្លាប់មនុស្សជាច្រើនរយនាក់ ខាងវៀតណាមផ្តើមលើកទ័ព ១០ម៉ឺននាក់ ជាមួយទ័ព ហេង សំរិន ប្រមាណ ២ម៉ឺននាក់ បានវាយលុកចូលកម្ពុជា ពេលនោះមហាជនផ្តើមជម្លៀសខ្លួនជាលើកទី៤ ។ កងទ័ព ប៉ុល ពត បានដកខ្លួនថយទៅនៅតាមភ្នំនាជាយដែនថៃ នាំ និងកៀរយកពលរដ្ឋខ្មែរឱ្យទៅជាមួយនឹងការដកទ័ពនោះ - គេឃើញអន្លង់កប់ខ្មោចរួមជាច្រើននៅតាមផ្លូវក្រោយខ្នងទ័ពខ្មែរក្រហម ។ រីឯទ័ពខាងវៀតណាម ត្រូវបានទទួលស្វាគមន៍ជាអ្នកមករំដោះប្រទេស ។

- ថ្ងៃ ៣០ ធ្នូ : រំដោះខេត្តក្រចេះបានទាំងមូល ។

(តទៅលេខក្រោយ)




# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា

❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សៀត .អេ.លី

❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ



❖ Original Illuatration and Naration in Thai by Gunapayuta.

❖ Translation into English by A Lu.

❖ Coloring by Yann Fang Lee

❖ Translation into Khmer by Bhikkhu Kong Am.

**៧២-** នៅតាមដងវិថីនានា មានផ្ទះលក់ទំនិញជាច្រើនរបស់ពួកពាណិជ្ជករ ឯពួកសិប្បករទាំងឡាយកំពុងធ្វើគ្រឿងប្រដាប់តាក់តែងកាយគ្រប់ប្រភេទសំរាប់ស្ត្រី ។ ហាងសំលៀកបំពាក់មានលក់សំលៀកបំពាក់គ្រប់ពណ៌ អ្នកធ្វើនំលក់នំឱ្យអតិថិជនទាំងឡាយដែលកំពុងរង់ចាំទិញត្រៀមត្រា ។ នៅពេលនោះព្រះសិទ្ធត្ថ រាជឱរសទ្រង់សប្បាយក្សេមក្សាន្តក្នុងព្រះរាជហឫទ័យ និងទ្រង់ត្រេកអរក្រៃលែងដោយបានទតឃើញទិដ្ឋភាពរបស់អ្នកនគរទាំងឡាយកំពុងប្រកបរបរអាជីវកម្មដូច្នេះ ។

**៧៣-** ប៉ុន្តែភ្លាមនោះស្រាប់តែមានឧបទ្ទហេតុដ៏អាក្រក់គួរឱ្យខ្លាចបានកើតឡើងម្តងទៀត ។ នៅពេលដែលព្រះអង្គកំពុងយាងលំហែទតមើលទិដ្ឋភាពទាំងពួងតាមបណ្តោយផ្លូវ រំពេចនោះទ្រង់ក៏ឮសូរសំលេងស្រែកយំកន្ទក់កន្ទេញថ្ងូចថ្ងូរគួរឱ្យតក់ស្លុតនៅចិញ្ចើមថ្នល់ម្ខាង ដែលសំលេងនោះហាក់ដូចជាស្រែករកអ្នកណាម្នាក់ឱ្យជួយ ។ ឮដូច្នោះ ព្រះអង្គទ្រង់យាងដល់ទីនោះភ្លាម ទ្រង់ខំសំលឹងមើលត្រង់កន្លែងដែលលេចឮសំលេង ហើយក៏បានប្រទះឃើញបុរសម្នាក់កំពុងដេកបម្រះនទ្បៀលត្រវីក្រវាត់ជើង សំលេងថ្ងូរហ៊ឺះៗនៅ៤លើដី ។ ដងខ្លួនគាត់ឡើងរមួលពន់ពែនដោយការឈឺចុកចាប់ឥតឈប់ឈរ ទាំងមុខមាត់ ទាំងខ្លួនប្រាណប្រឡាក់ឡើងស្រមកៗកកដោយញើសក្អែល ខុះឈាម ទៅជាសម្បុរឡើងស្វាយ ឃើញគួរខ្ពើមរអើមពន់ពេក។ ភ្នែកទាំងពីរវិលក្រឡឹតក្រឡាប់ហាក់ដូចប្រាប់ពីភាពក្រវល់ក្រវាយមហិមា គាត់ខំត្រដរត្រដូសប្រវេប្រវារ ស្រវារក្រោកឡើង តែក្រោកមិនបាន ប្រាណក៏ដួលទៅវិញយ៉ាងខ្លាំង ងើបក្បាលឡើងវិញ ដួលទៅវិញទៀត ទោះខំងើបឡើងយ៉ាងណាក៏ងើបក្រោកមិនរួចសោះឡើយ ។

**៧៤-** ព្រះសិទ្ធត្ថដោយទ្រង់មានព្រះទ័យប្រកបដោយមេត្តាករុណាអាណិតអាសូរក្រៃពេកចំពោះសព្វសត្វ ឃើញដូច្នោះ ព្រះអង្គស្ទុះទៅដល់បុរសនោះ យ៉ាងប្រញាប់ទ្រង់ចាប់លើកក្បាលគាត់ដាក់នៅលើព្រះជានុព្រះអង្គផ្ទាល់ ទ្រង់បបោសអង្អែលដោយព្រះហស្តដ៏ទន់ល្វន់ធ្វើឱ្យគាត់បានបាត់ការឈឺចាប់បន្តិចម្តងៗ ហើយទ្រង់មានព្រះបន្ទូលសួរថា តើអ្នកកើតជំងឺអ្វី ហើយយ៉ាងម៉េចបានជាក្រោកឈរមិនរួច។ បុរសអ្នកជំងឺខំប្រឹងហាមាត់និយាយ តែហេវហត់ដង្ហក់ញាក់ញ័រចំប្រប់ គ្មានកំលាំងនិយាយចេញបាន ។ (ឃើញដូច្នោះ) នាយឆន្ទៈអាមាត្យទៅដល់ភ្លាម ព្រះអង្គត្រាស់សួរឆន្ទៈថា "នែឆន្ទៈ ចូរឯងប្រាប់ខ្ញុំមកមើល ហេតុអ្វីបានជាមនុស្សនេះស្ថិតក្នុងស្ថានភាពខុសគេទៅវិញ ! ចូរឯងមើលដង្ហើមគាត់យ៉ាងម៉េចហ្នឹង ! ហេតុអ្វីក៏គាត់មិននិយាយតបមកយើង?" ។ (តទៅលេខក្រោយ)

72- Along the streets there were shops of rich merchants, craftsmen were making all kinds of adornments for women; dye shops were full of clothj of various colors; bakeries sold cakes to people waiting to buy them. At that time Prince Siddhartha felt happy and was very glad to see the conditions of these industriously working people.

73- But soon bad and ugly things began happening again. While the prince was strolling along, he suddenly heard a moan from the roadside, that sounded as if someone was calling for help. The prince approached the area, looked at the place where the moan was coming from, and found a man lying on the ground. His body was twisting incessantly, both his face and body were discolored with a nauseating purple hue, his eyes rolled back and forth in his head, and everytime he struggled to rise he fell heavily to the ground again, never making it to his feet.

74- Since Prince Siddhartha was so very merciful, he quickly approached the man and held him up, placing his head upon his own knee causing him to feel gradually camfortable and then asked what caused the pain and why he could not stand up. The man tried to say something, but he did not even have the strength to speak. Chandaka hastily approached, and the prince asked: "Chandaka, tell me why this man is in this comdition! Look how he is breathing! Why dose he not answer me?"



*(Continued Issue After)*

តមកទំព័រទី ០៣

# ដំណើរឆ្ពោះទៅរកការរលត់នៃ...

លោក លឺ ឡាយ ស្រេង បានបន្តទៀតថា ក្នុងគណបក្សហ៊្វុនស៊ិនប៉ិច គ្មានការបែងចែកក្រុមនៃការដឹកនាំឡើយ ប៉ុន្តែការចោទប្រកាន់របស់លោក ហ៊ុន សែន ថា ហ៊្វុនស៊ិនប៉ិច កំពុងត្រូវបានដឹកនាំដោយក្រុមពីរ គឺ "ក្រុម លឺ ឡាយស្រេង" និង "ក្រុម ញឹក ប៊ុនឆៃ" ជាចេតនាបំបែកបំបាក់ផ្ទៃក្នុង ដែលគេធ្លាប់បានប្រើល្បិចរបៀបនេះ តាំងពីដើមរហូតមកដល់ពេលនេះ ។

ការលើកឡើងរបស់លោក លឺ ឡាយ ស្រេង ថា ហ៊្វុនស៊ិនប៉ិច មិនមានការបែកបាក់ផ្ទៃក្នុង គ្រាន់តែជាយុទ្ធសាស្ត្រការពារប៉ុណ្ណោះ ប៉ុន្តែតាមពិតហ៊្វុនស៊ិនប៉ិចបានបែកជាពីរក្រុម គឺក្រុមមួយដឹកនាំដោយលោក លឺ ឡាយស្រេង ក្នុងនោះមានលោក កែវ ពុទ្ធរស្មី និង ទ្រង់ ស៊ីសុវត្ថិ សិរីវត្ថ និងក្រុមទី2 ដឹកនាំដោយ លោក ញឹក ប៊ុនឆៃ។ ក្រុមរបស់លោក លឺ ឡាយស្រេង មានអំណាចនយោបាយច្រើនជាងក្រុមរបស់លោក ញឹក ប៊ុនឆៃ ព្រោះគាត់គ្រប់គ្រងសម្លេងភាគច្រើននៃគណៈកម្មាធិការអចិន្ត្រៃយ៍ និងគណៈកម្មាធិការនាយក ហើយការិយាល័យប្រតិបត្តិគណបក្សខេត្ត-ក្រុង រីឯក្រុមរបស់លោក ញឹក ប៊ុនឆៃ វិញគ្រប់គ្រងកម្លាំងហ៊្វុនស៊ិនប៉ិចនៅក្នុងរដ្ឋាភិបាល ព្រមទាំងខេត្ត-ក្រុង និងស្រុក-ខណ្ឌ។ ដោយសារអំណាចនយោបាយក្នុងគណបក្សហ៊្វុនស៊ិនប៉ិច ខ្សោយ លោក ញឹក ប៊ុនឆៃ បានព្យាយាមជាច្រើនលើកដើម្បីសុំយាងសម្តេចក្រុមព្រះទៅដឹកនាំគណបក្សហ៊្វុនស៊ិនប៉ិចប្រយោជន៍គាត់អាចទប់ទល់ជាមួយក្រុមរបស់លោក លឺ ឡាយស្រេង ដែលមិនគាំទ្រឱ្យសម្តេចក្រុមព្រះយាងមកដឹកនាំហ៊្វុនស៊ិនប៉ិច វិញ ។ នៅពេលជាមួយគ្នា លោក ញឹក ប៊ុនឆៃ ក៏បានព្យាយាមប្រើប្រាស់កម្លាំងនយោបាយនៃគណបក្សជាតិនិយមដែលប្តូរមកពីគណបក្សនរោត្តម រណឫទ្ធិ តាមរយៈការស្វះស្វែងរកការរួបរួមរវាងគណបក្សទាំងពីរក្នុងគោលបំណងពង្រឹងកម្លាំងនយោបាយ និងអំណាចនយោបាយក្នុងគណបក្សហ៊្វុនស៊ិនប៉ិច ។ លើសពីនេះទៀត លោក ញឹក ប៊ុនឆៃ អាចប្រើប្រាស់គណបក្សហ៊្វុនស៊ិនប៉ិច បន្ទាប់ពីការរួបរួមគ្នាជាទម្ងន់នយោបាយសម្រាប់ការដាក់សម្ពាធនយោបាយមកលើលោក ហ៊ុន សែន ដែលហាក់បានបង្ហាញពីភាពសោះអង្គើយចំពោះគាត់ និងសម្រាប់ការរក្សាមុខតំណែងរបស់គាត់ និងបក្ខពួករបស់ខ្លួន ។




មជ្ឈដ្ឋានទូទៅបានព្យាករណ៍ទុកថា នេះជាសញ្ញាប្រកាសអាសន្នដល់គណបក្សហ៊្វុនស៊ិនប៉ិច ព្រោះលោក ហ៊ុន សែន នឹងមិនបញ្ចប់ត្រឹមការដកតំណែងលោក ហ៊ុន ភឿង តែម្នាក់ប៉ុណ្ណោះទេ ប៉ុន្តែវាជាផែនការរបស់គាត់ដែលត្រូវបោសសំអាតមន្ត្រីហ៊្វុនស៊ិនប៉ិច ចេញពីរដ្ឋាភិបាលចំរុះ ។ លោក ហ៊ុន សែន ធ្លាប់មានផែនការដកហូតតំណែងមន្ត្រីហ៊្វុនស៊ិនប៉ិច នៅរដ្ឋាភិបាលរបស់គាត់ម្តងរួចមកហើយកាលពីខែមិថុនា ឆ្នាំ2009 ប៉ុន្តែផែនការនេះត្រូវបានអាក់ខានវិញ ដោយស្ថានការណ៍នយោបាយមិនអំណោយផល ។ អ្នកវិភាគបានបញ្ចេញទស្សនៈថា លក្ខខណ្ឌមានតែមួយប៉ុណ្ណោះ សម្រាប់មន្ត្រីហ៊្វុនស៊ិនប៉ិច ដើម្បីរក្សាមុខតំណែងនោះល្គឹកណា ពួកគេចុះចូលជាមួយគណបក្សប្រជាជនកម្ពុជា ។

ការដកតំណែងលោក ហ៊ុន ភឿង ត្រូវបានគេជឿថា គ្រាន់តែជាការចាប់ផ្តើមមួយដែល លោក ហ៊ុន សែន អាចមានបំណងសាកល្បងមើលប្រតិកម្មនៃគណបក្សហ៊្វុនស៊ិនប៉ិច ហើយវាជាយុទ្ធសាស្ត្រមួយដែលលោក ហ៊ុន សែន និងលោក ញឹក ប៊ុនឆៃ បានរៀបចំឡើងដើម្បីក្តោបក្តាប់ហ៊្វុនស៊ិនប៉ិច បន្ទាប់ពីគណបក្សនេះ និងគណបក្សជាតិនិយមបានប្រកាសអំពីការរួបរួមគ្នាទៅជាគណបក្សតែមួយ ។ ចំណុចនេះលោក ញឹក ប៊ុនឆៃ បានទទួលគុណសម្បត្តិដ៏មហិមាពីលោក ហ៊ុន សែន ព្រោះ គាត់បានទទួលនូវជោគជ័យក្នុងការអូសទាញឱ្យគណបក្សជាតិនិយមមកចុះចូលជាមួយគណបក្សហ៊្វុនស៊ិនប៉ិចឡើងវិញដើម្បីផ្តល់ដល់គណបក្សប្រជាជនកម្ពុជា និងលោក ហ៊ុន សែន មានភាពងាយស្រួលក្នុងការគ្រប់គ្រង និងបញ្ជាគណបក្សនេះ ។

សរុបមកវិញការរួបរួមរវាងគណបក្សហ៊្វុនស៊ិនប៉ិច និងជាតិនិយម ជាជោគជ័យរបស់គណបក្សប្រជាជន និងលោក ហ៊ុន សែន ក្នុងការបំផ្លាញគណបក្សរាជានិយមហ៊្វុនស៊ិនប៉ិច ដោយមិនចាំបាច់បំបាត់ឈ្មោះគណបក្សនេះចេញពីបញ្ជីបោះឆ្នោត ប៉ុន្តែរក្សាទុកគណបក្សនេះ ដើម្បីធ្វើជាឡប់ឡែ និងអាយ៉ងក្នុងគោលបំណងបោកបញ្ឆោតអ្នកបោះឆ្នោតសំដៅបំបែកសម្លេងឆ្នោតនៃគណបក្សប្រឆាំងផ្សេងទៀតនៅក្នុងការបោះឆ្នោតនាពេលអនាគត ។

យុទ្ធសាស្ត្រច្រេះស៊ីដែក ឬក៏ឱហ៊្វីត របស់លោក ហ៊ុន សែន ក្នុងការបំផ្លិចបំផ្លាញគណបក្សរាជានិយម និងគណបក្សប្រជាធិបតេយ្យផ្សេងទៀត ពិតជាមានប្រសិទ្ធភាពមែន ! ប៉ុន្តែវាក៏ជាកំហុសនយោបាយរបស់មេដឹកនាំ និងអ្នកនយោបាយនៃគណបក្សប្រឆាំងដែលបណ្តែតបណ្តោយខ្លួនឱ្យយុទ្ធសាស្ត្ររបស់លោក ហ៊ុន សែន អនុវត្តបាននិងសម្រេចបានជោគជ័យតាមទិសដៅរបស់គេនោះ ៕



# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ២១ ឧសភា_១០ មិថុនា ២០១០



### ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានជួបនឹងគូប្រជែង ដើងខ្លាំងយ៉ាងណាក្តី ក៏មិនបញ្ហាអ្វីដែរ ព្រោះលោកអ្នកយកប្រៀបឈ្នះជាប់ជានិច្ច ចំពោះកម្លោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នា និងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តីក៏លោកអ្នកអាច បោះជំហានទៅមុខដោយសន្សឹមៗបានដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ គឺអាចគិតគូរឿង អាពាហ៍ពិពាហ៍បាន ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិត ប្រាជ្ញាឈ្លាសវៃ ទោះបានប្រកប ការងារអ្វីក៏អាចទទួលបានផលសម្រេចតាមការបំណងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហ៍មានភាព ល្អកល្អឹនល្អណាស់ ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ មុជមិនជ្រៅទៅមិនឆ្ងាយ តែបើលោកអ្នករកស៊ីនាយអាយនៅក្បែរៗ គឺអាចរកផលចំណូលហូរចូលច្រើនគ្រាន់បើ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះ មិនសូវយល់ចិត្តថ្លើមគ្នាទេ ៕



### ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយចូររៀបចំគម្រោងផែនការជាមុន ទើបពុំមានការថ្លោះធ្លោយ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ពិតមែនតែបានជួបនិងឱកាសល្អខ្លះៗក្តី ក៏លោកអ្នកមិនត្រូវធ្វើឲ្យមានការធ្វេសប្រហែសដែរ ព្រោះវាអាចនាំឲ្យបាត់បង់ទ្រព្យ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមានការយល់អធ្យាស្រ័យគ្នាធម្មតា ៕



### ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសក្នុងការទូទាត់បញ្ជីប្រាក់កាស ផ្សេងៗប្រយ័ត្នមានការភ្លាំងភ្លាត់តែបន្តិចអាចខាតបង់ទ្រព្យច្រើន ដែលមិនអាចគណនាបានឡើយ ។ ចំពោះគូស្វាមីភរិយាប្រយ័ត្នមានគេអុជអាលឲ្យបែកបាក់គ្នា ៕



### ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើងមានការមមាញឹក និងហត់នឿយច្រើនក្តី តែភោគផលកម្រៃហូរចូលបានតិចតួចស្តួចស្តើងប៉ុណ្ណោះ ។ ចំពោះស្នេហា ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលជ្រៀតជ្រែក ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ដោយទំនាយទាយថាអាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ មានផលប៉ះទង្គិចគ្នាខ្លះ ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកជាមនុស្សពូកែខាងសម្តីវោហារ ទោះជាបាននិយាយស្តីច្រើនបន្តិចក្តី ក៏មិនឥតប្រយោជន៍ដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តីក៏លោកអ្នក អាចបោះជំហានទៅមុខដោយសន្សឹមៗបានដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ គឺអាចគិតគូរឿងអាពាហ៍ពិពាហ៍បាន ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការបំណងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ប្រកបដោយសេចក្តីសុខក្សេមក្សាន្ត ៕

សោភ័ណភាព :

## ការថែរក្សាស្បែកតាមធម្មជាតិ

**-ផ្លែម្រះ**



ចូរត្រៀមផ្លែម្រះ១-២ចំណិត , ទឹកឃ្មុំ ២ស្លាបព្រាបាយ រួចយកម្រះមកលាងទឹកឲ្យស្អាតហាន់ជាបន្ទះតូចៗ ហើយដាក់ទៅក្នុងម៉ាស៊ីនដិន (ក្រឡុក)ដាក់ទឹកឃ្មុំ ចូលទៅហើយកិនឲ្យសាច់ម្រះល្អិតម៉ដ្ឋជាសាច់ក្រែម ។

បន្ទាប់មកយកមកធ្វើជាក្រែមថែស្បែក ឬប្រើលាបបំពោកថែស្បែកមុខ ដោយលាងសម្អាតផ្ទៃមុខឲ្យស្អាត ផ្តិតសាច់ក្រែមលាបបរិវេណមុខ និងកឲ្យសព្វលើកលែងតែត្រង់រង្វង់ភ្នែក និងបបូរមាត់ ។ ទុកចោលប្រមាណ១០នាទី ទើបលាងចេញ និងជួយឲ្យស្បែកស្រស់ថ្លា ទន់ស្អាត និងអាចលុប បំបាត់ស្លាកស្នាមបានទៀតផង ។

**- ផ្លែត្របែក**



ផ្លែត្របែកជាផ្លែឈើសម្បូរវីតាមីនC ដែលយើងទទួលទានបានគ្រប់រដូវ ប៉ុន្តែប្រហែលជាមានមនុស្សតិចណាស់ដែលដឹងថា ត្របែកអាចជួយរំញោច និងសម្អាតស្បែកបានយ៉ាងល្អ ។ ដូច្នេះអ្នកអាចយកផ្លែត្របែកមួយផ្លែ មកកិនយកសាច់លាបបំពោកមុខទុកចោលប្រមាណ១៥-២០នាទី រួចលាងសម្អាតចេញ ។ វិធីនេះជួយឲ្យស្បែកដែលធ្លាប់តែដាំអាប់ត្រលប់មកជាភ្លឺស្រស់ថ្លាឡើងវិញ ។ ចំណែកទឹកត្របែកដែលនៅសល់ ចូរដាក់លាយអំបិល ឬស្ករបន្តិច ហើយទទួលទានដើម្បីឲ្យរាងកាយទទួលបានវីតាមីនC ជួយទប់ស្កាត់រោគាផ្សេងៗ ៕

សោភ័ណភាព :

## អាហាររក្សាសម្រស់ស្បែកយុវវ័យ

**សម្បុរស្បែកស្រស់ថ្លាទន់ស្អាត មិនមែនដោយសារតែប្រើប្រាស់គ្រឿងសំអាងទាំងអស់នោះទេ ការទទួលអាហារក៏មានភាពសំខាន់ក្នុងការធ្វើឲ្យស្បែករបស់អ្នកមើលទៅស្អាតក្មេងជាងវ័យជានិច្ច...។**

### សាច់ត្រី

សំបូរទៅដោយសារធាតុអាហារប្រភេទប្រូតេអ៊ីន ដែលជួយប៉ះប៉ូវ និងជួលជុលដល់កោសិកាផ្សេងៗរបស់រាងកាយ ។ ក្រៅពីនេះនៅមានសេលេនៀម ( Selenium ) ដែលជួយពន្យារពេលទ្រុឌទ្រោមរបស់រាងកាយទៀតផង ។





### គ្រាប់ស្រូវ ឬធញ្ញជាតិ

អង្ករសំរូប ស្រូវអាវ៉ែន ពោត សណ្តែកសៀង សណ្តែកបាយ សណ្តែកខ្មៅ ល្ង...។ល។ ជាអាហារដែលមានវីតាមីន B និង E ដែលជួយសាងនិងរក្សាភាពរឹងមាំរបស់កោសិការួមបន្ថែមសំណើមដល់ស្បែក និងជួយការពារមិនឲ្យស្បែកខូចខាត ។

### បន្លែស្រស់ និងផ្លែឈើ

ជាពិសេស បន្លែស្រស់ និងផ្លែឈើដែលមានវីតាមីន C ច្រើនដូចជាក្រូចទូទៅក្រូចឆ្មារ ប៉េងប៉ោះ ម្នាស់ ត្របែក ព្រោះមានវីតាមីន C ដែលមានចំណែកសំខាន់ក្នុងការផលិតខូឡាហ្សេន (Collagen) ជាសមាសធាតុសំខាន់ដែលធ្វើឲ្យស្បែកតឹងទន់ស្អាតជានិច្ច ។

### ទឹកធម្មតា

ប្រសិនបើរាងកាយបានទទួលជាតិទឹកមិនគ្រប់គ្រាន់នឹងធ្វើឲ្យស្បែកស្ងួតរឹង ។ ដូចនេះត្រូវទទួលទានក្នុង១ថ្ងៃ ៦-៨ កែវធំ នឹងជួយធ្វើឲ្យស្បែកភ្លឺថ្លា ស្រស់ស្រាយព្រោះទឹកនឹងជួយរក្សាភាពយឺតយាររបស់សាច់ដុំ និងជួយការពារស្បែកយារជ្រីវជ្រួញ ដោយសារមានការបញ្ចុះទម្ងន់ទៀតផង ៕



## វិធីធ្វើឱ្យចិញ្ចើមកោងស្អាត



ក្រោយពេលសុភាពនារីនាងតុបតែងរាងកាយដោយសំលៀកបំពាក់គ្រឿងអលង្ការ និងសម្ផស្សនៅលើផ្ទៃមុខបានសព្វគ្រប់ហើយនោះ គោងកុំភ្លេចថាចិញ្ចើមក៏ជួយឱ្យអ្នកបានស្រស់ស្អាតដូចគ្នា ។ នោះក៏ព្រោះថា ប្រសិនបើចិញ្ចើមរបស់អ្នកមានរាងស្អាតកោងដូចជាដងកៅទណ្ឌនោះពិតជាអាចស្រូបទាញកែវភ្នែកជាច្រើនគួឱ្យផ្តោតមកសម្លឹងមើលអ្នកជាក់ជាមិនខាន ។ ខាងក្រោមនេះ គឺជាវិធីងាយៗដែលអាចជួយឱ្យរោមចិញ្ចើមអ្នកស្រស់បានដូចចិត្ត :

១-នៅពេលអ្នកដករោមចិញ្ចើមគួរស្ថិតនៅកន្លែងដែលមានពន្លឺគ្រប់គ្រាន់ មិនងងឹតពេកឬក៏ភ្លឺពេក ទើបអាចមើលឃើញទំរង់ចិញ្ចើមរបស់អ្នកបានច្បាស់ ។

២- ហាមប្រើប្រាស់កញ្ចក់ពង្រីកពេលដករោមចិញ្ចើម ព្រោះអាចបំភ័ន្តភ្នែកអ្នករហូតដល់ជ្រុលដៃបាន ។

៣- ហាមដករោមចិញ្ចើមនៅពេលជិតមានរដូវ ព្រោះពេលអ័រម៉ូនមានការប្រែប្រួលបែបនេះ អាចធ្វើឱ្យអ្នកមានអារម្មណ៍ឈឺខុសសព្វមួយផង ។

លើកនេះអ្នកពិតជាទទួលបានចិញ្ចើមដែលមានទំរង់ស្អាតយ៉ាងពិតប្រាកដ ប្រសិនបើធ្វើតាមការពោលណែនាំមកខាងលើនេះ ។ មួយវិញទៀត កុំភ្លេចថែទាំទំរង់ចិញ្ចើមឱ្យមានរូបរាងស្រស់ស្អាតជាប់ជានិច្ចទៀតផង ៕



# សម្រែកកូនខ្មែរស្នេហាជាតិ



ដោយ : ម៉ម យើន

ឱអាណាចក្រមហានគរ កូនខ្មែរក្រោកឈរយ៉ាងរឹងមាំ
ខិតខំកសាងប្រាង្គឧត្តម ប្រាសាទស្តែស្តឹមយ៉ាស្អាងស្អាត ។
កូនខ្មែរតាំងចិត្តដោយប្តេជ្ញា ស៊ូលះជីវ៉ាដើម្បីជាតិ
រក្សាការពារយ៉ាងពេញខ្នាត ចិត្តកាយឱហាទឱ្យជាតិរស់ ។
កូនខ្មែរតាំងចិត្តលើកតំកើង កិត្តិយសខ្មែរយើងឱ្យឡើងខ្ពស់
កិត្យានុភាពល្បីពិរោះ ជាតិខ្មែរល្បីចុះពេញលោកា ។
ពេលនោះជាតិខ្មែរត្រូវមានទុក ខ្មាំងចោមបុករុកគ្រប់ទិសា
ចូលមករុករានលើលើខេមរា មេនាំឫស្សាគ្មានគិតសោះ ។
បណ្តោយឱ្យជាតិឈ្មោះដៃវៀត ប្រើគ្រប់ល្បិចស្មៀតថារំដោះ
ជួយជីវិតខ្មែរឱ្យរួចគ្រោះ តែត្រូវដាក់ទោសខ្មែរស្នេហ៍ជាតិ ។
ឃើញច្បាស់ខ្លាំងណាស់គ្មានសង្ស័យ យួនចង់ប្រល័យចងអាឃាត
ខ្មែរណាស្រឡាញ់តែខ្មែរជាតិ ឱ្យបាត់ពីញាត់ជាខ្មែរពិត ។
សម្រែកកូនខ្មែរស្នេហាជាតិ ប្រាប់អស់គ្រប់ញាតិខ្មែរស្នេហ៍ស្និទ្ធ
ប្តេជ្ញាជួយជាតិតាមគំរូ ជនធ្លាប់តស៊ូពីមុនមក ។
សម្រែកកូនខ្មែសូមអង្វរ ដល់ខ្មែរត្រូវឈរហើយចាប់យក
ធមិសាមគ្គីពិតនាំជ័យជោគ នាំខ្មែរទៅរកសុខសន្តិភាព ។
សម្រែកកូនខ្មែរសូមជាតិខ្មែរ ធ្លាប់ខ្លាំងពូកែធ្លាប់បង្ក្រាប
ឱ្យខ្មាំងចុះចាញ់ឈប់ធ្វើបាប ខ្មែរមិនត្រូវខ្លាចខ្មាំងចិត្តចោរ ។
កូនខ្មែរយើងអើយត្រូវតែក្រោក ឈប់ជឿយួនបោកលើកមេដៅ
ឱ្យបានធ្វើធំពឡឹងជំនោ ធ្វើមិនឈប់ឈរសម្លាប់ជាតិ ។
កូនខ្មែរឮទេ សម្រែកយំ លាន់ឮរងំពាសពេញព្រាត
ច្រើនណាស់ជាតិខ្មែរទ្រូងចង្អៀត តឹងណែនព្រោះឃ្លាតបាត់ដីអស់ ។
កូនខ្មែរខ្លះត្រូវពួកស៊ីជៅ តាមយួនភូតភរថារំដោះ
ការពិតជាតិយួនចោរឈ្មោះ វាគ្មានស្រណោះជាតិខ្មែរទេ ។
វាសម្លាប់កូនខ្មែរឱ្យអស់ រួចថារំដោះចំការស្រែ
សម្បត្តិធម្មជាតិ បឹងទន្លេ ព្រៃភ្នំផ្សារផែប្រាំងប្រាសាទ ។
យួនដណ្តើមអស់មុខរបរ ជាតិខ្មែរធ្លាប់ក្រ ក្រហូសខ្នាត
មេខ្មែរចិត្តក្បត់គ្មានគិតជាតិ ដេញខ្មែរឱ្យឃ្លាតទៅស្រុកក្រៅ ។
ដីខ្មែរមេក្បត់ឱ្យទៅយួន ជាតិខ្មែរធ្លាក់ខ្លួនគ្មានដីនៅ
គ្មានស្រែចំការច្បារអំពៅ មេខ្មែរចិត្តខ្មៅផ្តល់ឱ្យយួន ។
សម្រែកកូនខ្មែរសូមប្រកាស ឱ្យខ្មែរដឹងច្បាស់ពីច្បាប់ក្បួន
យើងជាជាតិខ្មែរត្រូវភ្ញាក់ខ្លួន ឈប់ចាញ់បោកយួនតទៅអើយ ៕

ទស្សនៈស្នេហាជាតិ :

# ពេលអស់ត្រី យួនសុំដីមករស់នៅលើគោកវិញ

ដោយ :ម៉ម យើន

•ប្រវត្តិជនជាតិយួន កន្លងជាច្រើនសតវត្សមក ហើយដែលបានចូលមករស់នៅលើទឹកដីខ្មែរ ទៅតាមគម្រោងផែនការរបស់មេដឹកនាំយួន។

ជនជាតិយួនខ្លះ ស្វែងរកដីធ្លីនៅកន្លែងណាដែលមានជីជាតិល្អ សំរាប់សង់ទីលំនៅ និងធ្វើស្រែចំការបង្កបង្កើតផលជួយទ្រទ្រង់ជីវភាពឱ្យបានរស់នៅយ៉ាងល្អប្រសើរក្រៃលែង ។

ជនជាតិខ្លះ ជាអ្នកពេញចិត្ត និងមានជំនាញខាង ការនេសាទត្រី ចិញ្ចឹមក្រពើ ជាដើម បាននាំគ្នាតាំងទីលំនៅលើទឹក តាមដងទន្លេមេគង្គ ទន្លេសាប ទន្លេបាសាក់ តាមដងស្ទឹង ដងព្រែក ជាពិសេសនៅក្នុងបឹងទន្លេសាប និងបរិវេណជុំវិញទន្លេសាបយ៉ាងកកកុញ និងយ៉ាងអានាធិបតេយ្យជាទីបំផុត ។

ការចូលមករស់នៅលើទឹកដីខ្មែរ របស់ជនជាតិយួននេះ បានបណ្តាលឱ្យជនជាតិខ្មែរជាសកម្មជន បញ្ញាវ័ន្តស្នេហាជាតិពិតប្រាកដយល់ដឹង និងមើលឃើញយ៉ាងច្បាស់ ជាក់ស្តែងណាស់ថា ជនជាតិយួន និងមេដឹកនាំយួន ពិតជាមានគម្រោងផែនការសំរាប់ពង្រីកឥទ្ធិពលឱ្យបានខ្លាំង និងពង្រីកទឹកដីផកាន់តែធំមកលើទឹកដីខ្មែរ ។

អ្នកតស៊ូ ជាសកម្មជន បញ្ញាវ័ន្តស្នេហាជាតិខ្មែរច្រើនណាស់ បានត្រូវបាត់បង់ជីវិត ពីព្រោះតែចង់ការពារទ្រទ្រង់ទឹកដីជាមាតុភូមិដ៏ជាទីស្រឡាញ់ស្មើនឹងជីវិតរបស់ខ្លួនមិនតែប៉ុណ្ណោះ បានទាំងកត់ត្រាចារឹកទុកក្នុងសៀវភៅប្រវត្តិសាស្ត្រសំរាប់ដាស់តឿន រំលឹកដល់សតិស្មារតីជនជាតិខ្មែរជំនាន់ក្រោយៗឱ្យចងចាំ ហើយខិតខំព្យាយាមតស៊ូថែរក្សាទឹកដីជាតិមាតុភូមិនេះ ឱ្យបានគង់ចិរង្សតទៅ ។ លោកសាស្ត្រាចារ្យខាងប្រវត្តិសាស្ត្រ **នួន ឃឿន** លោកបានសរសេរសៀវភៅលំនាំប្រវត្តិសាស្ត្រដាក់ឈ្មោះថា **"ដំណើរឆ្ពោះទៅទិសខាងលិច"** ចង់បញ្ជាក់បង្ហាញពីមហិច្ឆិតាលោភលន់ និងគម្រោងផែនការរបស់មេដឹកនាំយួន គេបានប្រាប់ជាបណ្តាំទូន្មានដល់ជនជាតិយួនទាំងអស់ឱ្យដឹងថា យើងជាជនជាតិ កំពុងតែកើនចំនួនកាន់តែច្រើនឡើងៗជារៀងរាល់ថ្ងៃ ជីវិភាពរស់នៅកាន់តែជួបប្រទះនឹងបញ្ហាលំបាកវេទនាកាន់តែច្រើនឡើងៗដែរ ។

ដូច្នេះដំណោះស្រាយបញ្ហានេះ មានតែ១គត់ គឺយួនយើងត្រូវតែនាំគ្នាធ្វើដំណើរទៅទិសខាងលិច ដែលមានសល់ទឹកដីទំនេរ ហើយមានជីជាតិ និងមច្ឆាជាតិច្រើនណាស់យ៉ាងបរិបូរ ។

ម្យ៉ាងទៀត ត្រូវឱ្យជនជាតិយួនយើងកុំខ្លាចជន ជាតិខ្មែរ ដែលរស់នៅយ៉ាងតិចតួចនោះអី ពីព្រោះសុទ្ធជាមនុស្សល្ងង់ខ្លៅ ពុំមានសមត្ថភាពហាមឃាត់ពួកយួនយើងបានទេ ហើយជនជាតិខ្មែរទាំងនោះនឹងក្លាយជាជនជាតិភាគតិចទៅនឹងដែនដីខ្មែរកម្ពុជាក្រោមចំនួន២១ខេត្ត ដែលយួនយើងបានយកតាំងតែពីសតវត្សទី១៦មកនោះដែរ ។

ពាក្យបណ្តាំទូន្មាន ប្រៀនប្រដៅរបស់មេដឹកនាំយួននេះ យួនបានបង្ហាត់បង្រៀនរហូតមកដល់សម័យឆ្នាំ១៩៧៨ ដែលជាឱកាសល្អខ្លាំងណាស់បានហុចឱ្យ ពីព្រោះសភាពចុះទន់ខ្សោយស្ទើរដល់គំរិតសូន្យហើយ យួនបានប្រើកលល្បិចយ៉ាងស្ទាត់ជំនាញយកដៃមេដឹកនាំខ្មែរឱ្យសម្លាប់ជីវិតខ្មែរជនជាតិខ្លួនឯងយ៉ាងរង្គាល ធ្វើឱ្យទឹកដីខ្មែរទាំងមូលក្លាយទៅជា **"ទីវាលពិឃាដ"** ជីវិតខ្មែរជាង៣លាន់នាក់ត្រូវស្លាប់បាត់បង់ទៅយ៉ាងសែនអាណោចអធ័ម ចំណែកអ្នកគង់វង្សជីវិត គឺជាមនុស្សទន់ខ្សោយ ដុនដាបទាំងសុខភាព ទាំងសតិបញ្ញាទាំងធនធានទ្រព្យសម្បត្តិ ក្លាយទៅជាជនអសមត្ថភាពក្នុងការដឹកនាំគ្រប់គ្រងប្រទេសជាតិមាតុភូមិខ្លួនឯងទៅហើយ ។

ត្រង់ចំណុចនេះហើយ បានជនកងទ័ពយួនក្រហម ចំនួន២សែននាក់រួមទាំងអ្នកជំនាញការ និងទីប្រឹក្សារាប់ពាន់នាក់ បានវាយលុកលុយតែក្នុងរយៈពេលប្រមាណតែពាសប្តាហ៍ ប្រទេសខ្មែរទាំងមូល ត្រូវតែធ្លាក់ទៅជាប្រទេសស្ថិតនៅក្រោមការកាន់កាប់ត្រួតត្រាដោយកងទ័ពយួនទាំងស្រុងនៅថ្ងៃទី៧ ខែ មករា ឆ្នាំ១៩៧៩ ។

ក្រោយពីបានជ័យជំនះជាស្ថាពរហើយ រដ្ឋាភិបាលសង្គមនិយមក្រហម បានរៀបចំការគ្រប់គ្រងប្រទេស និងជនជាតិខ្មែរ ដោយផ្ទាល់ដៃតែម្តង មេប្រធានបក្សកុម្មុយនីស្តយួនឈ្មោះ ឡេ ឌឹកអាន់ ឱ្យចូលមករួមគ្នាជាមួយអ្នជំនាញការ និងទីប្រឹក្សាធ្វើការយ៉ាងសកម្មបំផុត ហើយបានប្រកបដោយជោគជ័យរហូតមកដល់សព្វថ្ងៃនេះ ។

ទោះបីសព្វថ្ងៃប្រទេស និងជនជាតិខ្មែរ មានមេដឹកនាំជាខ្មែរក៏ដោយ ប៉ុន្តែមេដឹកនាំនេះ ពុំបានបញ្ជាក់បង្ហាញពីទង្វើ និងការប្រព្រឹត្តរបស់ខ្លួនថា ជាជាតិសាសន៍ខ្មែរពិតប្រាកដទេ ។

រឿងផ្តល់ដីធ្លីជាសម្បទានសេដ្ឋកិច្ចក្តី សង្គមកិច្ចក្តី រាប់ច្រើនសែនហិតារួចជាស្រេច រឿងបើកទ្វារព្រំដែនបង្ហូរជនជាតិយួន ឱ្យចូលមកតាំងទីលំនៅជាអចិន្ត្រៃរាប់លាននាក់ជារៀងរាល់ថ្ងៃក្តី រឿងផ្តល់សិទ្ធិអំណាចយ៉ាងពេញបរិបូរទៅជនជាតិយួនគ្រប់ជាន់ថ្នាក់ពាសពេញប្រទេសខ្មែរក្តី ឃើញថា មេដឹកនាំខ្មែរ បានប្តេជ្ញាតាំងចិត្តយ៉ាងខ្លាំងណាស់ក្នុងការបំពេញសេចក្តីត្រូវការចង់បានរបស់ជនជាតិយួនទាំងនោះ ។ រីឯជនជាតិខ្មែរ លែជាម្ចាស់ទឹកដី ត្រូវបានមេដឹកនាំខ្មែរ លែងគិតរវីរវល់ខ្វល់ខ្វាយដោះស្រាយអ្វីទាំងអស់ ថែមទាំងធ្វើការរំលោភលើសិទ្ធិសេរីភាពគ្រប់បែបយ៉ាង ។

ពេលថ្មីៗនេះ មេដឹកនាំខ្មែរ បានចាប់ផ្តើមលើកយករឿងជនជាតិយួនរាប់ច្រើនម៉ឺនគ្រួសារ ដែលកំពុងរស់នៅលើទឹកឱ្យបានឡើងទៅរស់នៅលើគោកវិញ (តទៅទំព័រទី ០៥)

# ឱ !អ្នកនយោបាយអើយ

ដោយ : រស់ យឿន

•••ព្រះបរិយុត្តិធមិ និយាយថា "បើគ្មានតណ្ហា ក៏មិនមានបញ្ចក្ខន្ធ" បើគ្មានបញ្ចក្ខន្ធ ក៏គ្មានអ្វីដែលទទួលទុក្ខ ។ អីចឹងទេ!!! មិនគប្បីបណ្តោយ កាយ-វាចា- ចិត្តរបស់យើងឱ្យបុគ្គលពាលអូសទាញចូលក្នុងប្រអប់អកុសលកម្មតាមទំនើងចិត្តរបស់វា ព្រោះតែយើងខ្វះសតិសម្បជញ្ញៈនោះឡើយ ។ ព្រះធម៌ទាំងឡាយបានចម្រាញ់ចេញពីតួខ្លួនមនុស្ស ។ មនុស្សមានវិចារណញ្ញាណសំរាប់ត្រិះរិះឱ្យស្គាល់ **កម្មជាកុសល ឬជាអកុសល ៕**

អីចឹងហើយបានាថា : អាចដើម្បី-គឺដើម្បី-ប្រយោជន៍ដើម្បី ស្រុកខ្មែរបានសុខសន្តិភាពពិតប្រាកដនោះ បុគ្គលមានមនសិការជាតិពិចារណាលើស្ថានភាពនយោបាយនៅកម្ពុជា ហាក់ដូចជាហួសពេលយុទ្ធនាការណ៍រកសន្លឹកឆ្នោតទៅកាន់អំណាចហើយមើលទៅ !!! ប៉ុន្តែ បើគ្រាន់តែជាការបង្រួបចិត្ត ក៏ចេះតែបន្តទៅទៀតចុះ គ្រាន់បានជាអុសដុតកំដរភ្លើងសង្គ្រាម ។

បូរាណពោលថា យើងមានគុណទៅលើគេ កុំសំដែង-គេមានគុណមកលើឯងកុំបំភ្លេច- បើគេគន់គួរតែកំទេច សុំកុំភ្លេចសង (គុណ) វិញ ដោយដំបង។ ជំពាក់ត្រូវតែសង-តែកុំចងឱ្យជំពាក់( អាណឹងគេហៅកិច្ចសន្យាក្រោមចុងអាវុធ) តែពីរនាក់ ជាប់អន្ទាក់ត្រូវលក់ទឹកលក់ដី-ព្រៃព្រឹក្សា-លក់កេរ្តិ៍ជូនតា និងគ្រួសារ សងគេតកូនចៅ ។

ព្រះអាទិត្យពិតជារះលើដីខ្មែរ ពេលព្រឹក ៧មករា -ព្រះសូរិយា ក៏លិចនៅថ្ងៃនោះដែរ បីដូចបានស្រង់ជាតិខ្មែរ ពីណ្តៅដាក់ក្នុងអណ្តូង ។

តាង៉ុយ ពោលទុកថា : ជាតិខ្មែរមិនចេះខ្មាស់មកពីចាស់គំនិតខ្លី ល្ងង់ដប់ចេះពីរបី ចេះជួញក្តីមិនចេះច្បាប់ ។ មិនចេះលេខអក្សរ មុខមាត់ល្អប្រាជ្ញាអ័ព្ទ ឈ្មោះខ្លួនភ្លេខ្លួនស្រាប់ គេសូត្រប្រាប់ទើបបានដឹង ។

មកដល់ពេលនេះហើយ ជាតិត្រូវការមនសិការ និងឆន្ទះ ខន្តី វិរិយៈ វិមំសា -រំដោះជាតិ និងសាសនា ទើបហៅថាជាកូនខ្មែរ-ស្នេហាជាតិមាតុភូមិ ។

កុំអង្គុយចាំធម្មិក ត្រូវមានសតិដាស់ស្មារតីឱ្យភ្ញាក់រលឹក កុំរលត់ឈឹង ជាតិរស់ ឬរលាយត្រូវតែដឹង មានព្រលឹងបញ្ចេញសម្លេង ។

ឱ ! អ្នកនយោបាយអើយ..... ដល់ពេលហើយត្រូវរួមគ្នា ៕